សារព័ត៌មាន ខ្មែរប៉ុស្ត៍ ស.រ.អ
# KhmerPost USA
E-mail: info@khmerpost.us / Website : khmerpost.us
Advertising: 978-656-8141/ Hotline news: 978-942-1641

Free

មាតិការរឿង Issue 177 from June 2nd. to 15th. 2015



Office: Tel: (978) 677-7163 Fax: (978) 677-7092
45 Merrimack St. Suite 218A Lowell, MA 01852

## វិចារណកថា

### នយោបាយថ្មីនៃគណបក្សសង្គ្រោះជាតិ



ពិន សំខុន

ដោយ ពិន សំខុន -ថ្ងៃ ២៦ ឧសភា២០១៥

ចាប់តាំងពីចូលឆ្នាំខ្មែរមក គេសង្កេតឃើញលោក សម រង្ស៊ី ចេញមុខមាត់ជាមួយលោក ហ៊ុន សែន ជាប់ជានិច្ចនិយាយអ្វីក៏មាន តទៅទំព័រទី ២៩

### Cambodian Opposition Party's New Politics

By Pin Samkhon, May 26, 2015

Mr. Sam Rainsy, the President of the Cambodian Opposition Party, is seen with Prime Minister Hun Sen more frequently. He has been more careful Continued to Page 18

## លោក សម រង្ស៊ី : វប្បធម៌សន្ទនា គឺដើម្បីផ្លាស់ប្តូរ



Sam Rainsy and CPP Supporters

ដោយ ស្តាយ បុណ្យ

ទីក្រុងឡូវែល រដ្ឋម៉ាសាឈូសេត: កាលពីល្ងាចថ្ងៃអាទិត្យ ទី២៤ ខែ ឧសភា ឆ្នាំ២០១៥ កន្លងទៅនេះ លោក សម រង្ស៊ី ប្រធានគណបក្សសង្គ្រោះជាតិ បានជួបសំណេះសំណាលជាមួយអ្នកគាំទ្រគណបក្សសង្គ្រោះជាតិប្រមាណ ៤០០ នាក់ នៅភោជនីយដ្ឋានសំពៅមាស ក្រុងឡូវែល។ អ្វីដែល តទៅទំព័រទី ១១

# គោលដៅលំហែរកាយថ្មី នៃឆ្នេរសមុទ្រមើធីល

## Destination Myrtle Beach in South Carolina

**ដោយ សូបិន ពិន**

បន្ទាប់ពី៩ខែដ៏នឿយហត់ក្នុងការរៀបចំក្លឹបសារព័ត៌មាននឹងដំណើរការពិធីទទួលបុណ្យជាតិ"ទិវាគេរដំណែលអាស៊ីប៉ាស៊ីហ្វិក"នៅឡូវែលយើងសម្រេចចិត្តចេញដំណើរមកសម្រាកកាយនឹងគំនិតនៅឆ្នេរសមុទ្រអាតឡង់ទិកផ្នែកខាង









ត្បូងរដ្ឋសៅការ៉ូឡាណានៃសហរដ្ឋអាមេរិកនៅខាងជើងជាប់រដ្ឋហ្វ្លរីដាចំនួន១២ថ្ងៃ ។

មែនហើយ! លំហែរកាយ គឺដកខ្លួនពីការគិតគូរដល់ការងារប្រចាំថ្ងៃឱ្យផុតស្រឡះមុននឹងត្រឡប់មកបន្តការងារដដែលនោះឱ្យបានពេញទំហឹងវិញ បំរើអតិថិជនប្រកបដោយកម្លាំងមាំមួននឹងប្រាជ្ញាស្រឡះវាងវៃ។ យើងចេញដំណើរទាំងពីម៉ោង៧ព្រឹកនៃថ្ងៃទី២២ឧសភាទៅកាន់អាកាសយានបូស្តុន យើងជិះយន្តហោះ "ស្ពីរីត" ដែលជាក្រុមហ៊ុនថ្មីកំពុងវាតទីផ្សារអាកាសចរក្នុងស្រុកអាមេរិក ដែលអាចឱ្យយើងរកតម្លៃបានថោកសម្រាប់តំណើរទៅមករបស់គ្រួសារដែលមានគ្នា៣នាក់មានខ្ញុំ(សូបិន)ប្តីខ្ញុំ នឹងប៊ុណ្ណារ៉ូ ។ ចម្លែកជាងរាល់ដងនៃជើងដំណើរតាមយន្តហោះដំណើរយើងចង្អៀតប៉ែសស្ទើរគ្មានកន្លែងដាក់ជើងតែលើកនេះបែរជាកន្លែងអង្គុយទូលាយជាងមុនកន្លែងដាក់អីវ៉ាន់យួរដៃក៏មិនរយីងរយោងនឹងនៅទូលាយធ្វើឱ្យដំណើរប្រមានបីម៉ោងមិនបានធ្វើឱ្យយើងនឿយហត់ដូចពេលមុនៗនោះទេ។ ធាតុអាកាស៧០ ពេលចេញពីបូស្តុន ហើយមកដល់មានជិត៨០អង្សារក៏បានធ្វើឱ្យយើងរីករាយក្នុងចិត្តណាស់ហើយដែរ។

មកដល់ចំណតយន្តហោះ"មើធីលប៊ីច" តូចទេតែទំនើបធ្វើឱ្យយើងយល់ថា ទីនេះប្រាកដជាគោលដៅទេសចរណ៍ជាមិនខាន ។ មែន! គឺជាគោលដៅទេសចរណ៍ដែលចាប់កសាងឡើងពីប្រមាណ២០ឆ្នាំមុន ឥឡូវពោរពេញទៅដោយហាងលក់ទំនិញធំៗភោជនីយដ្ឋានថ្នាក់ខ្ពស់សណ្ឋាគារខ្ពស់ៗកម្មវិធីកំសាន្តនឹងរាត្រីសមោសរដ៏គួរឱ្យចាប់ចិត្តចង់តាមដានទស្សនា ។ គាប់ជួនថ្ងៃចុងសប្តាហ៍នេះ គេមានកម្មវិធីជួបជុំអ្នកជិះកង់ ឬជិះម៉ូតូមួយជាលក្ខណៈប្រទេសថែមទៀតនោះ នៅតាមមហាវិថីធំៗក្រុមជិះម៉ូតូរាប់រយនាក់ជាហ្វូងៗ បើកបរយ៉ាងខ្ទរខ្ទារតាមផ្លូវទាំងថ្ងៃទាំងយប់យ៉ាងរីករាយ។ យើងបានមកសំណាក់នៅសណ្ឋាគារសម្បូរបែបមួយដែលមានឈ្មោះថា "អូស៊ានរីហ្វ" Ocean Reef ដែលមានធំហ៊ឹមិនចាញ់"អិមជេអិម"នៅ"ឡាសវេហ្គាស"ទេ យើងយកបន្ទប់មួយដែលបើកទ្វារទៅរកមហាសាគរអត្លង់ទិកដ៏ធំល្វឹងល្វើយនៅពីមុខសម្រាប់តែគ្រួសារយើងតែម្នាក់ឯង គួរឱ្យអស្ចារ្យណាស់ យើងបានទាំងខ្យល់សមុទ្រដ៏បរិសុទ្ធ សម្លេងរលកសមុទ្របោកបាចគ្មានឈប់ឈរកំដៅព្រះ-អាទិត្យចាប់ពីថ្ងៃរះ រហូតដល់ថ្ងៃត្រង់ក្នុងបន្ទប់ដ៏តូចច្រឡឹងបាន





ទស្សនីយភាពនៃអ្នកដើរកំសាន្តតាមឆ្នេរសមុទ្រខ្សាច់ទាំងគូរៗពីព្រលឹមទល់ព្រលប់យ៉ាងត្រជាក់ចិត្តគ្មានខ្វល់ដោយទុក្ខលំបាកអ្វីឡើយ។

សណ្ឋាគារសម្បូរបែបមនុស្សសម្បូរបែបដែលនៅទីនេះមានន័យជាគុណសម្បត្តិទៅវិញ មិនដូចការប្រៀនប្រដៅនៃក្រុមរៀមច្បងខ្មែរក្រហម ឬវប្បធម៌ចាស់បូរាណយើងទេ ។ គេអាចរកស៊ីមានបានដោយសុច្ចរិតចាយវាយទៅវិញក៏ដោយសុច្ចរិតទោះជាចាយច្រើនជាងអ្នកដ៏ទៃបន្តិច ក៏សម្រាប់តម្រូវចិត្តខ្លួនឯងបានម្តងម្កាលដែរ កុំតែទៅលួចប្លន់ ឬប្រវ័ញ្ចអ្នកណាម្នាក់យកមកចាយធ្វើជាឫកសម្បើមនោះ ទើបចាត់ថាខុសបាន។ នៅជុំវិញយើង នាសប្តាហ៍នេះភ្ញៀវជាច្រើនបានមកបំពេញសណ្ឋាគារដ៏ធំសម្បើមនេះ នឹងកន្លែងសម្បូរបែបឯទៀតៗដ៏ច្រើនចាយវាយយ៉ាងខ្ជះខ្ជាយឱ្យតែបានសប្បាយចិត្ត ឬឱ្យតែបានបំពេញចិត្តមនុស្សដែលខ្លួនស្រឡាញ់... គ្មានសញ្ញាណាមួយដែលថាអំពើទាំងនោះ ជាទុច្ចរិតឬជាអបាយមុខឡើយ ក៏ប៉ុន្តែនៅតែមានខ្មែរយើងជាច្រើនមិនហ៊ានបោះ១ជំហានទៅមុខស្រាយចំណងឆ្លងកាត់ទស្សនៈដែលរំខានមិនឱ្យយើងបានសប្បាយនឹងពិភពថ្មីនេះ ដែលសម្រាប់មនុស្សមួយក្រុមគេហៅថា "សម្បូរបែប" រីឯមួយក្រុមទៀតហៅពីភពថ្មីនេះថា "ឋានសួគ៌" ទៅវិញ បានម្តងនៅឡើយទេ។

នៅ"សៅការូឡាយណា"ជាតំបន់អាមេរិកខាងត្បូងមានប្រវត្តិជាអម្បូរទាសករ ដូច្នេះ

តទៅទំព័រទី ២៣



# អត្ថប្រយោជន៍បន្ថែម។ ចំណាយ $0។

ប្រសិនបើលោកអ្នកមានអាយុ 65 ឬចាស់ជាងនេះ និងមានលក្ខណសម្បត្តិគ្រប់គ្រាន់សម្រាប់ MassHealth Standard គំរោង របស់យើងអាចផ្តល់ជូនលោកអ្នកនូវអត្ថប្រយោជន៍ច្រើនជាង Original Medicare។

ជាមួយនឹង UnitedHealthcare® Senior Care Options (HMO SNP) គ្រពេទ្យ មន្ទីរពេទ្យ និងការចំណាយលើថ្នាំដែលមានវេជ្ជបញ្ជារបស់លោកអ្នកគឺស្ថិតនៅក្រោមប័ណ្ណដែលមានភាពងាយស្រួលមួយ។ លើសពីនេះ លោកអ្នកនឹងទទួលបានអត្ថប្រយោជន៍បន្ថែម--ដោយអ្នកឥតចំណាយអ្វីសោះ។ អត្ថប្រយោជន៍បន្ថែមទាំងនោះរួមមាន៖



តម្លៃរួមចំណែក $0
សម្រាប់ការសំអាត
ការប៉ះ និងការដាក់ធ្មេញ
និងអ្វីៗជាច្រើនទៀត។




តម្លៃរួមចំណែក $0
សម្រាប់ថ្នាំដែលគេចេញថ្លៃឲ្យ។



តម្លៃរួមចំណែក $0
សម្រាប់វ៉ែនតា



តម្លៃរួមចំណែក $0 សម្រាប់
ការធ្វើដំណើរទៅជួប
វេជ្ជបណ្ឌិតតាមការណាត់។



ទូរស័ព្ទលេខ **1-781-888-7779, TTY 711**៖
នឹងភ្នាក់ងារក្នុងស្រុកដែលមានអាជ្ញាប័ណ្ណអាចជួយលោកអ្នក
ប្រសិនបើលោកអ្នកអាចទទួលអត្ថប្រយោជន៍បន្ថែមដោយមិន
ចំណាយអ្វីទាំងអស់។ [ឬ ចូលទៅ UHCCommunityPlan.com]។



UnitedHealthcare®
Community Plan

UnitedHealthcare SCO គឺជាគម្រោងថែទាំសុខភាពសម្របសម្រួលមួយ ដែលមានកិច្ចសន្យាជាមួយ Medicare និងជាប់កិច្ចសន្យាជាមួយកម្មវិធី Commonwealth of Massachusetts Medicaid។ ការចុះឈ្មោះនៅក្នុងគម្រោងគឺផ្អែកទៅលើការបន្តកិច្ចសន្យាជាថ្មីនៃគម្រោងជាមួយ Medicare។ គម្រោងនេះគឺជាកម្មវិធីស្ម័គ្រចិត្ត ដែលអាចរកបានសម្រាប់អ្នកដែលមានវ័យចាប់ពី 65 ឆ្នាំឡើងទៅ ដែលមានលក្ខណៈសម្បត្តិគ្រប់គ្រាន់សម្រាប់ MassHealth Standard និង Original Medicare។ ប្រសិនបើលោកអ្នកមាន MassHealth Standard ប៉ុន្តែលោកអ្នកមិនមានលក្ខណសម្បត្តិគ្រប់គ្រាន់សម្រាប់ Original Medicare លោកអ្នកនៅតែមានសិទ្ធិក្នុងការចុះឈ្មោះក្នុងគម្រោង MassHealth Senior Care Option និងទទួលអត្ថប្រយោជន៍ MassHealth ទាំងអស់របស់លោកអ្នកតាមរយៈកម្មវិធី SCO របស់យើង។ ព័ត៌មានអត្ថប្រយោជន៍ដែលបានផ្តល់គឺជាសេចក្តីសង្ខេបខ្លី មិនមែនជាការពិពណ៌នាពេញលេញនៃអត្ថប្រយោជន៍ទេ។ សម្រាប់ព័ត៌មានបន្ថែម សូមទាក់ទងមកគម្រោង។ ការកំហិត -តម្លៃរួមចំណែក និងការកំរិតផ្សេងទៀតអាចត្រូវយកមកអនុវត្ត។ អត្ថប្រយោជន៍ ការផ្សំឱសថ បណ្តាញឱសថ បណ្តាញគ្រូពេទ្យផ្តល់សេវា ប្រាក់បង់ប្រចាំខែ និង/ឬ ថ្លៃបង់រួមផ្សំពេលទៅពេទ្យម្តងៗ/សហធានាក៏ប៉ុន្តែអាចផ្លាស់ប្តូរនៅថ្ងៃទី 1 ខែមករានៃឆ្នាំនីមួយៗ។ ព្រីមៀម ថ្លៃបង់រួមផ្សំពេលទៅពេទ្យម្តងៗ សហធានាក៏ប៉ុន្តែ និង ថ្លៃបង់ប្រចាំឆ្នាំមុនពេលធានាក៏ប៉ុន្តែបង់ឲ្យ ប្រហែលជាខុសៗគ្នាទៅតាមកម្រិតនៃជំនួយបន្ថែម ដែលអ្នកទទួល។ សូមទាក់ទងមកគម្រោងសម្រាប់ព័ត៌មានលំអិតបន្ថែមទៀត។ អ្នកចុះឈ្មោះមិនតម្រូវឲ្យបង់ប្រាក់ពីហោប៉ៅទេ។

H2226_150326_160615KM
UHCSCO_150326_160615KM

CST7822

# សូមប្រញាប់ទៅមើលឱ្យមុនគេ....

## ទីប្រជុំជនក្រុងឡូវែលនៅថ្ងៃព្រហស្បតិ៍ដើមខែនេះ

**នៅថ្ងៃព្រហស្បតិ៍ទី ៤ ខែមិថុនាពី 5-9PM**

**ដោយ Deb Belanger,**

**ប្រែសម្រួលដោយថាច់-វណ្ណា**

ការអញ្ជើញដើម្បីឱ្យមានភាពសប្បាយរីករាយ,សិល្បៈសារមន្ទីរនិងតន្ត្រីនៅក្នុងជីវិតឡូវែល! ថ្ងៃព្រហស្បតិ៍ដើមខែ, រួមមានព្រឹត្តិការណ៍ជាច្រើនពីវិចិត្រសាលសិល្បៈ, សារមន្ទីរ និងដៃគូសហគមន៍ដទៃទៀតដែលបានមកជាមួយគ្នាដើម្បីធ្វើជាភ្ញៀវមួយយប់ដោយសប្បាយរីករាយដ៏ធំមួយ! ខាងក្រោមនេះជាសកម្មភាពមួយចំនួនដែលបានសំដែងនៅទីនោះ, ប៉ុន្តែត្រូវប្រាកដពិនិត្យមើលក្នុងវ៉ែបសាយ: cultureiscool.org សម្រាប់បញ្ជីពេញលេញ។

•**ចូលរួមជាមួយពួកយើងនៅលើរថយន្ត Trolley** ! សារមន្ទីរផ្លូវរថយន្តជាតិ និងមានយានយន្តផលិតផលឆ្នាំ ១៩២៤ នៅទីក្រុង New Orleans ផ្លូវរថយន្ត #966 រមៀលតាមបណ្តោយបទ និងមានផ្តល់ជូនការជិះឥតគិតថ្លៃ។ តារាងពេលវេលាមានដាក់នៅក្នុងមជ្ឈមណ្ឌលទស្សនៈកិច្ចឧទ្យានប្រវត្តិសាស្ត្រជាតិ។ ជ្រើសយក (Mack Plaza) ម៉ាកផ្លាហ្សានៅលើជ្រុងផ្លូវ Dutton និង arket Street ពីម៉ោង៥ល្ងាចរហូតដល់ពេលព្រលប់។

•**សួនខ្នាតតូច**ថែរក្សាបានល្អ? នៅម៉ោង ៦ ល្ងាចនៅក្នុងទីធ្លានៃទីផ្សារ Mills នៅមជ្ឈមណ្ឌលទស្សនៈកិច្ចឧទ្យានប្រវត្តិសាស្ត្រជាតិ (246 Market St.) រួមជាមួយ Joni Allard នៃប្រភេទតូចនិងការចូលរួមជាមួយ និងសួន ( Fairy Garden Shoppe ) បង្ហាញឱ្យឃើញនូវភាពស្រស់ល្អដែលបានបង្កើតដោយឡាងធំៗមានដាំដើមរុក្ខជាតិនៅក្នុងនោះ,ដោយមនោគតិ និងមាន សម្ភារៈចម្ការខ្នាតតូចៗជាច្រើនទៀត។

•ការរក្សាទុកកន្លែងកំសាន្តដ៏តូចមួយនេះ, អញ្ជើញចូល**សិល្បៈសម្ព័ន្ធឡូវែល** (ALL) វិចិត្រសាល, ៣០៧ ផ្លូវ Market,ដើម្បីមើលជាមុន "តូច ប៉ុន្តែខ្លាំង"បង្ហាញឱ្យឃើញពីការងារដ៏តូចមួយពីម៉ោង៥-៩ល្ងាច, និងការបង្កើតស្នាដៃសិល្បៈកម្ម"តូច ប៉ុន្តែខ្លាំង"នៅក្នុងថ្នាក់រៀនវិចិត្រសាលពី ៦:៣០-៧:៣០ល្ងាច។

•សូមរីករាយជាមួយ**សំឡេងអ្នកនៅក្នុងក្រុង** (Mark Brach) ដែលនឹងធ្វើឱ្យអ្នកបណ្តែតអារម្មណ៍និងមនោសញ្ចេតនាទៅតាមចង្វាក់ប្រជាប្រិយ , ចង្វាក់ jazz ពីម៉ោង ៦:០០- ៧:៣០ ល្ងាចនៅវិចិត្រសាល millWORKS, នៅ Appleton Mills, 219 Jackson St. រួម និងការរីករាយជាមួយនិងរូបថតរបស់អាស្លី ប៉ូសូទី (Ashley Pizzuti)ទៀតផង។




•មិនគួរខកខាននៅវិចិត្រសាល **Ayer Lofts**, 172 Middle St ។ ពីម៉ោង៥-៧ល្ងាច, ការបញ្ចាំងផ្ទាល់នៅរូបភាពពីប្រទេសកម្ពុជាដែលបង្ហាញពីការងាររបស់លោកគីមហាក់ដោយមានប្រផ្នូលពន្លឺ, ក្រោមការឧបត្ថម្ភដោយមន្ទីរពេទ្យឡូវែល។

•ប្រសិនបើអ្នកមិនបានទៅទស្សនា**សិល្បៈស្រាវជ្រាវសហការ**,នៅលេខ៨២ Prescott St. ទេនោះ, ក្នុងពេលឥឡូវ នេះគឺជាឱកាសរបស់អ្នក, ពួកគេនឹងមានពិធីបើកធ្វើ "ពីទីនេះសម្រាប់ការជ្រើស វត្ថុម្យ៉ាងនៅកន្លែងណាមួយ" ពី៦-៨ល្ងាច។

ជារៀងរាល់ដើមខែ ដែលខ្ញុំបានចុះក្នុងតារាងកំណត់នោះគឺនៅ Mill លេខ៥

សូមអញ្ជើញចូល មើល Mill លេខ៥, នាំយកអំណោយពិតជា ត្រជាក់ចិត្តនៅក្នុងផ្សាររាត្រីនោះពីម៉ោង៥-១០ យប់, ហើយខណៈពេលដែលអ្នកមាននៅទីនោះ, រីករាយជាមួយហ្សាស (Jazz) ផ្ទាល់នៅលើឆាកល្ខោន Luna ដែលជាកន្លែងដែលអ្នកអាចទម្លាក់ខ្លួនចុះទៅក្នុងកៅអីដែលមានភ្នាក់ដៃអម, មាន SIP ញាំុសិប្បកម្មក្នុងស្រុកនិងរីករាយជាមួយតន្ត្រី បែបទំនើប,មួយចំនួននៃអ្នកលេងជាអ្នកប៉ិនប្រសប់បំផុតនៅក្នុងតំបន់នោះ,ពីម៉ោង៨:៣៥-១១:៣០ល្ងាច។

**ចូរកុំភ្លេចថា:** នេះគឺគ្រាន់តែជាគំរូមួយនៃសកម្មភាពដែលកើតឡើងនៅក្នុង Dowtown ឡូវែលនៅថ្ងៃព្រហស្បតិ៍ជាលើកដំបូងមួយ។ ពិនិត្យមើលសេចក្តីលម្អិតទាំងអស់នោះនិងធ្វើឱ្យទាន់សម័យនៅ Cultureiscool.org

# Be the first to check out...

## DOWNTOWN LOWELL FIRST THURSDAYS

**Thursday, June 4 from 5-9PM**
**By Deb Belanger**

Your invitation to fun, art, museums and music in Lively Lowell! First Thursdays include numerous events from art galleries, museums and other community partners who come together to host one big fun night! Here's a little bit of some of the activities taking place but be sure to check out cultureiscool.org for a complete listing.

• Join us aboard the Trolley! The National Streetcar Museum will have the vintage 1924 New Orleans streetcar #966 rolling along the tracks and offering free rides. The Schedule is available at the National Historical Park Visitor Center. Pick up at Mack Plaza, on the corner of Dutton and Market Streets from 5PM until dusk

• Love Miniature Gardening? At 6PM in the Market Mills Courtyard, by the National Park Visitor Center (246 Market Street) join Joni Allard of The Miniature and Fairy Garden Shoppe for a demonstration of just how much fun can be had in creating a container garden using a few small plants, some mini-garden accessories and a lot of imagination.

• Keeping with the tiny theme, stop by the Arts League of Lowell (ALL) Gallery, 307 Market Street for a Preview of "Tiny but Mighty", a show of small works from 5-9PM and Create your own tiny but mighty artwork in the gallery classroom from 6:30-7:30PM

• Enjoy the sounds of Resident Mark Brach who will fill your heart and soul with folk/jazz music from 6:00 - 7:30pm at millWORKS Gallery at Appleton Mills, 219 Jackson Street and while enjoying the photographic works of Ashley Pizzuti

• Not to be missed at the Ayer Lofts Gallery, 172 Middle Street from 5-7PM is "ALIVE" - Photographs from Cambodia, featuring the work of Kim Hak with Light refreshments, Sponsored by Lowell General Hospital.

• If you haven't visited the Arts Research Collaborative, on 82 Prescott Street, now is your chance. They will have an opening reception for "From Here: A selection of some things from somewhere" from 6-8PM.

And always First on my monthly agenda is Mill No. 5.

• Check out the vibe at Mill No. 5 and bring home a really cool gift at the Night Market from 5-10PM. And while you're there, enjoy the Live Jazz on the LUNA theater stage where you can plop down in one of their plush armchairs, sip a local craft brew and enjoy the musical stylings of some of the most talented players in the area from 8:35-11:30PM.

Don't forget this is just a sampling of Activities taking place in Dowtown Lowell First Thursdays. Check out all the details and updates at cultureiscool.org

# ទិវារម្លឹកវិញ្ញាណក្ខន្ធ

**ដោយ រីឆាត ហាវ ជូនៀ**
**ប្រែសម្រួលដោយ មួង ណារ៉េត**


Richard Howe

ទិវារម្លឹកវិញ្ញាណក្ខន្ធជាថ្ងៃឈប់សម្រាកបុណ្យជាតិដែលប្រារព្ធធ្វើ ជារៀងរាល់ឆ្នាំ នៅថ្ងៃច័ន្ទចុងក្រោយគេនៃខែឧសភា។ ទិវានេះ ធ្វើឡើងដើម្បីគោរពអតីតយុទ្ធជន និងយុទ្ធនារី ដែលបានពលីក្នុងពេលបម្រើយោធា។ កាលពីមុនគេធ្លាប់ធ្វើពិធីគោរពវិញ្ញាណក្ខន្ធអ្នកដែលបានបាត់បង់ជីវិតក្នុងសមរភូមិជាលក្ខណៈប្រពៃណីដោយពុំមានកំណត់ពេលវេលាច្បាស់លាស់។ ប៉ុន្តែនៅក្រោយសង្គ្រាមស៊ីវិលអាមេរិកសហរដ្ឋអាមេរិកចាប់ផ្តើមទទួលស្គាល់ពិធីនេះជាផ្លូវការ។ ការដែលសហរដ្ឋអាមេរិកទទួលស្គាល់ទិវានេះជាផ្លូវការ គឺដោយសារនរណាក៏បាត់បាត់សមាជិកគ្រួសារ ឬមិត្តភ័ក្តិនៅក្នុងសង្គ្រាម។ ដំបូងឡើយគេហៅពិធីនេះថាជាទិវាលម្អផ្នូរ (Decoration Day) ដោយសារតែក្នុងពេលប្រារព្ធពិធីនេះម្តងៗគេតែងតែយកផ្កាភ្ញីទៅដាក់តាំងលម្អនៅលើផ្នូរទាហាន។ ទិវានេះត្រូវធ្វើនៅក្នុងខែឧសភា ដោយសារក្នុងខែនេះ មានផ្ការីកនៅតំបន់ភាគអាគ្នេយ៍សហរដ្ឋអាមេរិក។

ក្នុងឆ្នាំ ១៨៦៨ ប្រព្ធ័នៃអាមីរបស់សាធារណៈរដ្ឋ (ឬហៅកាត់ថា ជីអេអា) ដែលជាអង្គការ

**តទៅទំព័រទី ២៤**

# Memorial Day

**By Richard P. Howe Jr.**




Memorial Day is a Federal holiday that is observed on the last Monday of May each year. Its purpose is to honor men and women who died while serving in the military. The tradition of honoring those who died in battle is timeless but it was after the American Civil War that the United States began to formalize that practice, mostly because almost everyone in the country had lost a family member or friend in that war. This practice became known as Decoration Day because it involved decorating the graves of soldiers with flowers. It was held in May because that is when flowers usually bloom in the eastern United States.

In 1868, the Grand Army of the Republic (also known as the G.A.R.) which was the major organization for Union Civil War veterans, proclaimed that Decoration Day should become an official holiday. Between 1871 and 1890, every state that had been part of the Union during the Civil War observed Decoration Day as a holiday, adding parades, speeches and memorial and religious services to the decoration of graves. Eventually, the day became known as Memorial Day. It was not until 1967 that Memorial Day became a Federal Holiday.

Memorial Day is observed in Lowell in a number of ways. During the week before the holiday, school children visit cemeteries and with the help of groups of military veterans, place small American flags on the graves of those who served in the military. On Memorial Day weekend, military veterans groups joined by elected officials and members of the public hold ceremonies at monuments, cemeteries and at the Lowell Memorial Auditorium. Many others observe the day by visit the burial places of relatives and remember them, whether they served in the military or not.

Memorial Day is an important and solemn holiday in America. Once each year it gives all of us an opportunity to remember and honor those who died in defense of the United States. Throughout our country's history, many of those who died in battle were immigrants or the children of immigrants, so all who live in America today should remember the meaning of Memorial Day







# “ដំណើរឆ្ពោះទៅទិសខាងត្បូង”

**ដោយៈ ថាច់វណ្ណា**

**ឯប្រទេសចាម្ប៉ាវិញក៏មានវាសនាដូចកម្ពុជាក្រោមដែរ :**

ឬដើម្បីជាមូលហេតុជួយរំដោះខ្មែរឱ្យផុតពីរបបប្រល័យពូជសាសន៍, ក៏បានលើកទ័ព៦សែននាក់ ចូលមកធ្វើសង្គ្រាមក្នុងប្រទេសកម្ពុជា, បណ្តាលឱ្យមានការព្រួយបារម្ភ ពីសង្គមជាតិ និងអន្តរជាតិរហូតដល់មានការចុះហត្ថលេខី១៩ ប្រទេសលើសន្ធិសញ្ញាសន្តិភាពនៅទីក្រុងប៉ារីសថ្ងៃទី២៣ តុលា,ឆ្នាំ១៩៩១, និងសន្ធិសញ្ញាផ្សេងៗទៀតស្តីពីកំណត់ព្រំប្រទល់ដែនដីវៀត-ណាម និងកម្ពុជាជាដើម, តើការពិតព្រមប្រទល់របស់វៀត-ណាមនៅត្រង់ណាទៅ?

វៀត-ណាមបានយកទឹកដីដែលខ្លួនឈ្លានពានបានមកពីប្រទេសជិតខាង មានប្រទេសចម្ប៉ា និងកម្ពុជាភាគអាគ្នេយ៍យកដាក់ធ្វើជាលក្ខន្តិកៈលើកិច្ចព្រមព្រៀងសន្តិភាពមានប្រទេសចំនួន១៩ ទទួលស្គាល់ជាផ្លូវការណ៍, នេះជាសមត្ថភាពនយោបាយដែលវៀត-ណាមធ្លាប់បានធ្វើតាំងពីបុរាណរហូតមកសព្វថ្ងៃមានចំនួន៨លើករួចមកហើយ, ក្នុងដំណើរឆ្ពោះទៅទិសខាងត្បូងរបស់ប្រទេសវៀត-ណាម ។

បន្ទាប់ពីសន្ធិសញ្ញាសន្តិភាពចាម -វៀត ១៧១២មក, ដំណើរឆ្ពោះទៅទិសខាងត្បូងរបស់ដាយ-វៀតក៏បានឈានចូលមកលើទឹកដីនៃរាជាណាចក្រកម្ពុជា, តាមដងវិថី "អាទិទេព ង្វៀន ភុក ង្វៀនៈ Nguyên Phu´c Nguyên" ដែលបានសាងសង់តាំងពីឆ្នាំ១៦១៨មករួចទៅហើយនោះគឺៈមាគ៌ាឆ្ពោះទៅទិសខាងត្បូងរបស់ដាយ-វៀត, ដោយលើកកូនស្រីរបស់ ង្វៀន ភុក ង្វៀន ជាស្តេចដាយ-វៀត, ឈ្មោះនាងៈ ង្វៀន ភុក ង៉ុក វ៉ាន (Nguyên Phu´c Ngóc Van : ថ្វាយដល់ព្រះបាទជ័យជេដ្ឋាទី២, យោងតាមសៀវភៅ (Royaume du Cambodge)ដោយលោក មោរ៉ា (Moura:)បាននិយាយថាៈ នៅខែមីនាឆ្នាំ ១៦១៨, ព្រះបាទជ័យជេដ្ឋា២បានឡើងគ្រងរាជ្យ, បន្ទាប់មកក៏បានទទួលបុត្រីរបស់ស្តេចដាយ -វៀត,តែងតាំងជាអគ្គមហេសីទ្រង់នាមៈ សម្តេចព្រះភគវតី ព្រះស្រីវរក្សត្រីនៅរាជធានីឧដុង្គដែលទើបនិងសង់ថ្មី ។

ប្រវត្តិសាស្ត្រវៀត-ណាមក្នុងសៀវភៅ (ដាយណាម លៀកត្រៀនៈ Đai Nam Liêt Truyên)

បោះពុម្ពឆ្នាំ១៩៩៥, ក៏បាននិយាយថាៈ ស្តេចង្វៀនបានលើកបុត្រីគឺព្រះនាង ង៉ុក-វ៉ានថ្វាយដល់ព្រះបាទជ័យជេដ្ឋាទី២នៅឆ្នាំ វក. ១៦២០ តាមការស្តីដណ្តឹងនៃព្រះបាទជ័យជេដ្ឋាទី២ ។

(រូបគំនូរព្រះអគ្គមហេសីនៃព្រះបាទជ័យជេដ្ឋាទី២ទ្រង់នាមសម្តេចព្រះភគវតី ព្រះស្រីវរក្សត្រី, ឈ្មោះពិតគឺៈ ង្វៀន ភុក ង៉ុក



វ៉ាន (Nguyên Phu´c Ngoc Van

លោកអាចារ្យ គ្រីស្សតូហ្វូ បូរី (Christopforo Borri) ជនជាតិ អ៊ីតាលី បានចុះផ្សាយសៀវភៅកំណត់ហេតុនៅឆ្នាំ១៦៣១បាននិយាយថាៈ ព្រះអង្គម្ចាស់ ង្វៀន (Nguyên) កំពុងហ្វឹកហ្វឺនកងទ័ព, ធ្វើនាវាចម្បាំង ដើម្បីទៅជួយដល់ (កូនប្រសា) ជាស្វាមីរបស់ព្រះនាង ង៉ុក-វ៉ាននៅប្រទេសកម្ពុជា ដើម្បីប្រឆាំង និងទ័ពសៀម ។

ដើម្បីសំដែងភាពស្និតស្នាល, នៅពេលនោះស្តេចង្វៀនបានលើកទ័ពមកកម្ពុជាជួយច្បាំង និងសៀមចំនួន២លើក, នៅខេត្តកំពង់ឆ្នាំង និង ខេត្តបន្ទាយមានជ័យ, រួចបានសន្យាធានាជួយការពាសុខសន្តិភាពជូនព្រះរាជាណាចក្រកម្ពុជាផងដែរ ។

ពាក្យថា "ជួយការពាសុខសន្តិភាព" គ្រាន់តែជាពាក្យបិទបាំងនូវមហិច្ឆតាលេបយកដីខ្មែរតែប៉ុណ្ណោះ, បន្ទាប់មកនៅឆ្នាំ១៦២៣, ស្តេចង្វៀនបានបញ្ជូនបេសកៈជនមួយក្រុមនាំយកអំណោយនិងរាជសារមួយច្បាប់ជូនដល់រាជធានីឧដុង្គ,ក្នុងរាជសារ, ដាយ-វៀតបានស្នើសុំដីខ្មែរ២ដំបន់គឺៈ មូស្វាយ ក្នុងខេត្តអូកាប់(Ba` Ria, Vung Ta`u បា-រៀនៅវៀត-ណាមសព្វថ្ងៃ, កោះក្របី (បេន-ង៉ែៈ Bê´n-Nghe´, សព្វថ្ងៃ នៃព្រៃនគរ, សម្រាប់ដាក់មន្ទីរចាត់ការយកពន្ធដាលើផ្ទែកគយក្នុងរយៈពេល៥ឆ្នាំទៀតផង ។



រាជវាំងនរោត្តមនៅក្រុងព្រៃនគរ, រូបថតឆ្នាំ១៨៦៦

ដើម្បីទប់ទល់និងទ័ពសៀមនាពេលនោះ, ព្រះបាទជ័យជេដ្ឋាទី២ក៏បានយល់ព្រមអនុញ្ញាតិតាមសំណូមពររបស់ ប្រទេសដាយ-វៀត ។

(បន្ទាប់មកប្រជារាស្ត្រដាយ-វៀតក៏បានចូលមកនៅលើទឹកដីនៃប្រទេសកម្ពុជាកាន់តែច្រើនឡើងៗ, មានប្រជារាស្ត្រដាយ-វៀតចំនួន២០ម៉ឺននាក់, បានរួមរស់នៅក្នុង៤ម៉ឺនគ្រួសារនាពេលនោះ,រហូតដល់ឆ្នាំ១៦២៧, ព្រះបាទជ័យជេដ្ឋាទី២បានសោយទីវង្គតទៅ, ដាយ-វៀត មិនបានសងព្រៃនគរ និងខេត្តអូកាប់មកខ្មែរវិញទេ, ផ្ទុយទៅវិញដាយ -វៀត បានដណ្តើមសិទ្ធត្រួតត្រាលើដីខ្មែរ៧ខេត្តនៅទិសបូពាំនៃកម្ពុជាពីត្រឹមព្រៃនគរ,ឧកញ្ញាឱញ, រោងដំរី, ចង្វាត្រពាំង, ព្រះសួគ៌ា, អូកាប់, និងខេត្តមវា រហូតទៅទល់និងដីចម្ប៉ាក៏ត្រូវធ្លាក់ចូលក្នុងការត្រួតត្រារបស់ដាយ-វៀតជារៀងរហូតមក ។



រូបថត ជនជាតិវៀត-ណាមក្នុងសតវត្សទី១៩, ដែលទើបនិងចូលមកនៅក្នុងដែនដីកម្ពុជាក្រោម

ទីក្រុងព្រៃនគរមានផ្ទៃដី ២,០៩៥គីឡូម៉ែត្រការ៉េ=៨០៩Sq.mi.សព្វថ្ងៃមានប្រជារាស្ត្រកំពុងរស់នៅប្រមាណ៨លាននាក់,ឋិតនៅចំមជ្ឈមណ្ឌលនៃភូមិភាគអាគ្នេយ៍និងបូពាំនៃកម្ពុជា,ខាងជើងជាប់នឹងខេត្តព្រះសួគ៌ា (Thú Dáu Mót ) បច្ចុប្បន្នជា ខេត្តបិនភឿក (Bình Phuóc), ពាយ័ព្យជាប់នឹងខេត្តរោងដំរី (Tây Ninh) , ខាងកើត និងឦសាន ជាប់នឹងខេត្ត មវា ( Đóng Nai) , អាគ្នេយ៍ជាប់នឹងខេត្តអូរកាប់ ( Bà Ria – Vung Tàu ) , ខាងលិច និងទិសនិរតី ជាប់នឹងខេត្តតានន់ (Long An) និង ខេត្តមេ-ស (My Tho,Tién Giang) ។ ពីទីក្រុងព្រៃនគរ ទៅទីក្រុងហាណូយភាគខាងជើងនៃប្រទេសវៀតណាម មានចម្ងាយប្រមាណ១,៧៦០ គីឡូម៉ែត្រ =១,០៩០ម៉ៃល៍) និងចម្ងាយ ៥០ គីឡូម៉ែត្រ ទៅសមុទ្រចិនខាងត្បូង (South China Sea) ។ ចំពោះអាស៊ីអាគ្នេយ៍ទីក្រុងព្រៃនគរ ជាចំណុចរួមនៃផ្លូវគមនាគមន៍ដ៏សំខាន់ រួមមាន ផ្លូវគោក




ផែនទីក្រុងព្រៃនគរមុនពេលវៀត-ណាមចូលត្រួតត្រា

ផ្លូវទឹក និងផ្លូវអាកាសតភ្ជាប់នឹងខេត្តនានានៅក្នុងតំបន់ និងជាច្រកអន្តរជាតិផងដែរ ៕



# REMEDIUM PHARMACY

2 VINAL Square
N. Chelmsford, MA 01863

Phone: (978) 251-7070

## FREE Daily Home Delivery



### Blisterpack Packaging

### Friendly Consultations

### Compounded Medications

### Easy Transfers

បុគ្គលិកទាំងអស់របស់ឱសថស្ថានរីមីឌីមយើងខ្ញុំមានបទពិសោធន៍គ្រប់គ្រាន់ក្នុងការបំរើសេវាផ្តល់ឱសថជូនដល់សហគមន៍ខ្មែរ។ គេទាំងអស់គ្នាបានត្រៀមរួចជាស្រេចដើម្បីជួយ និង ត្រៀមបំរុងជានិច្ច ដើម្បីប្រើគ្រប់ជំនាញ និង ការពិសោធន៍ក្នុងការបំរើលោកអ្នក។




## ឱសថស្ថានរីមីឌីម ផ្តល់ជូនលោកអ្នកនូវ:

## ជូនឱសថឲ្យដល់លំនៅស្ថានដោយឥតគិតថ្លៃ
## ដាក់ឱសថក្នុងបន្ទះបែងចែកឱសថសំរាប់ប្រើតាមពេល
## ការពិគ្រោះយោបល់យ៉ាងរាក់ទាក់ស្និទស្នាល
## មានផ្តល់ជូនម្សៅថ្នាំលាយ
## ភាពងាយស្រួលក្នុងការផ្ទេរចេញចូល



**Cristina គ្រីស្ទីណា:**
គ្រីស្ទីណាមានការពិសោធន៍គ្រប់គ្រាន់នៅក្នុងកិច្ចការបំរើសហគមន៍ខ្មែរក្រុងឡូវែលអស់រយៈពេលជាង៣ឆ្នាំមកហើយ។អ្នកស្រីគឺជាឱសថការិនីដែលគ្រប់គ្រងឱសថស្ថាន រីមីឌីម នេះ ហើយគាត់ក៏អាចធ្វើការពិគ្រោះអំពីឱសថ ជូនលោកអ្នកដល់ផ្ទះផងដែរ។ ដោយសារការផ្តល់នូវសេវាកម្មផ្នែកឱសថនេះ បានច្បាស់លាស់ទើប អ្នកស្រីអាចបង្កើត បាននូវចំណងមិត្តភាពយ៉ាងល្អប្រពៃក្នុងសហគមន៍ខ្មែរក្នុងក្រុងឡូវែល ហើយអ្នកស្រីមានសេចក្តីរីករាយណាស់ដើម្បីរង់ចាំបំពេញនូវបំណងរបស់លោកអ្នកដែលត្រូវការឱសថ។



**Pahim លោកប៉ាហ៊ីម:**
គឺជាបុគ្គលម្នាក់ដែលមានការគោរពច្រើននៅក្នុងសហគមន៍ខ្មែរ គាត់ក៏ជាសមាជិកម្នាក់នៅក្នុងគណកម្មការវត្តត្រៃរតនារាម ហើយធ្លាប់មានការពិសោធន៍ជាច្រើនឆ្នាំក្នុងការជួយសហគមន៍ដែលត្រូវការព្យាបាលជម្ងឺ។ ក្នុងរយៈកាលកន្លងមក គាត់ធ្លាប់បានធ្វើការយ៉ាងច្រើនជួយគាំទ្រដល់អ្នកជម្ងឺនៅមជ្ឈមណ្ឌលសុខភាពសហគមន៍ក្រុងឡូវែលនិងមណ្ឌលសុខភាពពេទ្យមេត្តាព្រមទាំងធ្លាប់បានចូលរួមចំណែកក្នុងការថែទាំដោយឱសថសំរាប់សហគមន៍ខ្មែរក្រុងឡូវែលអស់រយៈពេលជាង២ឆ្នាំផងដែរ។ ក្នុងនាមជសមាជិកម្នាក់នៃឱសថស្ថានរីមីឌីម គាត់នឹងបន្តធ្វើការបំរើឱ្យកាន់តែខ្លាំងខ្លាថែមទៀតដើម្បីបំពេញនូវតំរូវការក្នុងការផ្តល់ឱសថដល់លោកអ្នក។



**Dary ដារី:**
តែងបានយកចិត្តទុកដាក់ជាប់ជានិច្ចក្នុងសេវាកម្មផ្តល់ឱសថ ដើម្បីបំពេញតាមតំរូវការនៃសហគមន៍ខ្មែរក្រុងឡូវែលអស់រយៈជាង២ឆ្នាំមកហើយ ហើយតែងទទួលបាននូវការកោតសរសើរពីសំណាក់អតិថិជនដែលបានជួបប្រាស្រ័យជាមួយគាត់។ ក្នុងឋានៈជាអ្នកបច្ចេកទេសម្នាក់របស់ឱសថស្ថាន គាត់មានការយល់ដឹងយ៉ាងជ្រៅជ្រះអំពី តំរូវការ និងប៉ិនប្រសប់ក្នុងការផ្តល់សេវាជូនលោកអ្នកនិងចេះសំដែងនូវការគោរពយ៉ាងទន់ភ្លន់ចំពោះលោកអ្នកផងដែរ។



**Kelly ខែលលី:**
គឺជាឱសថការិនីយើងដែលអាចនិយាយភាសាខ្មែរហើយដែលយកចិត្តទុកដាក់ចេះជួយលោកអ្នក។ គាត់ជាឱសថការិនី ចេញពីមហាវិទ្យាល័យឱសថសាស្ត្ររដ្ឋម៉ាសាឈូសេត និង ពេញចិត្តធ្វើការបំរើសហគមន៍ខ្មែរដែលគាត់ក៏ជាសមាជិកម្នាក់នៃសហគមន៍នេះដែរ។



**Daniela ដានីញែលឡា:**
មានជំនាញច្បាស់លាស់ក្នុងការវេចខ្ចប់ឱសថដាក់ក្នុងបន្ទះពង្រាយថ្នាំសំរាប់ប្រើតាមពេលហើយធ្លាប់ឆ្លងកាត់ការថែទាំអ្នកជម្ងឺខ្មែរដែលរស់នៅក្នុងក្រុងឡូវែលនេះអស់រយៈពេលជាង៣ឆ្នាំមកហើយ។ ប្រសិនបើលោកពេញចិត្តនឹងការប្រើថ្នាំដាក់ក្នុងបន្ទះបែបនេះ ដានីញែលឡាពេញចិត្តណាស់នឹងធ្វើកិច្ចការនេះជូនលោកអ្នក។



**Kassandraកាសាន់ដ្រា:**
គឺជាបុគ្គលិកដែលមានការពិសោធន៍ច្រើនក្នុងការធ្វើទំនាក់ទំនងជាមួយសហគមន៍ខ្មែរ និងស្បានិសសដែលរស់កក្នុងងក្រុងឡូឡូវែលលនេះ។
លោកអ្នកអាចនឹងពេញចិត្តអំពីភាពរាក់ទាក់រាល់ពេលនិយាយឆ្លើយឆ្លងតាមទូរស័ព្ទជាមួយនាងនិងប៉ិនប្រសប់ក្នុងការរៀបចំឱសថជូនលោកអ្នកនៅរាល់ពេលដែលលោកអ្នកត្រូវការ។

# លោក រីក-សង់តូរ៉ូម ឈរឈ្មោះជាបេក្ខជនប្រធានាធិបតី

**ដោយ ថាច់-វណ្ណា,ព័ត៌មានយោងតាម: ញូវ-យ៉កថាម**




ថានិងខំបឹងប្រែងដើម្បីឱ្យបានជាប់ជាបេក្ខជនបោះឆ្នោតប្រធានាធិបតី,រួច និងការផ្តោតថ្មីទៅលើអ្នកមានវ័យមជ្ឈឹម, លោក Rick Santorum ដែលជាអ្នកចេញឈ្មោះក្នុងការប្រណាំងប្រជែងតែងតាំងពីគណបក្សសាធារណរដ្ឋពីបួនឆ្នាំមុន, បានប្រកាសពីការខំប្រឹងប្រែងរបស់ខ្លួនដើម្បីឈរជាបេក្ខជនសម្រាប់ដំណែងប្រធានាធិបតីលើកទីពីររបស់លោក, កាលពីថ្ងៃពុធ ទី២៧ ឧសភានេះ,បានសន្យាថា និងស្តារឡើងវិញនៅចំណុចចន្លោះខ្វះខាតចំពោះអ្នកមានវ័យមជ្ឈឹម, ដោយគោលនយោបាយរបស់រដ្ឋាភិបាល ។

ក្នុងនាមជាអតីតសមាជិកព្រឹទ្ធសភាសហរដ្ឋអាមេរិក,នៃជនបទភាគខាងលិចនៃរដ្ឋPennsylvania លោកបានដាក់ពាក្យស្នើដល់ក្រុមអភិរក្សសង្គមកាលពីបួនឆ្នាំមុន ។ រួចលោកបានបញ្ចប់ការនិពន្ធសៀវភៅសេដ្ឋកិច្ចប្រជាប្រិយមួយដែលមានចំណងជើងថា: (blue-collar Conservatives) អភិរក្សពលកម្ម, មានខ្លឹមសារដូចខាងក្រោមនេះ:

"ពលកម្មក្នុងក្រុមគ្រួសារមិនចាំបាច់ត្រូវការធ្វើការងារអ្វីផ្សេងទៀតដើម្បីចងភ្ជាប់ជាមួយរដ្ឋាភិបាលធំៗ ឬទីកលុយដ៏ធំនោះទេ គាត់បាននិយាយថា: ការរិះគន់របស់លោកស្រី Hillary Rodham Clinton និងអាជីវកម្មដ៏ធំមួយសម្រាប់គោលនយោបាយអន្តោប្រវេសន៍, អាចនិងមានការកាត់បន្ថយកម្មករអាមេរិកាំង ។

លោក Santorum មានអាយុ៥៧ឆ្នាំ, គឺជាអ្នកធ្វើឱ្យមានការភ្ញាក់ផ្អើលក្នុងសម័យប្រជុំគណបក្សរដ្ឋ Iowa នៅក្នុងឆ្នាំ ២០១២, បានឈ្នះឆ្នោតដោយក្រុមនិកាយសាសនាគ្រិស្តបោះឆ្នោតគាំទ្រលោក, រួចហើយគាត់បានឈ្នះទៅលើ១០រដ្ឋផ្សេងទៀត,អូសពន្យារដំណើរស្វែងរករបស់លោក Mitt Romney ចំពោះការតែងតាំងនោះ ។

អ្នកគាំទ្រលោក Santorum ម្នាក់ដែលបានបើកឡាន១១ ម៉ោង,ពីរដ្ឋមីសសួរី (Missouri) មកស្តាប់សេចក្តីប្រកាសនៅទីនេះ, លោកបាននិយាយថា: លោកចូលចិត្តការផ្តោតអារម្មណ៍ជាថ្មីរបស់លោក Santorum ទៅលើវិស័យសេដ្ឋកិច្ច ។

លោក Santorum ដែលបានប្រារព្ធធ្វើឡើងដុំធ្យូងមួយដើម្បីបង្ហាញពីការតភ្ជាប់របស់គាត់ទៅក្រុមហ៊ុនរុករករ៉ែជីតារបស់គាត់នៅរដ្ឋ Pennsylvania, បញ្ហានេះក៏បានសង្កត់សម្លេងនៅក្នុងព្រឹទ្ធសភាអស់រយះពេល១២ឆ្នាំហើយ, លោកបានព្រមានថា "ជាអំពើប្រមូលខ្យល់ធ្វើព្យុះនៃក្រុមអ៊ីស្លាម" ។

គាត់បានបាននិយាយថា ពេលថ្មីៗនេះ, គាត់ត្រូវបានរដ្ឋឥស្លាមប្រកាសថា: ទុកគាត់ជាសត្រូវនៅក្នុងទស្សនាវដ្តីជាភាសាអង់គ្លេសរបស់រដ្ឋឥស្លាមមួយ ។ ពួកគេស្គាល់ខ្ញុំជានរណា, ហើយខ្ញុំក៏ដឹងថា ពួកគេជានរណាដែរ ។ លោក សែនតូរ៉ូម និយាយបន្ថែមថា :

ជូនកាលលោកមិនមានបំណងដើម្បីបញ្ជាក់ពីបញ្ហាដែលបានធ្វើឱ្យលោករងការប្រឆាំង និងជំទាស់ទៅនឹងការរំលូតកូន និងការរៀបការភេទដូចគ្នានៅឆ្នាំ២០១២, រួម និងការសម្រេចចិត្តរបស់លោកក្នុងការរិះគន់គណបក្សរបស់គាត់, ក្នុងការកាត់បន្ថយពន្ធសម្រាប់អ្នកមានបានធ្វើគេនឹកមិនភ្លេច,វាហាក់បីដូចជាបេក្ខជនរូបលោកត្រូវរងការខ្មាស់អៀនជាខ្លាំងក្នុងការប្រណាំងនោះ ។

ស្ថានភាពសម្រាប់ការនិយាយពីការប្រកាសរបស់លោក Santorum បានឆ្លុះបញ្ចាំងបញ្ចូលគ្នានៃបញ្ហាថ្មី និងចាស់ ប៉ែន បច្ចេកវិទ្យាក្នុង Cabot អង្គការសហរោងចក្រដែលផលិតឧបករណ៍

សម្រាប់ឧស្សាហកម្មប្រេង និងឧស្ម័ន និងនៅក្នុងការដែលកម្មករនិយោជិតមានភាគហ៊ុនកម្មសិទ្ធិមួយ ។ វាត្រូវបានបង្កើតឡើងជាមួយ "ក្រុមហ៊ុនដែលជាគ្រិស្តសាសនិក" និងបានបញ្ជាក់នៅលើគេហទំព័រខ្លួនថា "យើងមានអត្ថិភាពដើម្បីលើកតម្កើងព្រះជាម្ចាស់" ។

## ផល រដ្ឋា យ៉ែម ឈរឈ្មោះជាបេក្ខជនក្រុមប្រឹក្សាក្រុងឡូវែល
## Paul RathaYem running for Lowell city council

ដោយ ខ្មែរផុស ស.រ.អា.

លោក ផល រដ្ឋា យ៉ែម ជាអតីតពាណិជ្ជករ ក្នុងការទិញលក់អចលនវត្ថុនឹងធ្លាប់ធ្វើជានាយកប្រតិបត្តិនៃសមាគមសម្ព័ន្ធខ្មែរអាមេរិកាំង បានសម្រេចចិត្តឈរឈ្មោះជាបេក្ខជនក្រុមប្រឹក្សាក្រុងឡូវែល នាឱកាសបោះឆ្នោតខែវិច្ឆិកាខាងមុខបន្ទាប់ពីខកខានមិនបានជាប់ឆ្នោតជាតំណាងរដ្ឋការពីឆ្នាំមុន ។ លោកមិនមែនជាបេក្ខជនខ្មែរតែម្នាក់ឯងទេ គឺនៅមានលោក វាស្នា នួន នឹង លោក ប៉ាន សូ ដែលបានសម្តែងឆន្ទៈរួចហើយ ថានឹងចេញដំណើរធ្វើការឃោសនាឆាប់នេះហើយ ។

លោក ផល រដ្ឋា យ៉ែម នឹងប្តើមឃោសនានៅភោជនីយដ្ឋាន Cobblestones ថ្ងៃទី៤មិថុនាពីម៉ោង៥-៩ល្ងាច ហើយបានផ្សព្វផ្សាយពីបំណងរបស់លោកថា:



I am running for the Lowell City Council because:
1. I want to bring a new perspective to the City Hall
2. I want to represent the unrepresented voters

If elected, I want to:
1. Work with the City Manager and the police department:
   - To support the investment on the shot spotter for the City, and may be expand to all public schools
   - To combat the opiate/drug overdose
   - To add more police personnel
   - To expand the community policing
   - To foster stronger partnership between the police and the community.
2. To increase tax revenue for the City by:
   - Attracting more businesses to the City,
   - Expanding current businesses to the downtown neighborhood
3. I will promote and initiate:
   - Higher quality and availability of early childhood education
   - Modernization of our schools
   - Investments in the professional development of our teachers
   - Making higher education affordable

# សង្ខេបសារព័ត៌មាននយោបាយខ្មែរ - ១មេសា ដល់ ២៩ឧសភា ២០១៥

**ដោយ លោកអាចារ្យ ប្រ៉ាង់ស័រ ប៉ុងសូ**
**បកប្រែពីភាសាបារាំង ដោយ ខ្មែរផុស ស.រ.អា**

មុននឹងផ្ដើមសេចក្ដី ខ្ញុំសូមឧទ្ទិសកុសលដល់កម្មករ១៨នាក់ដែលបានបាត់បង់ជីវិតដោយគ្រោះថ្នាក់រថយន្តពេញចេញទៅធ្វើការនៅតំបន់ឧស្សាហកម្មពិសេសខេត្តស្វាយរៀង ។ រៀងរាល់ឆ្នាំកម្មករជាច្រើននាក់បានបាត់បង់ជីវិតក្នុងស្ថានភាពដូចគ្នានេះ ។ សហភាពអឺរ៉ុបបានក្លាយទៅជាអ្នកនាំចូលផលិតផលឧស្សាហកម្មសំខាន់បំផុតសម្រាប់កម្ពុជា ហេតុនេះគួរណាស់តែបានទទួលនូវកិច្ចសន្យាស្ដីពីសន្តិសុខការងារសម្រាប់"ទាសករសម័យ"ឱ្យបានប្រសើជាងនេះ -យោងទៅតាមសម្ដីសម្ដេចប៉ាបប្រ៉ង់ស័រ ។

**នយោបាយក្នុងប្រទេស**

វប្បធម៌សន្ទនារៀបរាងដោយលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន នឹង សម រង្ស៊ី កំពុងតែជួបការលំបាកអនុវត្តន៍ -អ្នកកាន់អំណាចប្រើវប្បធម៌នេះសម្រាប់ខ្ទប់ច្រមុះអ្វីដែលជាការទិទានសមរមថាជា"ជេប្រមាថ"ឬ"បរិហាកេរ"។ ជាការពិតដែលក្នុងផ្នត់គំនិតជាខ្មែរការទិទានបន្តិចបន្តួច ដូចជា


លោក ហ៊ុន សែន


លោក កឹម សុខា និងលោក សម រង្ស៊ី

រឿងព្រំប្រទល់ដែនមិនអាចចែកពី"ការពិត" ដាច់ចេញពី"និយាយលេង"ឬក៏ក្លាយជា"និយាយបង្កាច់" តែម្ដងក៏បាន... សម្រាប់ កឹម សុខា អនុប្រធានគណបក្សសង្គ្រោះជាតិដែលបានជាប់ក្នុងរបបខ្មែរក្រហមបានស្គាល់ច្បាស់ណាស់ នូវល្បិចគ្រប់គ្រងរបៀបនេះ។ ហ៊ុន សែន ប្រឹងផ្លុំខ្យល់ត្រជាក់ ខ្យល់ក្ដៅ មិនចេះឈប់ឈរ គឺចង់តែបង្ហាញថា ខ្លួនជាអ្នកដឹកនាំប្រទេសតែម្នាក់គត់តែប៉ុណ្ណោះ។

-ថ្ងៃ៨ មេសា កឹមសុខា បានទទួលការកោះហៅពីតុលាការសាកសួរអស់រយៈពេល៧ម៉ោងដោយព្រះរាជអាជ្ញាស្ដីពីបាតុកម្មដែលនាំឱ្យមានអំពើហឹង្សាកាលពីមុនឱកាសបោះឆ្នោតឆ្នាំ២០១៣ -ប្រជាពលរដ្ឋប្រមាណ៣០០នាក់នៅរង់ចាំនៅបរិវេណរហូតដល់មានការបណ្ដេញពីកងប្រដាប់អាវុធក្រុងភ្នំពេញយ៉ាងហ៊ឹកហ៊ាក់៕ ជខ ៩.៤.១៥ប

-ថ្ងៃ១៣មេសា ដោះលែងពិរុទ្ធជន៩រូប ៕ មាន មាជ សុវណ្ណារ៉ាផងដែរ ចុះដែលដាក់ពន្ធនាគារតាំងពីថ្ងៃ១៥កក្កដា២០១៣ មានព្រះសង្ឃ៣អង្គ(មានព្រះសង្ឃ សឺង ហៃផងដែរ) នឹងសកម្មជន-នី ដីធ្លីបឹងកក់ ដំក្លាហាន១១រូប ក្នុងនោះមានអ្នកស្រី ទេព វន្នី នឹងអ្នកស្រី ង៉ែត ឃុន។ លោក សម រង្ស៊ី បានមើលឃើញយ៉ាងត្រឹមត្រូវណាស់ថាជាទង្វើតាបសង្កត់គ.ប.ស.ជ គឺដាក់សម្ពាតលើកិច្ចចចារបង្កើតគ.ជ.ប.នឹងលើច្បាប់បោះឆ្នោត (CD 9/4/15)

គ.ជ.ប.ថ្មី ធ្វើសច្ចាប្រណិធាននៅថ្ងៃទី១៤មេសា ជាថ្ងៃចូលឆ្នាំ បន្ទាប់ពី៩ខែនៃកិច្ចចរចាដ៏លំបាក។ គណបក្សប្រជាជនតែងតាំង ស៊ីក ប៊ុនឡេក តំណាងរាស្ត្រគ.ប.ប.ជ ជាប្រធាន ។ គេកត់សំគាល់ឃើញវត្តមាន រ៉ុង ឈុន អគ្គលេខានៃសមាគមគ្រូបង្រៀនឯករាជ្យខ្មែរ នឹង ហង្ស ពុទ្ធា ពី COMFREL គណកម្មការដើម្បីការបោះឆ្នោតសេរីនឹងស្មើភាពជាសមាជិកទី៩ ជ្រើសរើសដោយការព្រមព្រាងនឹងជាអ្នកនាំពាក្យរបស់ គ.ជ.ប.។ ទេព នីថា អគ្គលេខាធិការចាស់នៅបន្តដំណែង (CD 4/13/15) ៕ **តទៅទំព័រទី ២២**

## តមកពីទំព័រទី ០១ លោក សម រង្ស៊ី : វប្បធម៌សន្ទនា...

គួរឱ្យកត់សម្គាល់ខ្លាំង និងមិនដែលធ្លាប់មានក្នុងប្រវត្តិសាស្ត្រនៅក្រៅប្រទេសថ្ងៃនោះមានអ្នកគាំទ្រគណបក្សប្រជាជន កម្ពុជាប្រហែល ៥០នាក់ ប្រកបដោយទឹកមុខរីករាយដែលមានពាក់អាវយឺតដូចៗគ្នា និងមានស្លាកគណបក្សប្រជាជនរូបទេវតាបាចផ្កាផង បានមកអង្គុយចាំចូលរួមគណបក្សសង្គ្រោះជាតិ និងទះដៃកងរំពងចំពោះសារនយោបាយរបស់លោក សម រង្ស៊ី ។


ប្រជាពលរដ្ឋឡូវែលស្វាគមន៍លោក សម រង្ស៊ី

កុំថាឡើយបងប្អូនទីក្រុងឡូវែល ដែលភ្ញាក់ផ្អើល សូម្បីតែលោក សម រង្ស៊ី ផ្ទាល់ក៏លាន់មាត់សរសើរទាំងភ្ញាក់ ផ្អើលចំពោះស្មារតីភ្ញាក់រលឹកចូលរួមក្នុងព្រឹត្តិការណ៍ដ៏កម្រមាននេះផងដែរ។ ថ្លែងទៅកាន់សមាជិកគណបក្ស សង្គ្រោះជាតិក្រុងឡូវែលលោក សម រង្ស៊ី មានប្រសាសន៍ថា លោកសូមស្វាគមន៍វត្តមានបងប្អូនគណបក្សប្រជាជន។ នេះជាលើកទី១ ក្នុងប្រវត្តិសាស្ត្រនៃសហគមន៍ខ្មែរនៅឯនាយសមុទ្រដែលមានកិច្ចប្រជុំមួយដែលមានការចូលរួមពីតំណាងសមាជិកសមាជិកាគណបក្សប្រជាជន។

ប៉ុន្តែចំពោះអ្នកគាំទ្រគណបក្សសង្គ្រោះជាតិទូទៅហាក់នៅមានការងឿងឆ្ងល់ចំពោះការមកចូលរួមទាំងហ្វូងរបស់សមាជិកគណបក្សប្រជាជនក្នុងកម្មវិធីដែលរៀបចំឡើងដោយគណបក្សសង្គ្រោះជាតិ។ ពួកគាត់ឆ្ងល់ថាតើគណបក្សប្រជាជនកំពុងលេងល្បិចអ្វីទៀតហើយ។ ចំណែកឯអ្នកខ្លះទៀត ដែលមានទស្សនៈមិនចង្អៀតចង្អល់គិតថា បានអ្នកគាំទ្រគណបក្សប្រជាជនមកចូលរួមរឹតតែធ្វើឱ្យសង្គ្រោះជាតិមានកម្លាំងខ្លាំងជាងមុននឹងឈានទៅរកការឈ្នះឆ្នោតដោយងាយស្រួលនៅឆ្នាំ២០១៨ ខាងមុខ។

តើនេះគឺផ្នែកមួយនៃលទ្ធផលនៃវប្បធម៌សន្ទនាឬ? តើវប្បធម៌សន្ទនាឥឡូវបានការអ្វី?

លោក សម រង្ស៊ី បកស្រាយថា: "វប្បធម៌សន្ទនាបង្ហាញអំពីជំហររបស់គណបក្សសង្គ្រោះជាតិ។ វាបង្ហាញឱ្យឃើញថា គណបក្សសង្គ្រោះជាតិមិនមែនឈរឱបដៃឈរមើលទុក្ខវេទនារបស់ប្រជារាស្ត្រនោះទេ។ យើងមិនអាចបិទភ្នែកដោយឃើញស្រុកយើងកំពុងប្រឈមមុខនឹងគ្រោះថ្នាក់។ គណបក្សសង្គ្រោះជាតិផ្តល់ជំនឿ និងសេចក្តីសង្ឃឹមដល់ប្រជារាស្ត្រខ្មែរតាមរយៈកម្មវិធីនយោបាយ និងជំហររបស់បក្ស។ យើងអាចកែគ.ជ.បថ្មីបានដូចបំណង ដើម្បីរៀបចំការបោះឆ្នោតឱ្យបានត្រឹមត្រូវ។ ដោយសារគ.ជ.បថ្មី យើងសង្ឃឹមថា បោះឆ្នោតលើកក្រោយមានភាពត្រឹមត្រូវ ដើម្បីឱ្យអ្នកឈ្នះៗដោយកិត្តិយសអ្នកចាញ់ៗដោយអស់ចិត្ត។ យើងទុកឱ្យប្រជាជនជាអ្នកសម្រេច។ វប្បធម៌សន្ទនានេះសម្រាប់រាប់តំណរទៅមុខទៀត។ បើគ្មានវប្បធម៌សន្ទនា មិនងាយបានគជបថ្មីនេះទេ។ គណបក្សប្រជាជនគេអត់ខ្វល់នឹងចង់បានគ.ជ.បថ្មីទេ។ គេចង់ទុក គ.ជ.បចាស់។ វប្បធម៌សន្ទនា គឺដើម្បីរៀបចំប្រទេសជាតិឱ្យមានលទ្ធិប្រជាធិបតេយ្យត្រឹមត្រូវ។ បញ្ចប់អំពើហិង្សា។ បំបាត់ការភ័យខ្លាចខ្លាចគេធ្វើបាបខ្លាចគេសម្លាប់។ ដោយសារការភ័យខ្លាចអ្នកដែលស្រលាញ់សង្គ្រោះជាតិមួយចំនួនអត់ហ៊ានចេញមុខ។ ដោយសារខ្លាចគេចាប់ដាក់គុកខ្លាចគេសម្លាប់ខ្លាចគេនិរទ្ទេស ។ល។ ឥឡូវអ្នកគាំទ្រលទ្ធិប្រជាធិតេយ្យលែងខ្លាច និងចាប់ផ្តើមហ៊ានចេញមុខគាំទ្រសង្គ្រោះជាតិ។ ទូរទស្សន៍សង្គ្រោះជាតិនឹងបើកឆាប់ៗ។ នៅស្រុកខ្មែរមិនដែលគណបក្សប្រឆាំងណាមានទូរទស្សន៍ពីមុនមកទេ បើគ្មានវប្បធម៌សន្ទនា។ ទូរទស្សន៍នឹងផ្សព្វផ្សាយព័ត៌មានពិត ដើម្បីឱ្យប្រជារាស្ត្រយកទៅគិតពិចារណាបោះឆ្នោតឱ្យបានត្រឹមត្រូវ។ បញ្ហាកម្មករប្រាក់ខែថ្លៃជួលផ្ទះ។ ដោយសារវប្បធម៌សន្ទនាគណបក្សសង្គ្រោះជាតិបានស្នើឱ្យបង្កើតច្បាប់កំណត់មិនឱ្យម្ចាស់តម្លើងថ្លៃជួលផ្ទះតាមតែអំពើចិត្ត។ ឥឡូវច្បាប់បានអនុម័តហើយ។ វប្បធម៌សន្ទនាជាវប្បធម៌សន្តិភាព និងប្រជាធិបតេយ្យ។ យើងកំពុងសរសេរទំព័រថ្មីមួយក្នុងប្រវត្តិសាស្ត្រប្រទេសកម្ពុជា។ វប្បធម៌សន្ទនាមិនមែនធ្វើឱ្យគណបក្សសង្គ្រោះជាតិឈប់តវ៉ាឈប់រិះគន់នោះទេ។ ផ្ទុយទៅវិញវប្បធម៌សន្ទនានេះ គឺយើងត្រូវមានសេរីភាព តវ៉ា រិះគន់ ទិតៀន ដោយសេរី ប៉ុន្តែចៀសវាងពាក្យសម្តីមិនសមរម្យ ប្រទេចផ្តាសា ជេរប្រមាថ ចោទប្រកាន់ហួសហេតុ។ យើងទាំងអស់គ្នាត្រូវមានវិន័យខ្លួនយើង។ វប្បធម៌សន្ទនាធ្វើឱ្យគណបក្សប្រជាជនត្រូវឈប់គម្រាមកំហែងថា នឹងមានសង្គ្រាមស៊ីវិល។ វប្បធម៌សន្ទនាបង្កើតវប្បធម៌គូប្រកួតមិនមែនគូសត្រូវទេ។ ខ្មែរមិនត្រូវចាត់ទុកខ្មែរគ្នាឯងជាគូសត្រូវទេ។ វប្បធម៌សន្ទនាត្រួសត្រាយផ្លូវ ដើម្បីបង្កើតក្រិត្យក្រមអហិង្សា និងសន្តិភាពក្នុងការដោះស្រាយបញ្ហាជាតិ។ វប្បធម៌សន្ទនានេះនឹងបញ្ចប់វប្បធម៌ចាស់តម្រិលទឹកឡើងត្រីស៊ីស្រមោចទឹកហោចស្រមោចស៊ីត្រី។ យើងមិនមែនជាត្រី ឬស្រមោចទេ យើងជាមនុស្ស។ យើងជាខ្មែរយើងមិនចាំបាច់ស៊ីគ្នាសម្លាប់គ្នាដូចសត្វត្រីសត្វស្រមោចទេ"។

លោក សម រង្ស៊ី បានអំពាវនាវឱ្យអ្នកមិនយល់អំពីបំណងពិតប្រាកដនៃវប្បធម៌សន្ទនាឱ្យជួយពន្យល់អ្នកដែលមិនទាន់យល់។ លោកថ្លែងថា ការសន្ទនាតម្រូវឱ្យមានការគោរពគ្នាទាំងសងខាង។ សង្រ្គោះជាតិតំណាងឱ្យខ្មែរមួយចំហៀងមហានគរ។ គេគោរពយើង។ យើងត្រូវរក្សាសេចក្តីថ្លៃថ្នូរ ដើម្បីស័ក្តិសមជាដៃគូសន្ទនា។

លោកបន្តទៀតថា វប្បធម៌សន្ទនានេះមិនមែនដើម្បីចង់បានផលប្រយោជន៍ផ្ទាល់ខ្លួនចង់បានលាភសក្ការៈចង់បានតំណែងអ្វីនោះទេ។ គណបក្សសង្គ្រោះជាតិមិនមែនចូលរដ្ឋាភិបាលលោក ហ៊ុន សែន ទេ។ ពេលគាត់ហាមាត់និយាយជាមួយលោក ហ៊ុន សែន មិនដែលលើកពីបញ្ហាផ្ទាល់ខ្លួន ដូចជា សម រង្ស៊ី ចង់បាននេះ កឹម សុខា ចង់បាននោះ ឬគណបក្សសង្គ្រោះជាតិចង់ចូលរដ្ឋាភិបាលចង់បានតំណែងចង់បានផលប្រយោជន៍នោះឡើយ។

លោក សម រង្ស៊ី បានពន្យល់បន្ថែមអំពីវប្បធម៌សន្ទនាដូចតទៅ: "ប្រធានបទនៃវប្បធម៌សន្ទនាគឺការយកចិត្តទុកដាក់ដោះស្រាយបញ្ហាដែលជាការឈឺចាប់ និងការព្រួយបារម្ភរបស់ប្រជាពលរដ្ឋខ្មែរ។ ពេលដែលមានឱកាសជួបថ្នាក់ដឹកនាំគណបក្សប្រជាជននៅពេលខាងមុខលោកនឹងលើកបញ្ហាព្រំដែនបញ្ហាបូរណភាពទឹកដីបញ្ហាអន្តោប្រវេសន៍ បញ្ហាព្រៃឈើ បញ្ហាទ្រព្យសម្បត្តិជាតិ និងធនធានធម្មជាតិដែលយើងបាត់បង់ និងព្រួយបារម្ភថារលាយសាបសូន្យ បើយើងមិនការពារឱ្យបានត្រឹមត្រូវ។ បញ្ហាដីធ្លីបញ្ហាកសិករខ្មែរបាត់បង់ដីធ្លីស្រែចម្ការប្រជាពលរដ្ឋទូទៅបាត់បង់ផ្ទះសម្បែង បញ្ហាជីវភាពរស់នៅរបស់កសិករ ដែលលក់កសិផលបានក្នុងតម្លៃថោក ឬលក់មិនចេញ។ បញ្ហាកសិករក្រីក្រជំពាក់ប្រាក់ធនាគារ ត្រូវគេអូសផ្ទះសម្បែងស្រែចម្ការ។ គាត់អស់សង្ឃឹមនាំគ្នាចេញធ្វើចំណាកស្រុកទៅប្រទេសថៃ និងបរទេសដើម្បីរកការងារធ្វើ។ ពលករខ្មែរចេញអស់ពីភូមិស្ងាត់ភូមិនៅច្រើនខេត្តច្រើនស្រុក។ ពេលនោះ និគមអន្តោ-ប្រវេសន៍បរទេសឆ្លៀតឪកាសលួចចូលមកស្រុកខ្មែរ។ ទាំងអស់នេះជាបញ្ហា។ យើងខិតខំលើកបញ្ហាទាំងនេះឱ្យគណបក្សប្រជាជនស្តាប់។ ប៉ុន្តែត្រង់ថាគេធ្វើតាមយើងប៉ុណ្ណា គឺអាស្រ័យនៅលើឆន្ទៈរបស់គណបក្សប្រជាជន ត្បិតអំណាចនៅលើដៃគេ។ ប៉ុន្តែដើម្បីធានាថា បញ្ហាទាំងអស់នោះអាចដោះស្រាយបានដូចបំណងរបស់យើង គឺមានតែបោះឆ្នោតឱ្យគណបក្សសង្គ្រោះជាតិ។ នៅពេលយើងជាប់ឆ្នោតនៅឆ្នាំ២០១៨ យើងនឹងដោះស្រាយបញ្ហាទាំងអស់នេះ ដោយខ្លួនយើង"។

លោកបន្តទៀតថា: "គណបក្សសង្គ្រោះជាតិកំពុងតែសរសេរនូវប្រវត្តិសាស្ត្រថ្មីមួយនៅប្រទេសកម្ពុជាតាមរយៈវប្បធម៌សន្ទនា។ យើង

**តទៅទំព័រទី ១២**


... លោក សម រង្ស៊ី


លោក ... មន្ត្រី... ក្រុងស្វាគមន៍ លោក សម រង្ស៊ី

## តមកពីទំព័រទី ១១ លោក សម រង្ស៊ី : វប្បធម៌សន្ទនា...

ចង់ឱ្យមានការផ្លាស់ប្ដូរ។ ការរួញទឹកដី គឺដោយសារខ្មែរឈ្លោះគ្នាមិនចេះចេះឈប់ឈរ។ ទាល់តែខ្មែរចាប់ដៃគ្នាធ្វើការជាមួយគ្នាការពារទឹកដីជាមួយគ្នាកសាងប្រទេសជាមួយគ្នា ទើបជាតិមាតុភូមិរបស់យើងបាននៅគង់វង់ ហើយប្រទេសកម្ពុជាអាចក្លាយជាអរិយប្រទេសមួយ ដូចប្រទេសជឿនលឿនដទៃទៀតក្នុងពិភពលោក។ ពេលដែលខ្មែរឈ្លោះគ្នាក្នុងប្រវត្តិសាស្ត្រមានការសម្លាប់គ្នា បង្ហូរឈាម មានការសម្លាប់រង្គាលគួរឱ្យរន្ធត់ដូចក្រោមរបបខ្មែរក្រហមជាដើម។ ប្រទេសយើងបាត់បង់ឯករាជ្យភាព ពេលណាមានសង្គ្រាមពេលណាខ្មែរឈ្លោះគ្នា។ ខ្មែរយើងមានចរិកមួយពិសេស ដែលធ្វើឱ្យខ្មែររួញបាត់បង់ទឹកដី។ មេៗឈ្លោះគ្នាជាទម្លាប់ជាវប្បធម៌សង្គ្រាម វប្បធម៌កំចាត់គ្នា វប្បធម៌ហិង្សា វប្បធម៌សងសឹក។ នៅក្នុងរាជវង្សានុវង្សបងប្អូនបង្កើតដណ្ដើមគ្នាសោយរាជ្យ រួចសម្លាប់គ្នាយ៉ាងសាហាវ ស៊ីសាច់ហុតឈាមគ្នា។ ក្រុមមួយចង់ឈ្នះក្រុមមួយទៀត។ ក្រុមមួយទៀតមិនញញើតហៅបរទេសមកជួយក្រុមរបស់ខ្លួន។ ម្ដងមានសៀមអន្តរាគមន៍ពីខាងលិច។ ម្ដងខាងកើតគឺយួនអន្តរាគមន៍ជួយឱ្យក្រុមនេះឈ្នះមួយទៀតមួយរយៈពេល រួចហើយមានក្រុមមួយដឹកនាំឱ្យមានការសងសឹកមិនចេះចប់។ ក្នុងករណីខ្មែរឈ្លោះគ្នា និងពឹងបរទេសឱ្យជួយអ្នកដែលខាតគឺខ្មែរ"។

តើពេលណាទើបប្រជាជនខ្មែរមានទូរទស្សន៍គណបក្សប្រឆាំងមើល?

កាលពីចុងឆ្នាំ២០១៤ លោក សម រង្ស៊ី បានផ្សព្វផ្សាយ ដើម្បីរៃអង្គាសថវិកាសម្រាប់តម្លើងស្ថានីយ៍ទូរទស្សន៍មួយ។ កាលណោះលោកមានប្រសាសន៍ថា: "ក្រុមហ៊ុនឯកជនមួយស្ម័គ្រចិត្តចាត់ចែងការផ្សាយរបស់ទូរទស្សន៍សង្គ្រោះជាតិ។ ប៉ុន្តែដើម្បីបើកដំណើការការផ្សាយបាន គេត្រូវការដើមទុនប្រហែល២លានដុល្លារ។ ដោយសារទូរទស្សន៍នេះជាទូរទស្សន៍របស់ប្រជារាស្ត្រមិនមែនជាទូរទស្សន៍ឧកញ៉ា ដើមទុនក្នុងការបើកទូរទស្សន៍នេះ គឺនឹងបានមកពីការរៃអង្គាសថវិកាពីប្រជារាស្ត្រគ្រប់ស្រទាប់វណ្ណៈដែលស្ម័គ្រចិត្តទិញជាភាគហ៊ុន។ មួយភាគហ៊ុនថ្លៃ១.000ដុល្លារ។ បងប្អូនដែលពុំមានប្រាក់គ្រប់គ្រាន់១.000ដុល្លារក៏អាចចូលហ៊ុនបានដែរ ដោយប្រមូលគ្នាមួយនាក់១00ដុល្លារ ឬ២00ដុល្លារឱ្យបានគ្រប់១.000ដុល្លារ រួចឈរឈ្មោះជាតំណាងមួយភាគហ៊ុន។ ប្រាក់កម្រៃពីផលចំណេញនៃការផ្សាយរបស់ទូរទស្សន៍នេះ នឹងត្រូវចែកទៅម្ចាស់ភាគហ៊ុនវិញ តាមតម្លៃហ៊ុននីមួយៗ។ ទូរទស្សន៍សង្គ្រោះជាតិនេះ នឹងមិនទទួលការផ្សាយពាណិជ្ជកម្មស្រាបារី ឬផលិតផលដែលប៉ះពាល់ដល់សុខភាពនោះឡើយ។ ម្យ៉ាងទៀត ទូរទស្សន៍នេះបង្កើតឡើង ដើម្បីបណ្ដុះបណ្ដាលមនុស្សឱ្យមានចំណេះដឹងល្អ និងយល់ដឹងច្រើនអំពីប្រជាធិបតេយ្យ និងផ្សាយដំណឹងពិត"។

ប្រព័ន្ធផ្សព្វផ្សាយនៅប្រទេសកម្ពុជាជាពិសេស វិទ្យុ ទូរទស្សន៍ និង កាសែត ត្រូវបានមតិជាតិ និងអន្តរជាតិចាត់ទុកថាមាននិន្នាការបម្រើគណបក្សប្រជាជន។ប្រជាជនពលដ្ឋខ្មែរភាគច្រើនមិនទទួលបានព័ត៌មានគ្រប់គ្រាន់ទាំងសងខាងទេ។ ពោលគឺពួកគាត់ទទួលបានតែព័ត៌មានម្ខាងពីគណបក្សប្រជាជន។ សូម្បីតែទូរទស្សន៍ជាតិដែលតំណាងឱ្យជាតិខ្មែរទាំងមូលក៏លម្អៀងតែទៅខាងគណបក្សប្រជាជនដែរ។

វប្បធម៌ភ័យខ្លាចត្រូវបានសាបព្រួសនៅស្ទើរគ្រប់ទីកន្លែងជាពិសេសនៅតាមទីជនបទក្នុងប្រទេសកម្ពុជា។ មានករណីជាច្រើនដែលអ្នកស្ដាប់វិទ្យុអារិក និងវិទ្យុអាស៊ីសេរីត្រូវបានព្រមានកុំឱ្យស្ដាប់។ ប៉ុន្តែដោយសារប្រព័ន្ធទំនាក់ទំនងសង្គមមានភាពទូលំទូលាយនៅស្រុកខ្មែរ ការទទួលបានបានព័ត៌មានពិតហាក់មានភាពប្រសើរជាងមុនច្រើន។ ដោយសារតែប្រជាពលរដ្ឋខ្មែរបានទទួលព័ត៌មានពិតពីប្រព័ន្ធ ហ្វេសប៊ុក និងវិទ្យុអាស៊ីសេរី និងវិទ្យុវីអូអេ ទើបលទ្ធផលបោះឆ្នោតក្នុងឆ្នាំ២០១៣មានការប្រែប្រួលខ្លាំងគួរឱ្យកត់សម្គាល់។



លោក សម រង្ស៊ី ថ្វាយបង្គំព្រះសង្ឃនៅឡូវែល



អភិបាលក្រុង រ៉តនី អ៊ីលៀត ប្រគល់កូនសោរជាពលរដ្ឋកិត្តិយសជូនលោក សម រង្ស៊ី

ក្នុងពិធីជួបសំណេះសំណាលនេះដែរ ក៏មានវត្តមានអភិបាលក្រុង រ៉តនី អ៊ីលៀត ដែលបានថ្លែងដូច្នេះថាលោកសូមស្វាគមន៍ដំណើរទស្សនៈកិច្ចរបស់លោក សម រង្ស៊ី មកកាន់ទីក្រុងឡូវែល។ លោកមានក្ដីសោមនស្សដែលបានឃើញបងប្អូនខ្មែរដ៏ច្រើនកុះករមកចូលរួមជួបសំណេះសំណាលជាមួយលោក សម រង្ស៊ី។ ពីធីជួបសំណេះសំណាលនេះ គាប់ជួននឹងបុណ្យរម្លឹកវិញ្ញាណក្ខន្ធ និងគោរពចំពោះអ្នកតស៊ូ និងស្នេហាលទ្ធិប្រជាធិតេយ្យនៅសហរដ្ឋអាមេរិក។ លោកកោតសរសើរដោយស្មោះចំពោះលោក សម រង្ស៊ី ដែលជាបុគ្គលមួយរូបខិតខំតស៊ូដើម្បីឱ្យមានលទ្ធិប្រជាធិតេយ្យនៅប្រទេសកម្ពុជា។ លោកមិនភ្លេចអំពីការធ្វើទស្សនៈកិច្ចរបស់លោកទៅប្រទេសកម្ពុជា។ លោកអរគុណដែលថ្នាក់ដឹកនាំគណបក្សសង្គ្រោះជាតិទទួលស្វាគមន៍គណៈប្រតិភូក្រុងឡូវែលជាទីភាគរៈ។ លោកថា លោកនឹងទៅលេងស្រុកខ្មែរទៀត ដើម្បីស្វែងយល់បន្ថែមអំពីស្រុកខ្មែរ។ លិខិតទទួលស្គាល់ និងដឹងគុណចំពោះបេសកកម្មបម្រើជាតិ និងប្រជាជនកម្ពុជានាពេលកន្លងមក។ សាលាក្រុងឡូវែល សូមទទួលស្គាល់ និងកោតសរសើរនូវវីរភាព និងភាពមិនចុះញ៉មក្នុងការពុះពារ ដើម្បីលទ្ធិប្រជាធិបតេយ្យ សន្តិភាព សិទ្ធិសេរីភាព និងយុត្តិធម៌នៅកម្ពុជា។ ចុងក្រោយលោកអភិបាលក្រុងបានប្រគល់សោរដែលជានិមិត្តរូបនៃការបើកបេះដូងទទួលស្វាគមន៍វត្តមានរបស់លោក សម រង្ស៊ី មកកាន់ទីក្រុងឡូវែលនៅពេលណាក៏បាន ឱ្យលោក សម រង្ស៊ី ចង់អញ្ជើញមក។ លោកអភិបាលក្រុងបានប្រកាសទទួលស្គាល់លោក សម រង្ស៊ី ជាពលរដ្ឋកិត្តិយសនៃក្រុងឡូវែល។





សមាជិកគណបក្សសង្គ្រោះជាតិស្វាគមន៍លោកប្រធាន សម រង្ស៊ី

លោក សម រង្ស៊ី ព្រមទទួលកូនសោរនិមិត្តរូប និងឋានៈជាពលរដ្ឋកិត្តិយសនេះយ៉ាងអំណរ។ លោកបានប្រកាសថា ឥឡូវនេះទីក្រុងឡូវែលជាលំនៅដ្ឋានទីពីររបស់លោកបន្ទាប់ពីស្រុកខ្មែរ។ លោក សម រង្ស៊ី បានថ្លែងអំណរគុណយ៉ាងជ្រាលជ្រៅដល់មន្ត្រី និងប្រជាពលរដ្ឋទីក្រុងឡូវែល ដែលបានទទួលស្វាគមន៍ និងយកចិត្តទុកដាក់បងប្អូនជនភៀសខ្លួនខ្មែរដែលមករស់នៅសហរដ្ឋអាមេរិក ។លោកបានទទួលស្គាល់ និងដឹងគុណចំពោះការយកចិត្តទុកដាក់របស់លោក រ៉ត់នី អ៊ីលៀត ដែលបានធ្វើដំណើរទៅស្រុកខ្មែរ និងបានទៅសួរសុខទុក្ខអ្នកនៅជាប់ពន្ធនាគារព្រៃសរដែលជាប់ទោសដោយសារការតវ៉ាដើម្បីប្រជាធិបតេយ្យ និងសិទ្ធិសេរីភាពនៅកម្ពុជា៕

# ខ្មែរដំបូងបង្អស់ដែលបានកសាងផ្សារប៉ៃលិននៅឡូវែល (ភាគ៣)

ដោយៈ សូបិន ពិន

**លោក ឡាច ប៊ុនរិទ្ធ** អតីតនាយទាហ៊ានបញ្ជូនសារ និងភរិយា ម៉ាលិ ថៃ ជាម្ចាស់នៃភោជនីយដ្ឋានប៉ៃលិនបានផ្តល់កិច្ចសម្ភាសន៍ដល់ សូបិន ពិន កាលពីថ្ងៃទី១៦មេសា២០១៥ នៅភោជនីយដ្ឋានរបស់លោកស្តី អំពីកំណើតនៃពាណិជ្ជកម្មនៃសហគមន៍ខ្មែរដែលបានក្លាយទៅជាក្រុងខ្មែរនាពឆ្នាំចុងក្រោយនេះ មានអត្ថន័យតពីភាគ២ ដូចតទៅ:

**ប៊ុនរិទ្ធ ឡាច** . ពួកវាប្រមូលមនុស្សបាន៥ពាន់នាក់ យកទៅសួរចម្លើយ! វាសង្ស័យគ្រប់តែគ្នាហ្នឹង! ខ្ញុំដឹងថាមិនស្រួលទេ ត្រូវតែភរបានអាចគេចរួចពីការយកទៅសម្លាប់ចោល ម្លោះហើយខ្ញុំថាតែដដែល១ ថាខ្ញុំនៅវត្តបំរើលោកនៅវត្តប្រយូវង្ស បើមិនជឿសូមទៅសួរលោកគ្រូចៅអធិការទៅនឹងដឹងហើយ! តាមពិតទៅខ្ញុំបាននៅជាមួយលោកបាន២ខែដែរ... យប់ឡើងវាយកទៅដាក់ខ្នោះជើងឯលើផ្ទះ...

**ម៉ាលី ថៃ** គាត់មានរឿងអណោចអធម្មមួយដែលបានជួយជីវិតគាត់គួរឱ្យអស្ចារ្យណាស់!

**ប៊ុនរិទ្ធ ឡាច** រឿងនោះវាអញ្ចេះ! គឺពេលមួយនោះ គេយកក្មេងក្រមុំបងប្អូន២នាក់ មកដាក់ខ្នោះជើងក្បែរខ្ញុំ នាងម្នាក់ឈ្មោះ ចៅហន នឹងម្នាក់ទៀតឈ្មោះ ចៅហេ ។ នាងបងនោះដឹងថា គេដាក់ខ្នោះបង្អត់បាយខ្ញុំ៣ថ្ងៃហើយ ទំនងជានាងអាណិតខ្ញុំខ្លាំងណាស់បានជាយប់មួយនោះពេលអាឈ្លបចេញទៅធ្វើការបាត់ម្តាយវាបានដាំបាយទុកឱ្យនាងបងមិនដឹងជាធ្វើដូចម្តេចដោះខ្នោះជើងរួច ដើរលបទៅលួចបាយមួយឆ្នាំងនោះយកមកឱ្យខ្ញុំ ខ្ញុំបានបាយមួយឆ្នាំងឃ្លានពេកក៏ហូបអស់រលីង រួចហើយនាងនោះក៏យកឆ្នាំងទៅទុកវិញ រួចត្រឡប់មកដាក់ខ្នោះខ្លួនឯងវិញ។ អាឈ្លបវាមកវិញ រកបាយវាមិនឃើញ ក៏ទៅសួរម្តាយម្តាយវាក៏អត់ដឹង... ដល់អីចឹងវាមិនដឹងសង្ស័យនរណា ពីព្រោះទាំងអស់គ្នាសុទ្ធតែជាប់ខ្នោះ ។ ក្រោយមកទៀត ម្តាយអាឈ្លបនោះ វាក៏ដាំបាយទុកឱ្យកូនដូចមុន១ទៀត នាងនោះក៏ដោះខ្នោះជើងបាន ចុះទៅលួចបាយមកឱ្យខ្ញុំម្តងទៀត ខ្ញុំក៏ហូបអស់រលីងទៀត រួចហើយនាងនោះក៏យកឆ្នាំងទៅដាក់កន្លែងដើម ហើយឡើងមកដាក់ខ្នោះខ្លួនឯងវិញ គ្មាននរណាដឹងដូចមុនទៀត... លើកទី២នេះ អាឈ្លបវាខឹងខ្លាំងណាស់ លើកទី៣អានោះវាលួចចាំមើល វាធ្វើអី១ដូចដើម ដល់នាងនោះចុះទៅលួចម្តងទៀត អានោះវាចាប់បានវាយនាង នោះសួរចម្លើយ ថាយកបាយ


រូបថត ប៊ុនរិទ្ធ ឡាច ឆ្នាំ១៧៧០


រូបថត ប៊ុនរិទ្ធ ឡាច អ្នកស្រី ម៉ាលី ថៃ

តទៅទំព័រទី១៩

ខឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីកាសារអង់គ្លេស អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ខឹ ខេមបូឌា ដេលី

## នគរបាលជាតិចេញផ្សាយកាសែតរបស់ខ្លួនរំពូកដល់ខួបលើកទី៧០ នៃការបង្កើតកងកម្លាំងនគរបាលជាតិ

**ដោយ មិច ដារ៉ា** | MAY 18, 2015

កាសែតផ្ទាល់ខ្លួនរបស់នគរបាលជាតិជាកាសែតប្រចាំថ្ងៃមាន១២ទំព័រ ដែលនឹងផ្តោតលើបទល្មើស និងសន្តិសុខនោះត្រូវបានចេញផ្សាយផ្លូវការកាលពីថ្ងៃសៅរ៍ អំឡុងពិធីរំឭកខួបលើកទី៧០នៃការបង្កើតកងកម្លាំងនគរបាលជាតិ។

អំឡុងពិធីនៅអគ្គស្នងការដ្ឋាននគរបាលជាតិក្នុងរាជធានីភ្នំពេញដើម្បីរំឭកដល់ខួបនិងការចេញផ្សាយកាសែតពណ៌ធម្មជាតិនោះ លោក នេត សាវឿន អគ្គស្នងការនគរបាលជាតិបានមានប្រសាសន៍ថា នគរបាលបង្ហាញថាខ្លួនសំខាន់ណាស់ចំពោះសន្តិសុខនៅប្រទេសកម្ពុជាតាមរយៈប្រវត្តិរបស់ខ្លួន។

លោក សាវឿន បានមានប្រសាសន៍ថា "កងកម្លាំងនគរបាលជាតិជាស្នូលដ៏រឹងមាំជាមួយកងរាជអាវុធហត្ថជាតិកងយោធពលខេមរភូមិន្ទ និងអាជ្ញាធរមូលដ្ឋានដោយមានមនសិការជាតិ និងមានភាពអត់ធ្មត់ដើម្បីយកឈ្នះការប្រើល្បិចកលរបស់គណបក្សប្រឆាំង និងក្រុមរបស់ខ្លួន"។



សកម្មភាពរបស់នគរបាលក្នុងរយៈពេល២ឆ្នាំ

តទៅទំព័រទី ១៩

## National Police Mark 70th Anniversary With Paper Launch

**BY MECH DARA | MAY 18, 2015**

The National Police's own newspaper-a 12-page daily that will focus on crime and security-was officially launched on Saturday during a ceremony marking the 70th anniversary of the establishment of a Cambodian national police force.

During the event at the National Police headquarters in Phnom Penh to celebrate both the anniversary and the launch of the color newspaper, National Police Chief Neth Savoeun said the police had proven themselves central to Cambodia's security throughout its history.

"The National Police force forms a strong core along with the National Military Police, Royal Cambodian Armed Forces and the local authorities, striving with a national consciousness and with patience to defeat the tricks of the opposition party and its groups," Mr. Savoeun said.

Police actions over the past two years, particularly during the political upheaval surrounding the July 2013 national election, had helped reduce "the severe violence and the risks in society, and has kept public order and security to make society return to normal," Mr. Savoeun said.

**Continued to Page 17**

## រដ្ឋមន្ត្រីក្រសួងការបរទេសរិះគន់អង្គការសហប្រជាជាតិជុំវិញ សេចក្តីព្រាងច្បាប់ស្តីពីអង្គការមិនមែនរដ្ឋាភិបាល

កាលពីម្សិលមិញលោក ហោ ណាំហុង រដ្ឋមន្ត្រីក្រសួងការបរទេសបានកោះហៅតំណាងភ្នាក់ងារអង្គការសហប្រជាជាតិមកពិភាក្សាជុំវិញលិខិតមួយក្នុងពេលថ្មីៗនេះ ដែលមន្ត្រីជាន់ខ្ពស់ប្រចាំប្រទេសរបស់ខ្លួនចំនួនបួនរូបបានសរសេររិះគន់សេចក្តីព្រាងច្បាប់ដ៏ចម្រូងចម្រាសរបស់រដ្ឋាភិបាលស្តីពីអង្គការមិនមែនរដ្ឋាភិបាលមួយថ្ងៃបន្ទាប់ពីក្រសួងការបរទេសបានចាត់ទុកពាក្យសម្តីរបស់ឯកអគ្គរដ្ឋទូតសហរដ្ឋអាមេរិកពាក់ព័ន្ធបញ្ហាដដែលថា "ព្រហើន"។

ទាំងអង្គការមិនមែនរដ្ឋាភិបាលក្នុងស្រុក និងអន្តរជាតិសុទ្ធតែបានជំទាស់យ៉ាងខ្លាំងចំពោះសេចក្តីព្រាងច្បាប់ថ្មីបំផុតនេះដែលនឹងតម្រូវឱ្យពួកគេចុះបញ្ជី និងដាក់របាយការណ៍ប្រចាំឆ្នាំស្តីពីហិរញ្ញវត្ថុនិងសកម្មភាពរបស់ខ្លួនជូនរដ្ឋាភិបាល។

បន្ទាប់ពីលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានលើកឡើងកាលពីខែមុនថា លោកចង់ឃើញច្បាប់នេះត្រូវបានអនុម័តនៅត្រឹមដំណាច់ខែឧសភានោះ អង្គការមិនមែនរដ្ឋាភិបាល និងសមាគមជាង៣០០បានចុះហត្ថលេខាលើញត្តិមួយ ដោយជំរុញឱ្យរដ្ឋាភិបាលបង្ហាញសេចក្តីព្រាងច្បាប់ថ្មីបំផុតរបស់ខ្លួន និងរៀបចំកិច្ចពិភាក្សាពិគ្រោះយោបល់បន្ថែមទៀតជាមួយពួកគេមុនការបោះឆ្នោតអនុម័ត។ ក្តីព្រួយបារម្ភដ៏ចម្បងរបស់ពួកគេគឺថាខ្លាចក្រែងការខកខានរបស់សេចក្តីព្រាងច្បាប់នេះក្នុងការមិនបានបង្ហាញឱ្យបានច្បាស់លាស់អំពីហេតុផល ដែលរដ្ឋាភិបាលអាចបដិសេធការចុះបញ្ជីនោះនឹងត្រូវគេប្រើប្រាស់ដោយមិនត្រឹមត្រូវ ដើម្បីបំបិទសិទ្ធិក្នុងការបញ្ចេញមតិយោបល់រិះគន់។ **តទៅទំព័រទី ១៧**



## UN Rebuked Over Letter on Draft NGO Law

**BY KHY SOVUTHY | MAY 22, 2015**

Foreign Affairs Minister Hor Namhong on Thursday took the U.N. to task over a recent letter four of its senior country officials wrote criticizing the government's secretive drafting of a controversial NGO law, a day after the ministry called the U.S. ambassador's remarks on the same issue "insolent."

Local and international NGOs alike are staunchly opposed to the last public draft of the law-now more than three years old-which would require them to register and file annual activity and financial reports with the government.

Foreign Minister Hor Namhong, far right, speaks Thursday with, right to left, Claire Van der Vaeren, the UN's resident coordinator in Cambodia, Rana Flowers, country representative for Unicef, Wan-Hea Lee, country representative for the UN's High Commissioner for Human Rights, Wenny Kusuma, country director of UN Women, and Marc Derveeuw, country representative for the UN Population Fund. (Siv Channa/The Cambodia Daily)

After Prime Minister Hun Sen said last month that he wanted to see the law passed by the end of May, more than 300 NGOs and associations signed a petition urging the government to release its latest draft and hold more consultations with them before a vote. Their main concern is that the draft's failure to lay out a clear and concise list of reasons the government could refuse registration will be misused to silence **Continued to Page 17**

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ជំណឹងប្រែសម្រួលពីកាសារអង់គ្លេស
អត្ថបទដកស្រង់ និងទទួលការអនុញ្ញាតឱ្យធ្វើការចុះផ្សាយពី ឌី ខេមបូឌា ដេលី

# អង្គការសិទ្ធិមនុស្សលើកឡើងថា ជនជាតិវៀតណាមជីក ស្រះទឹក និងដាំដំឡូងមីក្នុងប្រទេសកម្ពុជា

**ដោយ គុច ណារ៉ែន** | May 27, 2015

អង្គការសិទ្ធិមនុស្សអាដហុកលើកឡើងថា អង្គការបានរកឃើញចម្ការដំឡូងមីដាំដោយជនជាតិវៀតណាមដែលគ្មានលិខិតស្នាមត្រឹមត្រូវ នៅក្នុងទឹកដីកម្ពុជានៃព្រំដែនរួមរបស់ប្រទេសទាំងពីរ អំឡុងការចុះទៅស្រុកអូរយ៉ាដាវ ខេត្តរតនគិរីកាលពីថ្ងៃច័ន្ទ ។

លោក ឆាយ ធី អ្នកសម្របសម្រួលអង្គការអាដហុកប្រចាំខេត្តនេះបានមានប្រសាសន៍កាលពីម្សិលមិញថា ពួកគេក៏បានរកឃើញស្រះទឹកទំហំ៥ម៉ែត្រគុណ១០ម៉ែត្រនៅក្បែរចម្ការ ទាំងនោះផងដែរ នៅក្នុងតំបន់ដែលកំណត់ព្រំប្រទល់មិនច្បាស់លាស់តាមព្រំដែនស្ថិតក្នុងឃុំប៉ក់ញែ ។

លោក ឆាយ ធី បានមានប្រសាសន៍ថា ការស៊ើបអង្កេតដល់ទីកន្លែងគឺដើម្បីរកឱ្យឃើញថាតើមានការកាប់ឈើខុសច្បាប់ដោយក្រុមជនជាតិវៀតណាមដែលឆ្លងព្រំដែនរាល់ថ្ងៃមែន ឬមិនមែន ប៉ុន្តែទីបំផុតយើងបានរកឃើញមានសកម្មភាពខុសប្រក្រតីចំនួនបីកើតឡើងនៅទីនោះ" ។

លោកបានបន្ថែមថា "ទី១ស្រះទឹកចំនួនប្រាំដែលជីកដោយជនជាតិវៀតណាមនៅក្នុងទឹកដីកម្ពុជា ទី២ទាហានព្រំដែនមួយចំនួនបានជួលដីខ្មែរទៅឱ្យវៀតណាមដើម្បីដាំ ដំឡូងមីនៅក្នុងប្រទេសកម្ពុជា" ។

លោកបានមានប្រសាសន៍ថា ពួកគេក៏បានរកឃើញពលករវៀតណាមដែលគ្មានលិខិតស្នាមត្រឹមត្រូវធ្វើការនៅលើចម្ការទាំងនោះផងដែរ ។

លោក ម៉ា វិចិត្រ អភិបាលស្រុកបានមានប្រសាសន៍ថា លោកបានរៀបចំការធ្វើដំណើរដាច់ដោយឡែកមួយទៅតំបន់ព្រំដែននៅថ្ងៃដដែលនោះ ប៉ុន្តែបានបន្ថែមថា វាមិនអាចទៅរួចទេ ក្នុងការកំណត់ថា ស្រះទឹកទាំងនោះស្ថិតក្នុងព្រំដែនប្រទេសមួយណានោះ ។

លោកបានមានប្រសាសន៍ថា "ដោយសារខ្ញុំមិនមែនជាអ្នកជំនាញខាងផែនទី ខ្ញុំមិនអាចនិយាយថា ស្រះទឹកទាំងនោះត្រូវបានជីកដោយជនជាតិវៀតណាមស្ថិតក្នុងទឹកដីកម្ពុជា ឬទឹកដីវៀតណាមឡើយ ។ ពីព្រោះតំបន់នេះមិនទាន់ត្រូវបានកំណត់ព្រំប្រទល់ដោយការបោះបង្គោលព្រំដែនផ្លូវការនៅឡើយទេ" ។

លោក ម៉ា វិចិត្រ បានមានប្រសាសន៍ថា លោកបានបញ្ជូនរបាយការណ៍ស្នើសុំឱ្យអ្នកជំនាញចុះធ្វើការស៊ើបអង្កេតបន្ថែម ។

លោក ហេង រតនា ស្នងការរងនគរបាលខេត្តបានមានប្រសាសន៍ថា អាជ្ញាធរខេត្តបានជួបប្រជុំកាលពីម្សិលមិញ ដើម្បីពិភាក្សាអំពីលទ្ធផលទាំងនោះ ហើយនឹងកោះប្រជុំជាមួយសមភាគីរបស់ខ្លួននៅសប្តាហ៍ក្រោយ ។

ការរកឃើញស្រះទឹក និងចម្ការមួយចំនួននៅតាមព្រំដែនកើតឡើងចំពេលដែលមានវិវាទដាច់ដោយឡែកពីគ្នា ដែលក្នុងនោះប្រទេសវៀតណាមអះអាងកាន់កាប់ដីទំហំ១៦.៦ហិកតានៅតាមព្រំដែនក្នុងខេត្តត្បូងឃ្មុំ ដែលប្រជាជនខ្មែរបានធ្វើស្រែចម្ការជាយូរមកហើយ ។

បន្ទាប់ពីជនជាតិវៀតណាមមួយក្រុមមានគ្នា៦នាក់ រួមមានទាហានបីនាក់បានបាញ់ថ្នាំគីមីលើដំណាំដែលកសិករខ្មែរបាន ដាំកាលពីថ្ងៃទី១៩ ខែមេសាមក ក្រុមសមាជិកសភាគណបក្សសង្គ្រោះជាតិបានផ្ញើលិខិតជូនលោក ហោ ណាំហុង រដ្ឋមន្ត្រីក្រសួងការបរទេសស្នើសុំការអន្តរាគមន៍របស់លោក ។

កាលពីថ្ងៃទី៤ ខែឧសភា លោក ហោ ណាំហុង បានឆ្លើយតបដោយលើកឡើងថា ដីនេះស្ថិតក្នុងប្រទេសវៀតណាម ។ សកម្មជនគណបក្សសង្គ្រោះជាតិ និងអ្នកជាតិនិយមបានលើកឡើងពីបញ្ហានេះ ហើយបានដាក់សម្ពាធឱ្យលោក ហោ ណាំហុង ធ្វើការពន្យល់ពីមូលហេតុដែលប្រទេសកម្ពុជាបានបាត់បង់ទឹកដីដែលពលរដ្ឋរបស់ខ្លួនបានធ្វើស្រែចម្ការជាយូរមកហើយនោះ ។

លោក ហោ ណាំហុង បានពន្យល់នៅក្នុងការពិភាក្សាតុមូលដែលចាក់ផ្សាយតាមទូរទស្សន៍ជាតិកាលពីសប្តាហ៍មុនថា កម្ពុជាបានយល់ស្របថា ដីនេះស្ថិតក្នុងប្រទេសវៀតណាមផ្អែកតាមផែនទីដែលប្រទេសទាំងពីរ បានព្រមព្រៀងប្រើជាមូលដ្ឋាននៃការចរចាដើម្បីកំណត់ព្រំដែន ។

កាលពីម្សិលមិញ លោក ម៉ៅ មុន្នីវណ្ណ សមាជិកសភាគណបក្សសង្គ្រោះជាតិបានមានប្រសាសន៍ថា លោកមានគម្រោងផ្ញើលិខិតទៅលោក វ៉ា គឹមហុង ប្រធានគណៈកម្មាធិការព្រំដែនសុំឱ្យលោកផ្តល់ផែនទីដែលត្រូវបានប្រើនៅក្នុងការចរចា ដើម្បីបង្ហាញថា តំបន់ដែលមានវិវាទនេះស្ថិតក្នុងប្រទេសវៀតណាម ។

លោកបានមានប្រសាសន៍ថា "នៅពេលណាយើងមានផែនទីដែលលោក វ៉ា គឹមហុង អះអាងថា យកមកប្រើសម្រាប់ការកំណត់ព្រំដែននោះ យើងអាចផ្ទៀងផ្ទាត់ជាមួយបង្គោលព្រំដែនពិតប្រាដកថាតើវាពិតឬមិនពិត" ។

លោក ម៉ៅ ពិសេស ប្រធានសហព័ន្ធនិស្សិតបញ្ញវន្តកម្ពុជា ជាក្រុមសកម្មជនជាតិនិយមដែលបានចុះទៅតំបន់ដែលមានវិវាទកាលពីដើម ខែនេះបានមានប្រសាសន៍ថា ពួកគេមានគម្រោងដាក់ជូនញត្តិទៅមន្ត្រីនានានៅសប្តាហ៍ក្រោយជំរុញឱ្យពួកគាត់លុបចោលសន្ធិសញ្ញាព្រំដែនឆ្នាំ២០០៥ដំចម្រូងចម្រោសជាមួយប្រទេសវៀតណាម ។

លោក ពិសេស បានមានប្រសាសន៍ថា "យើងនឹងដាក់ជូនញត្តិអមដោយរបាយការណ៍ស្តីពីលទ្ធផលរបស់យើងថ្វាយព្រះមហាក្សត្រ ជូនលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន និងលោក សម រង្ស៊ី ដែលលោកមានតួនាទីជាប្រធានក្រុមភាគតិចនៅរដ្ឋសភានៅសប្តាហ៍ទី១នៃខែមិថុនា ស្វែងរកការអន្តរាគមន៍ដើម្បីចាត់វិធានការអំពីបញ្ហាព្រំដែន" ។

លោកបានមានប្រសាសន៍ថា "ប្រសិនបើរដ្ឋាភិបាលមិនឆ្លើយតបបន្ទាប់ពីយើងដាក់ញត្តិ និងរបាយការណ៍ទេនោះ យើងនឹងជួបប្រជុំជាមួយសមាជិករបស់យើងម្តងទៀតដើម្បីសម្រេចថាតើ ត្រូវធ្វើការតវ៉ាទាមទារឱ្យលោក ហោ ណាំហុង លាលែងពីតំណែងឬយ៉ាងណា" ៕

**សារុន**

# Vietnamese Illegally Work Cambodian Land: Adhoc

**By Kuch Naren | May 27, 2015**

Rights group Adhoc says it found cassava plantations being worked by undocumented Vietnamese nationals on Cambodia's side of the two countries' shared border during a visit to Ratanakkiri province's O'Yadaw district on Monday.

Chhay Thy, Adhoc's provincial coordinator, said Tuesday that they also found five 5-by-10-meter ponds near plantations, all of them in a poorly demarcated area along the border in Paknhai commune.

"The field investigation was to find out whether or not there was illegal logging by groups of Vietnamese people who cross the border each day, but we ultimately found out there were three irregular activities happening there," Mr. Thy said.

"Firstly, five ponds were dug by Vietnamese on Cambodia's soil. Secondly, some border soldiers have rented Cambodian soil for Vietnamese to grow cassava in Cambodia."

He said they also found undocumented Vietnamese migrants working on the plantations.

District governor Ma Vichet said he organized a separate trip to the border area on the same day but added that he could not determine on which side of the border the ponds were located.

"Since I am not an expert on mapping, I cannot say those ponds were dug by Vietnamese inside Cambodia's or Vietnam's land," he said. "Because the area has not been officially demarcated with border posts yet."

Mr. Vichet said he had sent a report up the chain of command to ask that experts be dispatched to investigate further.

Deputy provincial police chief Heng Ratana said provincial authorities met Tuesday to discuss the findings and would convene with their counterparts across the border next week.

The discovery of the ponds and plantations along the border comes in the midst of a separate dispute in which Vietnam is claiming 16.6 hectares of land along the border in Tbong Khmum province that has long been farmed by Cambodians.

After a group of six Vietnamese nationals, including three soldiers, sprayed toxic chemicals on crops grown by Cambodian farmers on April 19, opposition CNRP lawmakers sent a letter to Foreign Affairs Minister Hor Namhong requesting his intervention.

On May 4, Mr. Namhong responded by saying that the land was in Vietnam. The CNRP and nationalist activists have seized the issue and are pressuring Mr. Namhong to offer a satisfactory explanation for why Cambodia has lost land that its citizens have long farmed.

Mr. Namhong explained in a roundtable discussion, aired on national television last week, that Cambodia had agreed that the land was in Vietnam based on maps that both countries have agreed to use as the foundation of negotiations to demarcate the border.

On Tuesday, CNRP lawmaker Mao Monyvann said he planned to send a letter to Var Kimhong, chairman of Cambodia's border committee, asking him to provide the map being used in the negotiations in order to prove that the disputed area is in Vietnam.

"Whenever we can have the map Var Kimhong claimed to use as the basis for border demarcation, we can verify with actual border posts whether or not it's true," he said.

ឌឹ ខេមបូឌា ដេលី The Cambodia Daily

ដំណឹងប្រែសម្រួលពីភាសាអង់គ្លេស អត្ថបទដកស្រង់ និងចុះផ្សាយតាមការអនុញ្ញាតឡើងវិញ ឌឹ ខេមបូឌា ដេលី

# រដ្ឋមន្ត្រីគាំទ្រការចាត់វិធានការផ្លូវច្បាប់លើអ្នកជេរប្រមាថតាមបណ្តាញទំនាក់ទំនងសង្គម

**ដោយ ឆន ?ចាន់ស៊ី និង ខូលីន ម៉ីយឆ៍** | MAY 25, 2015

កាលពីម្សិលមិញ លោក ខៀវ កាញារីទ្ធ រដ្ឋមន្ត្រីក្រសួងព័ត៌មានបានលើកឡើងថា លោកគាំទ្រការផ្តន្ទាទោសចំពោះអ្នកប្រើប្រាស់បណ្តាញទំនាក់ទំនងសង្គម ដែលជេរប្រមាថមន្ត្រីរដ្ឋាភិបាល ក្រោយពេលអ្នកនាំពាក្យរដ្ឋាភិបាលម្នាក់បានស្នើឱ្យមានវិធានការបែបនេះកាលពីសប្តាហ៍មុននៅក្នុងលិខិតផ្ញើជូនរដ្ឋមន្ត្រីក្រសួងមហាផ្ទៃ និងរដ្ឋមន្ត្រីក្រសួងប្រៃសណីយ៍ និងទូរគមនាគមន៍។

លោក ខៀវ កាញារីទ្ធ ដែលជាអ្នកចូលចិត្តលេងបណ្តាញទំនាក់ទំនងសង្គម និងដែលតែងតែបង្ហោះព័ត៌មាន និងសារជាភាសាខ្មែរ អង់គ្លេស និងបារាំងនោះ បានលើកឡើងនៅក្នុងសារតាមហ្វេសប៊ុកមួយកាលពីម្សិលមិញថា លោកគាំទ្ររដ្ឋាភិបាលក្នុងការចាត់វិធានការផ្លូវច្បាប់លើអ្នកណាដែលបង្ហោះសារជេរប្រមាថតាមអ៊ីនធើណិត។

លោកបានសរសេរថា "ប្រសិនបើលោកអ្នកយល់ឃើញថា ខ្លួនត្រូវបានគេជេរប្រមាថ គឺទង្វើបែបហ្នឹងវាស្ថិតចូលក្នុងក្រមព្រហ្មទណ្ឌរួចទៅហើយ"។ លោកបានបន្ថែមថា ការផ្តន្ទាទោសគឺជាវិធានការដ៏សាកសមមួយចំពោះអ្នកដែលប្រើប្រាស់បណ្តាញទំនាក់ទំនងសង្គមក្នុងផ្លូវមិនសមរម្យ។

នៅពេលត្រូវបានសួរថា តើអ្នកដែលជេរប្រមាថមេដឹកនាំរដ្ឋាភិបាលតាមអ៊ីនធើណិតគួរតែមានការផ្តន្ទាទោសក្រោមក្រមព្រហ្មទណ្ឌដែរឬទេ លោកបានមានប្រសាសន៍ថា "ប្រសិនបើរដ្ឋាភិបាលយកករណីហ្នឹងទៅតុលាការ វាគួរតែមានហើយ"។

យោងតាមមាត្រា ៣០៥ ដល់ ៣០៨ នៃក្រមព្រហ្មទណ្ឌ ការបរិហារកេរ្តិ៍ ឬការជេរប្រមាថត្រូវពិន័យជាប្រាក់ពី១០០.០០០រៀល ដល់១០.០០០.០០០រៀល ហើយពាក់ព័ន្ធនឹងព័ត៌មាន រូបភាព ឬវីដេអូដែលត្រូវបានផ្សព្វផ្សាយជាសាធារណៈក៏ដូចគ្នាដែរ។ **តទៅទំព័រទី ២៣**

# Minister Backs Legal Action Over Online Insults

**BY COLIN MEYN AND CHHORN CHANSY | MAY 25, 2015**

Information Minister KhieuKanharith said Sunday that he supports the prosecution of social media users who insult government officials, after a government spokesman requested such action last week in letters to the ministries of interior and telecommunications.

Mr. Kanharith, an avid social media user who regularly posts news and messages in Khmer, English and French, said in a Facebook message Sunday that he supported the government taking legal action against those who post insulting content online.

"If the person feel that he/her was insulted there is a penal code for that already," Mr. Kanharith wrote, adding that prosecution would be an appropriate course of action against offending social media users.

"If the government brings the case to court, yes," he said when asked if people who insult government leaders online should be prosecuted under the penal code.

Under articles 305 to 308 of the criminal code, defamation or insulting can be subject to fines ranging from 100,000 to 10,000,000 riel, or about $25 to $2,500, and relates to information, images or videos meant to be made public.

Council of Ministers spokesman PhaySiphan sent letters to Interior Minister SarKheng and Posts and Telecommunications Minister PrakSokhon on Thursday asking them to apply the criminal code to people sharing defamatory or insulting content online.

Mr. Siphan requested that the ministers arrange "to take legal action against the ill-intentioned and unethical persons for using social media to attack, insult and defame civil servants and government leaders."

"Insults and defamation are not part of freedom of expression, but instead violate the rights and dignity of individuals," Mr.

**Continued to Page 25**

# និយាយលើកឡើងអំពីសហរដ្ឋអាមេរិកបាននិរទេសសកម្មជននៃប្រជាជនកម្ពុជា

**ដោយ Arias Danaparamita |**
**ខែឧសភា 16, 2015**

ប្រទេសកម្ពុជាអាមេរិក Chanravy ព្រឿង Lia និងម្យៀ-បានជិះយន្តហោះទៅទីក្រុងហ្សឺណែវ Kiernan ក្នុងសប្តាហ៍កន្លងមកនេះនៅលើបេសកកម្មបញ្ឈប់ការអនុវត្តន៍របស់សហរដ្ឋអាមេរិកជាមួយនឹងការផ្តន្ទាទោសនិរទេសពលរដ្ឋកម្ពុជាព្រហ្មទណ្ឌ។

កាលពីថ្ងៃច័ន្ទបានឃើញក្រុមប្រឹក្សាសិទ្ធិមនុស្សអង្គការសហប្រជាជាតិត្រួតពិនិត្យជាសាកលរបស់សហរដ្ឋអាមេរិកក្នុងអំឡុងពេលដែល១២២បណ្តារដ្ឋជាសមាជិកអង្គការសហប្រជាជាតិត្រូវបានគេដែលបានផ្តល់ឱ្យជារៀងរាល់៦៥ វិនាទីដើម្បីអត្ថាធិប្បាយលើបញ្ហាសិទ្ធិមនុស្សនៅក្នុងសហរដ្ឋអាមេរិកនៅក្នុងសម័យប្រជុំនេះក៏បានផ្តល់ឱ្យអង្គការសិទ្ធិស៊ីវិលឱកាសក្នុងការប្តឹងឧទ្ធរណ៍ទៅកាន់ប្រតិភូប្រទេសលើនេះក្រៅ។

លោកស្រី ព្រឿង និងអ្នកស្រី Kiernan ដែលតំណាងឱ្យបណ្តាញតំបន់អាស៊ីអាគ្នេយ៍សេរី (SEAFN) ដែលជាសម្ព័ន្ធនៃអង្គការថ្នាក់មូលដ្ឋាននៅទូទាំងសហរដ្ឋអាមេរិកត្រូវបានអំពាវនាវឱ្យមានការផ្អាកជាបន្ទាន់នូវការនិរទេសទៅសហរដ្ឋអាមេរិកបានទាំងអស់ក្នុងប្រទេសកម្ពុជាហើយការពិនិត្យបានបើកនៅឆ្នាំ២០០២ សហរដ្ឋអាមេរិកនិងកម្ពុជាធ្វើមាតុភូមិនិវត្តន៍កិច្ចព្រមព្រៀងដែលគេបានអះអាងថារំលោភសិទ្ធិមនុស្សរួមបញ្ចូលទាំងសិទ្ធិក្នុងការសាមគ្គីភាពក្នុងគ្រួសារនិងសិទ្ធិមានសេរីភាពពីការចាប់ខ្លួនឃុំខ្លួន និងការនិរទេសខ្លួន។

ប្រទេសកម្ពុជាមិនមានវត្តមានក្នុងអំឡុងពេលការពិនិត្យឡើងវិញកាលពីថ្ងៃចន្ទនិងបញ្ហាការនិរទេសនៅកម្ពុជាមិនត្រូវបានគេបង្ហាញ។ ទោះជាយ៉ាងណា-ចំពេលមានការតវ៉ាទាក់ទងនឹងការរើសអើងជាតិសាសន៍ក្នុងការអនុវត្តច្បាប់ការឃ្លាំមើលរបស់រដ្ឋាភិបាលនិងការកាត់ទោសប្រហារជីវិតនៅក្នុងសហរដ្ឋអាមេរិកដែលមានការព្រួយបារម្ភអំពីការឃុំខ្លួននិងការនិរទេសនៃជនអន្តោប្រវេសន៍ត្រូវបានលើកឡើងដោយប្រទេសជាច្រើនក្នុងនោះរួមមានប្រទេសថៃ.ប្រទេសប្រេស៊ីល ប៉ារ៉ាហ្គាយ និងប្រទេសស៊ុយអែត។

លោកស្រីព្រឿងដែលជាអ្នករៀបចំជាតិសម្រាប់ SEAFN ដែលរស់នៅក្នុងទីក្រុង Philadelphia និយាយពីក្រុងហ្សឺណែវ កាលពីថ្ងៃអាទិត្យបានថ្លែងថា "អន្តោប្រវេសន៍ជាបញ្ហាដ៏

**តទៅទំព័រទី ២០**

# Activists Decry US Deportation of Cambodians

**BY ARIA DANAPARAMITA | MAY 16, 2015**

Cambodian-Americans Chanravy Proeung and Mia-lia Kiernan flew to Geneva this past week on a mission: stopping the U.S. practice of deporting Cambodians with criminal convictions.

Monday saw the U.N. Human Rights Council's Universal Periodic Review of the U.S., during which 122 U.N. member states were given 65 seconds each to comment on human rights issues in the U.S. The session also gave civil rights organizations a chance to appeal to country delegates on the sidelines.

Ms. Proeung and Ms. Kiernan, representing the Southeast Asian Freedom Network (SEAFN), a coalition of grassroots organizations across the U.S., are calling for an immediate suspension of all U.S. deportations to Cambodia and an open review of the 2002 U.S.-Cambodia Repatriation Agreement, which they claim violates human rights including right to family unity and the right to freedom from arbitrary arrest, detention and exile.

Cambodia was not present during Monday's review and the Cambodian deportation issue was not mentioned. However-amid grievances regarding racial discrimination in law enforcement, government surveillance and the death penalty in the U.S.-concerns about the detention and deportation of immigrants were raised by several countries, including Thailand, Brazil, Paraguay and Sweden.

"Immigration is a huge issue in the U.S. and very Latino-driven," said Ms. Proeung, a national organizer for SEAFN who lives in Philadelphia, speaking from Geneva on Sunday. "But you don't hear from Asian-American communities in the U.S., specifically not Cambodian communities-we're invisibilized in that battle."

Under U.S. law, non-U.S. citizens convicted of any "deportable offense"-a broad term that encompasses convictions under federal or state law-can be deported, even after serving their sentence.

In 2002, Washington and Phnom Penh signed a repatriation treaty that allowed the U.S. to deport Cambodian-Americans back to Cambodia, a country many had never seen.

Between 2002 and the end of 2014, a total of 467 Cambodians were deported from the U.S. to Cambodia, 97 percent of them male, according to the Returnee Integration Support Center (RISC),

**Continued to Page 21**

តមកពីទំព័រទី ១៨
## រដ្ឋមន្ត្រីក្រសួងការបរទេសរិះគន់អង្គការ...

នៅក្នុងលិខិតមួយចុះផ្សាយក្នុងទំព័រកាសែតក្នុងស្រុកមួយកាលពីសប្តាហ៍មុន ប្រធានចំនួនបួនរូបនៃភ្នាក់ងាររបស់អង្គការសហប្រជាជាតិប្រចាំប្រទេសកម្ពុជាដែលរួម មានដូចជា មូលនិធិអង្គការសហប្រជាជាតិដើម្បីកុមារ (Unicef) អង្គការសហប្រជាជាតិដើម្បីស្ត្រី (UN Women) មូលនិធិអង្គការសហប្រជាជាតិសម្រាប់ប្រជាជន (UN Population Fund) និងការិយាល័យឧត្តមស្នងការសហប្រជាជាតិទទួលបន្ទុកសិទ្ធិមនុស្សប្រចាំកម្ពុជា (UNOHCHR) នោះបានលើកឡើងថា រដ្ឋាភិបាលមិនបានខិតខំឱ្យបានគ្រប់គ្រាន់ក្នុងការធ្វើឱ្យសាធារណជនចូលរួមពាក់ព័ន្ធក្នុងដំណើរការធ្វើសេចក្តីព្រាងច្បាប់នេះឡើយ ។

ពួកគេបានស្នើឱ្យរដ្ឋាភិបាលចែករំលែកសេចក្តីព្រាងច្បាប់ថ្មីបំផុតនេះឱ្យបានឆាប់តាមដែលអាចធ្វើទៅបានរៀបចំការពិភាក្សាពិគ្រោះយោបល់ និងយកអនុសាសន៍ទៅ ពិចារណាមុនពេលធ្វើសេចក្តីសម្រេចជាចុងក្រោយ ។

រដ្ឋាភិបាលបានពិភាក្សាពិគ្រោះយោបល់ជាមួយអង្គការមិនមែនរដ្ឋាភិបាលស្តីពីសេចក្តីព្រាងច្បាប់នេះជាលើកចុងក្រោយកាលពីចុងឆ្នាំ២០១១ ហើយចាប់តាំងពីពេលនោះ មករដ្ឋាភិបាលមិនដែលទទួលយកសំណើរបស់ពួកគេដែលស្នើសុំជួបពិភាក្សាអំពីបញ្ហានេះម្តងទៀតឡើយ ។

កាលពីព្រឹកម្សិលមិញ លោក ហោ ណាំហុង បានកោះ ហៅតំណាងអង្គការសហប្រជាជាតិទាំងបួនរូបនេះក៏ដូចជា លោក ក្លែរ វ៉ាន ដឺ វ៉ារេន (Claire Van der Vaeren) អ្នកសម្របសម្រួលរបស់អង្គការសហប្រជាតិមកជួបពិភាក្សាគ្នានៅក្នុងការិយាល័យរបស់លោក ដើម្បីសម្តែងការមិនពេញចិត្តចំពោះលិខិតរបស់ពួកគេដោយផ្ទាល់ ។

រដ្ឋមន្ត្រីក្រសួងការបរទេសរូបនេះបានប្រាប់អ្នកយកព័តិមានក្រោយកិច្ចប្រជុំបិទទ្វារថា "ខ្ញុំបានប្រាប់ពួកគេថា ក្នុងនាមជាតំណាងអង្គការសហប្រជាជាតិពួកគេដាច់ខាតត្រូវតែគោរពមាត្រាពីរនៃធម្មនុញ្ញរបស់អង្គការសហប្រជាជាតិ" ។

ធម្មនុញ្ញនេះចែងថា គ្មានមាត្រាណាអនុញ្ញាតឱ្យអង្គការសហប្រជាជាតិធ្វើអន្តរាគមន៍នៅក្នុងកិច្ចការផ្ទៃក្នុងរបស់ប្រទេសណាមួយឡើយ ។

រដ្ឋមន្ត្រីរូបនេះបានលើកឡើងនៅក្នុងសេចក្តីថ្លែងការណ៍មួយដែលក៏ចេញកាលពីម្សិលមិញដែរ នោះថា "ហេតុដូច្នេះ យោបល់របស់លោកលោកស្រីក្នុងនាមជាតំណាងរបស់អ.ស.ប. គឺជាទង្វើខុសពីធម្មនុញ្ញអ.ស.ប."។ សេចក្តីថ្លែងការណ៍នេះមានខ្លឹមសារបន្ថែមថា "នៅថ្ងៃអនាគតតំណាងអង្គការសហប្រជាជាតិគួរតែផ្ញើមតិយោបល់របស់ខ្លួនទៅកាន់ស្ថាប័នរដ្ឋាភិបាលណាមួយដែលសាកសមជាជាងផ្សព្វផ្សាយការរិះគន់ និងមតិយោបល់របស់ខ្លួននៅក្នុងប្រព័ន្ធផ្សព្វផ្សាយ" ។

នៅពេលស្នើសុំការធ្វើអត្ថាធិប្បាយការិយាល័យឧត្តមស្នងការអង្គការសហប្រជាជាតិទទួលបន្ទុកសិទ្ធិមនុស្សប្រចាំប្រទេសកម្ពុជាបានបង្វែរសំណួររបស់អ្នកយកព័តិមានទៅកាន់ការបង្ហោះមួយនៅលើទំព័រហ្វេសប៊ុករបស់ខ្លួនដែលចាត់ទុកការពិភាក្សានេះថា "ស្មោះត្រង់ និងរាក់ទាក់" ។

ការបង្ហោះនេះមានខ្លឹមសារដូច្នេះថា "ប្រធានភ្នាក់ងារឱ្យអង្គការសហប្រជាជាតិ" បានបញ្ជាក់ជាថ្មីថា ពួកគេកំពុងបំពេញការងារនៅក្នុងអាណត្តិរបស់ខ្លួន ហើយបានលើកឡើងម្តងទៀតអំពីការគាំទ្ររបស់ពួកគេចំពោះការពិភាក្សាជាមួយសង្គមស៊ីវិលស្តីពីច្បាប់ដ៏សំខាន់នេះ" ។

កាលពីថ្ងៃពុធក្រសួងការបរទេសក៏បានរិះគន់លោក វីល្លៀម ថូដ ឯកអគ្គរដ្ឋទូតសហរដ្ឋអាមេរិកចំពោះការលើកឡើងស្រដៀងគ្នានេះអំពីច្បាប់ស្តីពីអង្គការមិនមែនរដ្ឋាភិបាលនៅក្នុងអត្ថបទប្រចាំសប្តាហ៍ចុងក្រោយបំផុតរបស់ខ្លួនចេញផ្សាយនៅក្នុងគេហទំព័រព័តិមានក្នុងស្រុកផងដែរ ។ នៅក្នុងសេចក្តីថ្លែងការណ៍មួយក្រសួងការបរទេសបានចាត់ទុកពាក្យសម្តីរបស់ឯកអគ្គរដ្ឋទូតរូបនេះថា "ព្រហើនខ្លាំង" ។

នៅក្នុងសន្និសីទកាសែតកាលពីម្សិលមិញ លោក ហោ ណាំហុង បានការពារពីភាពចាំបាច់ដែលត្រូវមានច្បាប់នេះ ព្រោះវាមានសំខាន់ក្នុងការទប់ស្កាត់ហានិភ័យហិរញ្ញប្បទានភាវរកម្មដែលហូរចូលមកក្នុងប្រទេសតាមរយៈអង្គការមិនមែនរដ្ឋាភិបាលដែលគ្មានគោលការណ៍ច្បាស់លាស់ ។

លោកបានមានប្រសាសន៍ថា "សព្វថ្ងៃ យើងមិនដឹងថា នរណាកំពុងធ្វើអ្វី ឬទៅទីណាឡើយនៅក្នុងប្រទេស ។ ចុះប្រសិនបើថ្ងៃណាមួយមានអ្វីកើតឡើងក្រោមឈ្មោះសង្គមស៊ីវិល ហើយអង្គការមិនមែនរដ្ឋាភិបាលមួយចំនួនបង្កភាវរកម្ម ឬសកម្មភាពជ្រុលនិយម? តើនរណាជាអ្នកទទួលខុសត្រូវ? ហេតុដូច្នេះហើយយើងត្រូវតែសួរ" ។

អង្គការមិនមែនរដ្ឋាភិបាលបានលើកឡើងថា ប្រទេសកម្ពុជាមានច្បាប់ដែលតម្រូវឱ្យមានការចុះត្រួតពិនិត្យអង្គការដែលបានចុះបញ្ជី និងច្បាប់ប្រឆាំងហានិភ័យបែបនេះរួចហើយ ។

លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រីបានលើកឡើងថា ទីស្តីការគណៈរដ្ឋមន្ត្រីអាចនឹងបោះឆ្នោតស្តីអំពីសេចក្តីព្រាងច្បាប់នេះនៅថ្ងៃទី២៩ ខែឧសភា ដោយត្រួសត្រាយផ្លូវសម្រាប់រដ្ឋសភាជាទីដែលសមាជិកសភាមកពីគណបក្សប្រជាជនកម្ពុជាអាចប្រើសំឡេងភាគច្រើនរបស់ខ្លួនអនុម័តសេចក្តីព្រាងច្បាប់នេះ។ **ស៊ុយឈាង**

**(រាយការណ៍បន្ថែមដោយ Zsombor Peter)**

Continued from page 14
## UN Rebuked Over Letter on Draft...

critical voices.

In a letter published in a local newspaper last week, the heads of four of the U.N.'s agencies in the country-Unicef, UN Women, UN Population Fund and the UN's Office of the High Commissioner for Human Rights (UNOHCHR)-said the government was not doing enough to involve the public in the drafting process.

They asked the government that the most up-to-date version of the draft "be shared as soon as possible, that genuine consultations on it be conducted and the recommendations genuinely considered prior to its finalization."

The government last consulted with NGOs on the draft in late 2011 and has thus far ignored calls to meet with them again.

On Thursday morning, Foreign Affairs Minister Hor Namhong called the four authors, as well as U.N resident coordinator Claire Van der Vaeren, to a meeting at his office to express his displeasure with their letter in person.

"I told them that as representatives of U.N. organizations, they must respect Article 2 of the U.N. Charter," the minister told reporters following the closed-door meeting.

The Charter states that no article authorizes the U.N. to intervene in the domestic affairs of any state.

"So your comments in your capacity as U.N. agencies are going beyond the U.N. Charter," the ministry said in a statement, also released Thursday. In the future, the U.N. representatives should send their remarks to the appropriate government body, it added, "instead of publish your comment/criticism in the media."

Asked for comment, the UNOHCHR referred a reporter to a post on its Facebook page, which called the meeting "frank and cordial."

"The [U.N.] agency heads reaffirmed that they were acting within their mandates and reiterated their offer of support for dialogue with civil society on this important law," it said.

On Wednesday, the Foreign Affairs Ministry also rebuked U.S. Ambassador William Todd for making similar comments about the NGO law in his latest weekly column, published on a local news website. In a statement, it called the ambassador's remarks "extremely insolent."

At Thursday's press conference, Mr. Namhong defended the need for the law as a vital bulwark against the risks of terrorist financing seeping into the country through unscrupulous NGOs.

"Nowadays, we don't know who does what or where they go around Cambodia," he said. "What if some day something happens under the name of civil society, and some NGOs commit terrorism or extremist acts? Who will be responsible? That is why we have to ask."

NGOs say the country already has the laws it needs to have registered organizations audited and counter such risks.

Council of Ministers spokesman Phay Siphan said the Council could vote on the draft law on May 29, clearing its path to the National Assembly, where CPP lawmakers could use their majority to pass it into law.

(Additional reporting by Zsombor Peter)

Continued from page 14
## National Police Mark 70th Anniversary...

Videos of police, military police and military repressing protests during the six months that followed the election-including the repression of a protest on Veng Sreng Street in January 2014 that left at least five garment workers dead-played on a large screen behind the stage at the headquarters as copies of the National Police newspaper were handed out.

Set to be published Monday to Friday, the publication's first editorial page lauds the creation of the police newspaper-published only online for the past year-as a shining achievement for the force.

"This news will inform about the good that has been done for the motherland and the people, especially reflecting in a timely manner on the leaders of the governmen and Interior Ministry activists in main taining security, social safety, as well a the National Police's work," the editoria reads.

It adds that the newspaper, as a publi cation made by the police, will eliminat the problems associated with having jour nalists report on police activities an allow police to speak directly to the people

"The National Police newspaper wil act to prevent the poisoning of the securit atmosphere by some people who take th opportunity to speak or disseminat untruths to provide fake news…to caus social turmoil," it says.

Continued from page 01

# Cambodian Opposition Party's...

with his words. He has refrained from attacking the Cambodian People's Party and Mr. Hun Sen. It was never his personality. Thanks to its change of political tactics the opposition party is now under severe criticism. It is accused of being bought by the ruling party. Its members are allegedly afraid of losing their immunity. The culture of dialogue is arguably softened the opposition position which makes it impossible to defeat the dictators of the CPP. Its members are silenced to please Hun Sen. This list goes on and on. Nonetheless Mr. Sam Rainsy wouldn't stop what he felt was right to do. Sure enough in Lowell, during his current visit, he was welcomed wholeheartedly by supporters from his party and that of the CPP's. What is happening? Are political supporters in Lowell and other areas very confused now? Let's find out about this new politics.

The CNRP is not very healthy politically. It is sick of criticisms which overwhelm the entire party system. This problem emanates from the fact that some people start to lose their faith in the leadership and their disapproval of their leaders' new political maneuver. If the CNRP allows this to continue to happen, it will most likely lose the 2017-2018 election to the CPP. Mr. SaimRainsy makes it clear to his supporters in Lowell regarding his strong belief and optimism in the culture of dialogue. CNRP's Lowell Charter organized an election to elect its new president of CNRP MA just two weeks before Mr. Sam Rainsy's visit to Lowell. The election result is nothing short of controversy. However before leaving Lowell, Mr. Sam Rainsy made a very significant decision when he appointed Mr. Chhan Touch as the president of the CNRP here even though we didn't win the votes in the current election on May 10, 2015. This decision is like pouring water onto the burning iron of Lowell.

Two things were happening simultaneously. First Mr. Chhan Touch was appointed as the Party President of the CNRP MA by Mr. Sam Rainsy. Second about 50 CPP's members joined the CNRP's organized event to welcome Mr. Sam Rainsy. These two events have never happened here before. People have been taken by surprise.

However people shouldn't be too surprised in the context of the culture of dialogue.

Is it beneficial for the CNRP future political prospect to have CPP's supporters in its event? Some observers in Cambodia are also taken by surprise to learn about the news of CPP's supporters joining the CNRP's event en mass. They are surprised because the CPP is still in power. It has never wanted to give up its power to anyone else. The CPP is very infamous for its use its deadly forces to suppress the opposition. This is therefore not the first time the CPP has employed its tactics with the CNRP. The CPP's tactics make the CNRP more vulnerable to criticisms. Does the CNRP gain anything from this? Yes, it does partially. We see harmony, peace and CNRP's slight increase in its power to serve the country. There's no more protest against the current election result in Cambodia. The CPP is hoping to put an end to any protest against a future lection result.

In Massachusetts Mr. Sam Rainsycould have noted some of his followers overstepping the red line. He could feel the sense of danger if he didn't take any immediate action. Through his party's history, he could navigate the party from the dirty tactics employed by the CPP to break it apart. He could maintain his party's strength through his reenforcement of the grassroots supporters. At the same time he is good at strengthening the internal discipline. The term "discipline" here is used equally as in the military. The party's followers are like soldiers. The leaders are like commanders in chief. This is the "war time" indeed. The election rules and regulations established by the election committee under Mr. RithyUng were declared null. The new president is appointed by the top leader. This act suggests that in this new political context "the proper implementation of the discipline" is a must. Those who dislike the party's vision will no longer be treated as the sympathizers. The others will have to make a lot of great efforts to appreciate the new political concept to claim their loyal members of the CNRP.

The culture of dialogue doesn't refrain the opposition members of parliament from criticizing Hun Sen's government. It is sad that Hun Sen never feels embarrassed to always think that the culture of dialogue means to silence the opposition. With the culture of dialogue in place people still continue to give constructive criticisms substantiated with proof, reasoning and comparative aspects for improvement. Hun Sen's understanding of the culture of dialogue is rather opaque and bizarre. He treats anyone who criticizes him and his government as those who deserve reprisal or punishment.

Nonetheless the CNRP is doing its humble best to show that it is genuine and sincere in every move. It is showing that it encourages transparency in the administration. The CNRP is helping the vulnerable people. It protects Cambodian's sovereignty. It works its best to fulfill its missing to serve the people of Cambodia. By that it hopes Cambodians will continue to have good faith in the CNRP who believes in the common interests of the people. It hopes that its supporters will increase in number and that its wise leadership will eventually bring the party to the victory over the very cunning CPP.

Cambodians need new leaders! The CNRP's members are bestowed with the very valuable roles and responsibilities to educate other to appreciate the transfer of power and improve the number of faithful supporters. Let not be carried away by some dissenting opinions. Even though there are dissenting opinions ones shall not be refrained from wanting to change. Patriotism requires sacrifices.

## តមកពីទំព័រទី ១៣ ខ្មែរដំបូងបង្អស់ដែលបានកសាងផ្សារប៉ៃលិន...

ឱ្យអាណាខ្លះស៊ី... ខ្ញុំថាភ័យ អើយភ័យ! នឹកថានាងនោះនឹងឆ្លើយដាក់គេនឹងយកទៅសម្លាប់ហើយ គេអូសនាងនោះ យកទៅហើយក៏នៅ



តែភ័យយកទាំងបងទាំងប្អូន ចៅហានចៅហែនោះ

តែនាងនោះឥតឆ្លើយរហូត ខ្ញុំដឹងថាគេយកនាងនោះ វាយចោលហើយៗនាងនៅលាក់ការសម្ងាត់ឱ្យខ្ញុំជានិច្ច បើនាងហ៊ានតែឆ្លើយថា មានខ្ញុំមួយដែរនោះ ប្រាកដជាមិនរស់ទេ!!! ខ្ញុំនឹកដល់គុណនាងជានិច្ចរហូតដល់ថ្ងៃនេះ ឱ្យតែមានធ្វើបុណ្យខ្ញុំតែងឧទ្ទិសកុសលដល់គុណបុណ្យនាងជានិច្ច...

**ខ្មែរផុស** តើហេតុអ្វីបានជាគេដាក់ខ្នោះលោក?

**ប៊ុនរិទ្ធ ឡាច** អ្នកទៅពីភ្នំពេញសុទ្ធតែជាអ្នកទោសគេយកទៅដាក់ទីនោះទាំងអស់ថ្ងៃ




ផ្សារប៉ៃលិននៃក្រុងខ្មែរសព្វថ្ងៃ

គេបញ្ចេញឱ្យទៅធ្វើការ...មនុស្សប្រមាណ៥ពាន់នាក់ វាដាក់ខ្នោះនៅទីនោះ ផ្ទះឪពុកខ្ញុំក៏បានក្លាយជាកន្លែងដាក់អ្នកទោសទាំងនោះ

**ម៉ាលី ថៃ** ខ្ញុំគេដាក់ខ្នោះនៅក្នុងខ្ទមតូចមួយកូន៣នាក់ នៅជាប់នឹងខ្លួនចាស់ៗនៅជាមួយគ្នា... ខ្ញុំនៅតែជឿថាខ្ញុំនឹងមិនស្លាប់ទេ មេឃចង្អៀតយ៉ាងណាក៏គង់មានប្រឡោះសម្រាប់រួចជីវិតដែរ... ពេលថ្ងៃយកវាស៊ីទៅដាក់កងកុមារអាតូចៗយកទៅដាក់មណ្ឌល ហើយខ្លួនឯងចេញទៅធ្វើការ... ថ្ងៃមួយនោះ មកពីធ្វើការវិញ គេយកពុកម៉ែ កុង ទៅបាត់អស់ វាយកទៅសម្លាប់នៅព្រៃក្បែរៗ ឡើងធំក្លិនស្អុយ...ទាល់តែបាត់ធំក្លិនខ្មោច ទើបវាឱ្យយើងទៅធ្វើការក្បែរៗនោះវិញ...

**ខ្មែរផុស** ពេលណាបានសម្រេចចិត្តរត់ចេញទៅវៀតណាម? ដែលនៅក្បែរនោះសោះ!

**ប៊ុនរិទ្ធ ឡាច** ខ្ញុំគ្មានគំនិតរត់ចេញអីសោះ គឺដូចជាមានអីមកប្រាប់ ថាឯងកុំបាច់រត់ទៅណាអី ឯងនឹងមិនស្លាប់ទេ!

**ម៉ាលី ថៃ** ខ្ញុំប្រយ័ត្នប្រយែងមិនហ៊ាននិយាយរកបងប្អូនទេ! ដើមចេកក្បែរដៃក៏មិនហ៊ានបេះ! ពងមាន់ក៏មិនហ៊ានស្ងោឱ្យកូនស៊ីខ្លាចវាក្អួតចេញមក គេឃើញគេយកទៅវាយចោល! ខ្ញុំតែងតែនឹកទៅដល់មេឃមានប្រឡោះជានិច្ច... រហូតដល់វៀតណាមចូលមកបាននាំគ្នាចេញមកយកបានក្អួយអាហាងមាសនេះ(និយាយផងចង្អុលទៅហាងមាសមួយនៅខាងចុងប៉ៃលិនផង) បានកូនបងស្រី៥-៦នាក់ មកជាមួយ។

ខ្មែរផុសបង្រួមសេចក្តីមកជីវិតគ្រួសារលោកប្រកបដោយទុក្ខលំបាកនឹងការតស៊ូយ៉ាងស្វិតស្វាញណាស់!

**ប៊ុនរិទ្ធ ឡាច** ជីវិតវាអ៊ីចឹង វាចុះហើយវាឡើង វាឡើងហើយក៏ចុះទៅវិញ ច្រើនដង យើងមកដល់ផ្តើមជីវិតរបស់យើងដោយផ្តើមទិញហាងមួយហ្នឹងមុនគេ កាលណោះឆ្នាំ១៩៨៦ កសាងពីព្រៃស្រោងក្បែរនេះមានចំណតឡាន "ស្តូលបើស"មួយ គឺតាំងពី"ក្រុងខ្មោច"មកជាក្រុងមួយគេហៅថា "ថៅន"ឥឡូវគេឱ្យឈ្មោះថា "ក្រុងខ្មែរ"ទៀតឃើញថា មានការផ្លាស់ប្តូរច្រើន...

**ខ្មែរផុស** ឥឡូវនេះលោកត្រឡប់មើលទៅក្រោយវិញ ដោយសារលោកជាអ្នកគិតផង អ្នកធ្វើផង តើលោកមានអារម្មណ៍គិតថា រីករាយ ឬក៏សោកស្តាយចំពោះសមិទ្ធិផលដែលមាននាថ្ងៃនេះ?

**ប៊ុនរិទ្ធ ឡាច** ស្តាយ! ដោយសារ អ្វីដែលធ្វើបានមកហើយ មិនបាននៅគង់វង់ឋិតថេរ ដូចជាអាគិតសមាគមខ្មែរ ដូចជាបុណ្យចូលឆ្នាំខ្មែរ ដូចជាបុណ្យអុំទូក ដូចជាមនុស្សចេះតែឈ្លោះគ្នាជាដើមតែសប្បាយចិត្តនឹងឃើញក្រុងខ្មែរបានរីកធំស្អាត មានមនុស្សមករកស៊ីច្រើន...

**ខ្មែរផុស** តើលោកមានឱវាទអ្វីសម្រាប់អ្នកជំនាន់ក្រោយទេ?

**ប៊ុនរិទ្ធ ឡាច** យើងឈ្លោះបែកបាក់គ្នាដោយសារតែនយោបាយកាលជំនាន់ខ្ញុំយើងចេះតែធ្វើបាន ពីព្រោះពេលនោះនយោបាយមិនទាន់មកដល់ទេ យើងធ្វើការជុំគ្នាបាន ឥឡូវដល់យើងប្រកាន់គណបក្សនេះ គណបក្សនោះ ក៏មើលមុខគ្នាមិនត្រង់...ដូច្នេះយើងទុកនយោបាយឱ្យនៅស្រុកយើងទៅបានហើយ!

**ខ្មែរផុស** សូមអរគុណលោក ឡាច ប៊ុនរិទ្ធ នឹងលោកស្រី ម៉ាលី ថៃ ដែលបានផ្តល់បទសម្ភាសន៍ដល់ខ្មែរផុស ៕

**ចប់ដោយបរិបូរណ៍**

## តមកពីទំព័រទី ១៤ នគរបាលជាតិចេញផ្សាយកាសែតរបស់...

ចុងក្រោយនេះ ជាពិសេសអំឡុងភាពវឹកវរនយោបាយជុំវិញការបោះឆ្នោតជាតិឆ្នាំ២០១៣ បានជួយកាត់បន្ថយអំពើហិង្សានិងហានិភ័យធ្ងន់ធ្ងរនៅក្នុងសង្គម ហើយបានរក្សាសណ្តាប់ធ្នាប់និងសន្តិសុខសាធារណៈ ដើម្បីធ្វើឱ្យសង្គមត្រឡប់មករកភាពប្រក្រតីឡើងវិញ"។

រូបភាពវីដេអូបង្ហាញពីនគរបាលកងរាជអាវុធហត្ថ និងយោធាបង្ក្រាបទៅលើការតវ៉ាអំឡុងរយៈពេល៦ខែបន្ទាប់ពីការបោះឆ្នោត រួមទាំងការបង្ក្រាបការតវ៉ានៅតាមផ្លូវវែងស្រែងកាលពីខែមករា ឆ្នាំ ២០១៤ ដែលបណ្តាលឱ្យកម្មករកាត់ដេរយ៉ាងតិចប្រាំនាក់ស្លាប់នោះ បានបញ្ចាំងនៅលើអេក្រង់ធំមួយនៅស្នងការដ្ឋាន ខណៈដែលច្បាប់ចម្លងនៃកាសែតនគរបាលជាតិត្រូវបានចែកចាយ។

ដោយគ្រោងចេញផ្សាយថ្ងៃច័ន្ទដល់ថ្ងៃសុក្រ ការបោះពុម្ពផ្សាយទំព័រវិចារណកថាដំបូងសរសើរពីការបង្កើតកាសែតនគរបាលដែលចេញផ្សាយតែតាមប្រព័ន្ធអ៊ីនធើណិតកាលពីឆ្នាំមុននោះថាជាសមិទ្ធផលដ៏ធំធេងរបស់នគរបាល។

បទវិចារណកថានោះមានខ្លឹមសារថា "កាសែតនេះនឹងចុះផ្សាយពីស្នាដៃដែលបានធ្វើសម្រាប់ប្រទេសជាតិ និងប្រជាជនជាពិសេសឆ្លុះបញ្ចាំងពីលក្ខណៈរបស់ថ្នាក់ដឹកនាំរដ្ឋាភិបាល និងមន្ត្រីក្រសួងមហាផ្ទៃក្នុងការរក្សាសន្តិសុខសុវត្ថិភាពសង្គម ព្រមទាំងស្នាដៃរបស់នគរបាលជាតិផងដែរ"។

បទវិចារណកថាដដែលនេះបន្ថែមថា នៅពេលចេញផ្សាយដោយនគរបាលកាសែតនេះនឹងលុបបំបាត់បញ្ហាទាក់ទងនឹងការធ្វើសេចក្តីរាយការណ៍របស់អ្នកកាសែតអំពីសកម្មភាពរបស់នគរបាល និងអនុញ្ញាតឱ្យនគរបាលនិយាយដោយផ្ទាល់ទៅកាន់ប្រជាជន។

បទវិចារណកថានេះលើកឡើងទៀតថា "កាសែតនគរបាលជាតិនឹងទប់ស្កាត់ការបំពុលបរិយាកាសសន្តិសុខពីសំណាក់មនុស្សមួយចំនួនដែលឆ្លៀតឱកាសនិយាយ ឬផ្សព្វផ្សាយព័ត៌មានមិនពិត ដើម្បីបង្កភាពចលាចលសង្គមជាដើម"៕

**សារុន**

## តមកពីទំព័រទី ១៦ និយាយលើកឡើងអំពីសហរដ្ឋអាមេរិក...

ធំមួយនៅអាមេរិក និងប្រុសជំរុញខ្លាំងណាស់។ ប៉ុន្តែអ្នកមិនបានឮពីសហគមន៍អាស៊ីនិងអាមេរិក នៅសហរដ្ឋអាមេរិក, សហគមន៍នៅកម្ពុជា ជាពិសេសការដែលមិន-invisibilized ក្នុង we're សមរភូមិប្រយុទ្ធនោះទេ។

នៅក្រោមច្បាប់របស់សហរដ្ឋអាមេរិកពលរដ្ឋមិនមែនអាមេរិកផ្តន្ទាទោសណាមួយនៃបទល្មើសនិរទេសដែលហាក់ដូចជាក្នុងរយៈពេលដ៏ទូលំទូលាយដែលរួមមានការផ្តន្ទាទោសនៅក្រោមការរបស់រដ្ឋឬសហព័ន្ធច្បាប់អាចត្រូវបាននិរទេសសូម្បីតែបន្ទាប់ពីបម្រើការកាត់ទោសរបស់ពួកគេ។

នៅឆ្នាំ ២០០២ ទីក្រុងវ៉ាស៊ីនតោន និងទីក្រុងភ្នំពេញបានចុះហត្ថលេខាលើសន្ធិសញ្ញាមួយដែលអនុញ្ញាតឱ្យធ្វើមាតុភូមិនិវត្តន៍អាមេរិកបាននិរទេសជនជាតិអាមេរិកមានដើមកំណើតនៅប្រទេសកម្ពុជាត្រឡប់មកកម្ពុជាវិញដែលជាប្រទេសជាច្រើនដែលមិនធ្លាប់បានឃើញមួយ។

រវាងឆ្នាំ ២០០២ និងចុងឆ្នាំ ២០១៤ នេះ ប្រជាជនកម្ពុជាសរុបចំនួន៤៦៧ នាក់ត្រូវបាននិរទេសមួយពីអាមេរិកដល់ប្រទេសកម្ពុជា៩៧ ភាគរយនៃពួកគេជាប្រុសបើយោងតាមមជ្ឈមណ្ឌលគាំទ្រសមាហរណកម្មនៃអ្នកវិលត្រឡប់ (RISC) ដែលជាអង្គការមិនរកកម្រៃមានមូលដ្ឋាននៅរាជធានីភ្នំពេញដែលអាចជួយផ្លាស់ប្តូរការនិរទេសដើម្បីជីវិតនៅប្រទេសកម្ពុជា។

ក្នុងនោះ ២៧៩ នាក់ត្រូវបាននិរទេសនៅក្រោមរដ្ឋបាលលោកប្រធានាធិបតីអាមេរិកបារ៉ាក់អូបាម៉ាដោយមាន៧៧ និរទេសកាលពីឆ្នាំមុននេះបើតាមការឱ្យ RISC ។

លោកស្រីព្រឿងបាននិយាយថា វាមានប្រភេទនៃការញែកចេញពីប្រព័ន្ធរបស់ក្រុមគ្រួសារដែលគ្មាននរណាម្នាក់ពិតជាបានដាក់ស្លាកថាជាការរំលោភសិទ្ធិមនុស្សនេះ។

លោកស្រីព្រឿងនិងអ្នកស្រី Kiernan បានចាត់ទុកការកើនឡើងនៅក្នុងការនិរទេសចំពោះកិច្ចខិតខំប្រឹងប្រែងដ៏ចម្រូងចម្រាសរបស់លោកអូបាម៉ាក្នុងការអនុម័តកំណែទម្រង់ដែលផ្តល់ប្រយោជន៍ដល់សហគមន៍ជនអន្តោប្រវេសន៍ផ្សេងទៀត។

លោកស្រី គិរេនាន បាននិយាយថា "ខ្ញុំគិតថា វាអាចត្រូវបានយល់ច្រឡំនៅពេលដែលអ្នកសម្លឹងមើលទៅលើគោលនយោបាយអន្តោប្រវេសន៍របស់លោកអូបាម៉ាដោយសារពួកគេបានប៉ះពាល់ដល់សហគមន៍នៅក្នុងវិធីផ្សេងគ្នា"។

ក្រោមមនុស្សកាន់តែច្រើនជាមួយការលោកអូបាម៉ាកន្លងមកផ្តន្ទាទោស.ត្រូវបានគេនិរទេសខ្លួនជាងពេលមុន។ នេះគឺដោយសារតែប្រសិនបើការគ្រប់គ្រងរដ្ឋបាលរបស់លោកត្រូវបានចូលទៅអនុវត្តឱ្យសកម្មភាពប្រតិបត្តិរបស់គាត់ បន្ទាប់មកពួកគេបានចុះមកយ៉ាងលំបាកនៅលើមនុស្សផ្សេងទៀត នាងបានបន្ថែម។

នៅពេលដែលលោកអូបាម៉ាបានប្រកាសពីសកម្មភាពដែលជានាយកប្រតិបត្តិរបស់គាត់នៅលើការនិរទេសដ៏ល្បីល្បាញចុងក្រោយនេះលោកបាននិយាយថា យើងនឹងនិរទេស felons មិនមែនជាក្រុមគ្រួសារ។ សមាជិកក្រុមអន្ធពាលមិនមែនជាម្តាយ។

គោលនយោបាយនេះប៉ះពាល់ដល់សហគមន៍កម្ពុជាដោយគ្មានសមមាត្រ-American អ្នកតស៊ូមតិនិយាយថា។

Jacqueline ដាន់មេធាវីអន្តោប្រវេសន៍មួយនៅក្នុងតំបន់អាស៊ីជនជាតិអាមេរិកជំរុញយុត្តិធម៌បានថ្លែងនៅក្នុងអ៊ីមែលថា "នៅប្រទេសកម្ពុជាប្រឈមនឹងបញ្ហាប្រឈមដ៏សំខាន់ជនជាតិអាមេរិកចូលមកទៅកាន់សហរដ្ឋអាមេរិកនៅលើនោះជាជនភៀសខ្លួន។

លោកស្រីបាននិយាយថាភាពរន្ធត់នៃការដាន់សង្គ្រាមនិងអំពើហិង្សានេះនៅតែបន្តលងប្រជាជនខ្មែរនៅក្នុងសហរដ្ឋអាមេរិកដែលជាគូជាមួយអត្រាភាពក្រីក្រខ្ពស់នៅក្នុងសហគមន៍របស់ពួកគេជំរុញច្រើននៃពួកគេដើម្បីឱ្យជីវិតនៃឧក្រិដ្ឋកម្មមួយពីក្មេងមក។

មនុស្សមួយចំនួនត្រូវបានគេប្រមាថដល់ចំណុចមួយដែលពួកគេត្រូវបានវាយប្រហារនៅក្នុងសាលានិងខាងរាងកាយបានចូលរួមជាមួយក្រុមទំនើងឬដែលបានរៀបចំសម្រាប់ការការពារនេះ។ នាងបាននិយាយថាអ្នកផ្សេងទៀតបានងាកទៅរកការប្រើថ្នាំដើម្បីបង្ការសុបិនអាក្រក់កើតឡើងនៃមនុស្សជាទីស្រឡាញ់ដែលកំពុងត្រូវបានធ្វើទារុណកម្ម និងសម្លាប់។

នៅឯការពិនិត្យសិទ្ធិមនុស្សអង្គការសហប្រជាជាតិនៅថ្ងៃច័ន្ទ.ម៉េហ្គាស៊ីម៉ាកសហរដ្ឋអាមេរិកក្រសួងសន្តិសុខមាតុភូមិសម្រាប់មន្ត្រីសិទ្ធិស៊ីវិលនិងសេរីភាពស៊ីវិលបានឆ្លើយតបទៅនឹងការព្រួយបារម្ភអំពីការនិរទេសខ្លួនដោយនិយាយថា "ប្រជាពលរដ្ឋដែលមិនមែនជាអ្នកដែលមាន-មានវត្តមាននៅក្នុងសហរដ្ឋអាមេរិកនិងជាអ្នកកំពុងប្រឈមមុខនឹងការដកយកចេញផ្តល់ការការពារនីតិវិធីដ៏សំខាន់។

នាងបានបន្ថែមទៀតថា ចំពោះបុគ្គលណាដែលត្រូវបានចាប់ឃុំខ្លួននេះសហរដ្ឋអាមេរិកបានធានាថាពួកគេត្រូវបានចាត់ទុកជាមនុស្សនិងក្នុងលក្ខណៈស្របនឹងរដ្ឋធម្មនុញ្ញអាមេរិក, ច្បាប់សហព័ន្ធនិងគោលនយោបាយនិងជាកាតព្វកិច្ចអន្តរជាតិអនុវត្តបានទេ។

លោកស្រីដាន់,ទោះជាយ៉ាងបាននិយាយថា

តទៅទំព័រទី២៩

Continued from page 16

# Activists Decry US Deportation...

a Phnom Penh-based nonprofit that helps deportees transition to life in Cambodia.

Of those, 279 were deported under U.S. President Barack Obama's administration, with 77 deported last year alone, according to RISC.

"There's this kind of systemic separation of family that nobody has really labeled as a human rights violation," Ms. Proeung said.

Ms. Proeung and Ms. Kiernan attribute the rise in deportation to Mr. Obama's controversial efforts to enact reforms that benefit other immigrant communities.

"I think it can be confusing when you look at Obama's immigration policies, because they have impacted communities in different ways," Ms. Kiernan said.

"Under Obama, more people with past convictions have been deported than ever before. This is because if his administration was going to implement [his executive actions], then they had to come down hard on other people," she added.

"When Obama announced his executive action on deportation last fall, he said 'We are going to deport felons, not families. Gang members, not mothers.'"

This policy disproportionately affects Cambodian-American communities, advocates say.

"Cambodian Americans faced significant challenges upon coming to the U.S. as refugees," Jacqueline Dan, an immigration attorney at Asian Americans Advancing Justice, said in an email.

The trauma of war and violence continues to haunt Cambodians in the U.S., which, coupled with high poverty rates in their communities, drive many of them to a life of crime from a young age, Ms. Dan said.

"Some were bullied to the point where they were physically attacked in school and joined or organized gangs for protection. Others turned to drugs to stave off recurring nightmares of loved ones being tortured and killed," she said.

At the U.N. human rights review on Monday, Megan Mack, the U.S. Department of Homeland Security officer for civil rights and civil liberties, responded to concerns about deportation, saying: "Non-citizens who are present in the United States and are facing removal are afforded significant procedural protections."

"For individuals who are detained, the United States ensures they are treated humanely and in a manner consistent with the U.S. Constitution, federal laws and policies, and applicable international obligations," she added.

Ms. Dan, however, says the reality is more complex.

"A lawful permanent resident who was convicted of an aggravated felony after the 1996 laws took effect has very few defenses to removal," she said. "They are barred from receiving cancellation of removal and can only stay if they can prove that they will be persecuted or tortured if removed from the U.S. This form of humanitarian re-lief is extremely difficult to win."

While in Geneva, the SEAFN activists used the opportunity to raise the issue with country delegates, particularly nations who have similar repatriation agreements with the U.S.

"Instead of targeting the U.S. immigration laws, we're targeting the agreement between the two countries," Ms. Kiernan said.

Their aim is twofold: an immediate suspension of deportations and, for those who have been deported, the right to return to the U.S. by choice.

By highlighting the repatriation treaty, Ms. Kiernan said she hopes to shift the conversation from viewing immigration from a policy level to focusing on the human stories of individuals and families affected by government decisions.

"Being able to target the repatriation agreement allows us to talk about the specific experience of the Cambodian people," Ms. Kiernan said. "Those specific things should be what guides policies."

## តមកពីទំព័រទី ០៩ សង្ខេបសារព័ត៌មាននយោបាយខ្មែរ...

-ថ្ងៃ២៩មេសា គ.ជ.ប. ជួបជាមួយគណប្រតិភូជប៉ុននិងសហភាពអឺរ៉ុបដើម្បីពិភាក្សាអំពីអាទិភាពនៃជំនួយដែលផ្តល់ឱ្យកម្ពុជា មានជំនួយហិរញ្ញវត្ថុនិងកែរទម្រង់បញ្ជីបោះឆ្នោត ។ ពីពេលនេះទៅ គ.ជ.ប. នឹងប្រជុំ៣ដង ក្នុង១អាទិត្យ (CD 4/29 /15)

-ថ្ងៃ១៤មេសាលោកនាយករដ្ឋមន្ត្រី ហ៊ុន សែន នឹង លោក សម រង្ស៊ី ដើរទន្ទឹមគ្នាក្នុងពិធីបុណ្យមួយលោកបាននិយាយសរសើរខ្លួនឯងថា"លោកទើបនឹងរកបានដៃគូរដ៏ប្រសើរម្នាក់បាន"

សម រង្ស៊ី ចេញដំណើរទៅ ស.រ.អា. ដើម្បីប្រមូលធនធានផ្តើមដំឡើងទូរទស្សន៍ឯករាជ្យមួយ ដោយលក់ភាគហ៊ុន៣០០០ហ៊ុន ក្នុងតម្លៃ១០០០ដុល្លារក្នុងមួយហ៊ុន។ គឺមិនមែនជាទូរទស្សន៍គណបក្សសង្គ្រោះជាតិទេ តែជាមិត្តជិតស្និតនឹងបក្ស។ លី យ៉ុងផាត ព្រឹទ្ធសមាជិកគណបក្សប្រជាជន ក៏ប្រកាសបង្កើតខ្សែរទូទស្សន៍មួយដែរឈ្មោះថា ទូ "PNN" ដែលថានឹងរើសយកបុគ្គលិកពីគ្រប់មជ្ឈដ្ឋាន (CD 4/20/15)

-២០មេសា កឹម សុខា អនុប្រធានគណបក្សសង្គ្រោះជាតិប្រកាសពង្រឹងជំហ៊ រសមាជិកថា "គោលបំណងរបស់យើងគឺឡើងកាន់អំណាចនឹងប្តូរទិសដៅរបស់ប្រទេស"នៅក្នុងសុន្ទរកថា របស់ខ្លួន (CD 4/21/15)។ ថ្នាក់ដឹកនាំគណបក្សសង្គ្រោះជាតិទាំង២ ហាក់ដូចជាអនុវត្តន៍នូវទិសដៅនយោបាយមិនដូចគ្នានៅលើវប្បធមិសន្ទនា។ អ្នកទាំង២ធ្វើដំណើរទៅតាមខេត្តខំបង្ហាញពីសាមគ្គីភាពក្នុងបក្ស។ បើតាមសម្តី សម រង្ស៊ី លោក ហ៊ុន សែន នឹងធ្វើអ្វីគ្រប់យ៉ាង ដើម្បីបំបែកគណបក្សសង្គ្រោះជាតិតាមយុទ្ធវិធីចាស់ ដូចជាបំបែកហ៊្វុនស៊ិនប៉ិចបំបែក BLDP បំបែកគណបក្សជាតិខ្មែរ... (CD 4/24/15) ។

-ថ្ងៃ២៣មេសា កែវ រ៉េមី អ្នកនាំពាក្យ




រដ្ឋាភិបាលបានចោទ កឹម សុខា ថាជាជនកុម្មុយនីស្ត -កឹម សុខា ចោទប្រកាន់ ហ៊ុន សែន ថាជាជនកុម្មុយនីស្ត (CD 4/24/15) ។ លោកនាយករដ្ឋមន្ត្រី ហ៊ុន សែន បានប្រកាសថានឹងធ្វើសង្គ្រាម ។ សម រង្ស៊ី បានឃាត់ កឹម សុខា ឱ្យប្តូរតរិយាបទថា សង្គ្រាមធ្វើឱ្យមានការបង្ហូរឈាមតាមផ្លូវនឹងធ្វើឱ្យស្លាប់មនុស្ស (CD 4/30/15)

-ថ្ងៃ២៥មេសា ហ៊ុន សែន នឹង សម រង្ស៊ី នៅគួឡាលំពូ នាឱកាសប្រជុំមួយនៅម៉ាឡេស៊ីស្តីពីស្ត្រីបំរើក្នុងផ្ទះខ្មែរ។ ម្នាក់ទៅប្រជុំកំពូលអាស៊ានម្នាក់ទៀតទៅប្រជុំសន្និសីទប្រជាធិបតេយ្យ -ទាំងពីនាក់បានបង្ហាញតំរូចឡាស់លាស់ដល់ក្រៅប្រទេសពីវប្បធមិសន្ទនា "យើងមានទស្សនខុសគ្នាមិនមែនបានន័យថា យើងយកគ្នាជាសត្រូវទេ យើងមិនយកកាំភ្លើងមកដោះស្រាយទំនាស់ទេ..."នេះជាសម្តីរបស់ សម រង្ស៊ី (CD 4/26/15) ។

-ក្រសួងមហាផ្ទៃបានបញ្ជូនមន្ត្រីរបស់ខ្លួនទៅប្រជុំនៅគួឡាលំពូក្នុងកិច្ចប្រជុំស្តីពីសង្គមស៊ីវីលជំនួសឱ្យតំណាងដែលចេញពីសង្គមស៊ីវិលធ្វើឱ្យប្រទេសមួយចំនួននៃអង្គប្រជុំអាក់អន់ចិត្ត ៕ CD 4/24/15) ។

-ថ្ងៃ៦ឧសភា អគ្គលេខាធិកាគណបក្សប្រជាជនបានទទួលបញ្ជាពីនាយករដ្ឋមន្ត្រីឱ្យសមាជិកបក្សទាំងអស់ឱ្យកត់ត្រាពាក្យដែលគណបក្សប្រឆាំងប្រើសម្រាប់ប្រមាថគណបក្សប្រជាជន ដូចជា "អាយ៉ងយួន""ជនក្បត់ជាតិ" "កុម្មុយនីស្តផ្តាច់ការ""ក្បាលយួនខ្លួនខ្មែរ""អ្នកលក់ជាតិ""មេចោ"។ លោកថា "មេនិយាយបានល្អណាស់តែអនុប្រធាននឹងអ្នកគាំទ្រថ្នាក់ក្រោមមិនគោរពវប្បធមិសន្ទនាទេ"។សម រង្ស៊ី បានឈប់ប្រើពាក្យ"យួន"ដែលមកពី"ង្វៀង"ជាកន្សែវៀតណាមក្រុងវើខ្មែរមានទម្លាប់ហៅសំដៅទៅជនជាតិ"យួន"តែអ្នកកាសែតចាត់ទុកថា ពាក្យមិនសមរម។

-ថ្ងៃ៨ឧសភា ចុងបញ្ចប់ក្រមសីលធមិនៃវប្បធមិសន្ទនា បានត្រូវចុះហត្ថលេខាឱ្យឈប់និយាយពាក្យទាំងអម្បាមាណនោះ នឹងបន្ថែមពាក្យ "បំភ័យនឹងគម្រោម""គម្រោមចាប់ខ្លួន-ចាប់ដាក់គុក -ធ្វើសង្គ្រាម" ពី ហ៊ុន សែន ផងដែរ។ ថ្ងៃបន្ទាប់មកគេឃើញការតាមអង្កេតលើសន្ទរកថាបក្សប្រឆាំងបានត្រូវរាយកាណ៍ (CD 5/10/15) ។

-នៅពេលដែល កឹម សុខា ថ្លែងថា លោក ហ៊ុន សែន ធ្វើអ្វីៗគ្រប់យ៉ាងដើម្បីបំបែកគណបក្សប្រឆាំងជាពាក្យពិតមិនថាអ្នកមិនយល់ពីនយោបាយក៏មើលឃើញដែរ បានធ្វើឱ្យ កឹម សុខា ទទួលការគម្រោមនឹងដកពីមុខដំណែងអនុប្រធានសភាជាតិ (CD 5/20/15)

-ហ៊ុន សែន ទាមទារថាជាអ្នកបានបង្កើតវប្បធមិសន្ទនានេះ ដែលបានត្រូវប្រើយូរមកហើយតាំងពីអតីតកាលមកម្លេះ គឺ"នយោបាយឈ្នះឈ្នះ"ដែលបានធ្វើក្រុមខ្មែរក្រហមចុះចូល(CD 5/25/15) ៕





## តមកពីទំព័រទី ១៦ រដ្ឋមន្ត្រីគាំទ្រការចាត់វិធានការផ្លូវ...

លោក ផៃ ស៊ីផាន អ្នកនាំពាក្យទីស្តីការគណៈរដ្ឋមន្ត្រីបានផ្ញើលិខិតទៅលោក ស ខេង រដ្ឋមន្ត្រីក្រសួងមហាផ្ទៃ និងលោក ប្រាក់ សុខុន រដ្ឋមន្ត្រីក្រសួងប្រៃសណីយ៍ និងទូរគមនាគមន៍ កាលពីថ្ងៃព្រហស្បតិ៍ ដោយស្នើឱ្យពួកគាត់អនុវត្តក្រមព្រហ្មទណ្ឌលើអ្នកដែលចែករំលែកសារបរិហារកេរ្តិ៍ ឬជេរប្រមាថតាមអ៊ីនធើណិត។

លោក ផៃ ស៊ីផាន បានស្នើឱ្យរដ្ឋមន្ត្រីទាំងពីរចាត់វិធានការផ្លូវច្បាប់លើអ្នកដែលគ្មានបំណងល្អ និងគ្មានក្រមសីលធម៌ពីបទប្រើប្រាស់បណ្តាញទំនាក់ទំនងសង្គមទៅវាយប្រហារជេរប្រមាថ និងបរិហារកេរ្តិ៍មន្ត្រីរាជការ និងមេដឹកនាំរដ្ឋាភិបាល។

លិខិតរបស់លោក ផៃ ស៊ីផាន មានខ្លឹមសារបន្តដូច្នេះថា "ការប្រមាថ និងការបរិហារបង្ខាច់កេរ្តិ៍ គឺមិនស្ថិតនៅក្នុងសេរីភាពក្នុងការបញ្ចេញមតិយោបល់ឡើយ ក៏ប៉ុន្តែវាជាការរំលោភសិទ្ធិ និងសេចក្តីថ្លៃថ្នូររបស់បុគ្គលដែលត្រូវទទួលបានការគោរព រួមទាំងច្បាប់ជាតិ និងអន្តរជាតិ"។

នៅក្នុងកិច្ចសម្ភាសកាលពីសប្តាហ៍មុន លោក ផៃ ស៊ីផាន បានលើកឡើងថា លោកមានការព្រួយបារម្ភជាពិសេសចំពោះការជេរប្រមាថដែលលើកឡើងថា មន្ត្រីមកពីគណបក្សប្រជាជនកម្ពុជា គឺជាវៀតណាម និងចំពោះរូបភាពរបស់មេដឹកនាំរដ្ឋាភិបាលដែលគេយកទៅកាត់តជារូបអាសអាភាស ឬក៏កាត់តក្នុងផ្លូវមិនល្អផ្សេងៗទៀត។

លោក ប្រាក់ សុខុន បានលើកឡើងកាលពីម្សិលមិញថា ក្រសួងរបស់លោកកំពុងតែពិនិត្យមើលសំណើរបស់លោក ផៃ ស៊ីផាន។

លោកបានមានប្រសាសន៍ថា "ក្រសួងប្រៃសណីយ៍ និងទូរគមនាគមន៍បានស្នើឱ្យអ្នកជំនាញសិក្សាពីនីតិវិធីបច្ចេកទេស និងផ្លូវច្បាប់"។

លោកបានបន្ថែមថា "ពាក់ព័ន្ធនឹងនីតិវិធីផ្លូវច្បាប់យើងកំពុងតែពិចារណាថាតើបុគ្គលដែលជាជនរងគ្រោះនៃការជេរប្រមាថ ឬការបរិហារកេរ្តិ៍គួរតែបញ្ជូនបណ្តឹងផ្ទាល់ខ្លួនទៅតុលាការ ហើយបន្ទាប់មកតុលាការចេញសេចក្តីបង្គាប់ឱ្យក្រសួងពាក់ព័ន្ធចាត់វិធានការឬយ៉ាងណា"។

លោក ប្រាក់ សុខុន បានលើកឡើងទៀតថា ក្រសួងរបស់លោកអាចចាត់វិធានការផ្លូវច្បាប់លើអ្នកប្រើប្រាស់បណ្តាញទំនាក់ទំនងសង្គម ប្រសិនបើខ្លួនទទួលបានសេចក្តីបង្គាប់ឬបទបញ្ជាពីរដ្ឋាភិបាល រដ្ឋសភា ឬពីតុលាការ ប៉ុន្តែថា វាអាចមានការលំបាកក្នុងការស្វែងរកព័ត៌មានពាក់ព័ន្ធនឹងបុគ្គលដែលមានគណនីរបស់ខ្លួនតាមអ៊ីនធើណិត។

លោកបានមានប្រសាសន៍បន្ថែមថា "វាមានការលំបាកណាស់។ សម្រាប់ហ្វេសប៊ុក និងបណ្តាញទំនាក់ទំនងសង្គម វាលំបាកណាស់ក្នុងការស្វែងរកអ្នកវាយប្រហារ។ ចំពោះហ្វេសប៊ុក យើងត្រូវតែស្នើរកឱ្យអត្តសញ្ញាណរបស់ម្ចាស់គណនីតាមរយៈសហរដ្ឋអាមេរិក។ យើងមិនអាចធានាបានឡើយថា ពួកគេនឹងជួយយើងនោះ"។

លោកស្រី មូរ សុខហួរ សមាជិកសភា និងជាប្រធានទទួលបន្ទុកកិច្ចការសាធារណៈរបស់គណបក្សសង្គ្រោះជាតិបានលើកឡើងថា ការគំរាមរបស់រដ្ឋាភិបាលក្នុងការនាំយកអ្នកប្រើប្រាស់បណ្តាញទំនាក់ទំនងសង្គមទៅកាន់តុលាការ គឺវាមិនមែនជាលទ្ធិប្រជាធិបតេយ្យឡើយ។

លោកស្រីបានមានប្រសាសន៍ថា "អ្វីដែលលោក ផៃ ស៊ីផាន និងរដ្ឋាភិបាលកំពុងធ្វើ គឺវាមិនត្រឹមត្រូវទេ។ ខ្ញុំគិតថា ក្នុងនាមជាមន្ត្រីរដ្ឋាភិបាល ពួកគេត្រូវតែត្រៀមខ្លួនទទួលយកការរិះគន់ ហើយការរិះគន់ខ្លះអាចធ្ងន់ធ្ងរខ្លាំង"។

លោកស្រីបានមានប្រសាសន៍ទាក់ទិននឹងសារ និងរូបភាពមិនសមរម្យដែលគេបង្ហោះនៅលើអ៊ីនធើណិតថា "នេះមិនមែនជាការបរិហារកេរ្តិ៍ទេ។ ខ្ញុំគិតថា វាមិនមែនជាការអុជអាលឱ្យផ្ទុះអំពើហិង្សាទេ អស់លោកគ្រាន់តែមើលហើយកុំគិតទុកក្នុងចិត្តទៅវារួចហើយ"។

តែទោះជាយ៉ាងណា លោក ផៃ ស៊ីផាន បានលើកឡើងម្តងទៀតកាលពីម្សិលមិញថា សំណើនេះធ្វើឡើងដោយផ្អែកលើច្បាប់ដែលមានស្រាប់។

លោកបានមានប្រសាសន៍ថា "ដូចអ្វីដែលខ្ញុំបានពន្យល់ជាច្រើនលើកច្រើនសារមកហើយថា លិខិតរបស់ខ្ញុំបានពន្យល់យ៉ាងច្បាស់អំពីឱ្យតុល្យភាព រវាងសេរីភាពក្នុងការបញ្ចេញមតិ និងសិទ្ធិមនុស្ស ដើម្បីការពារភាពថ្លៃថ្នូររបស់បុគ្គល"។

លោកបានបន្ថែមថា "ខ្ញុំគ្រាន់តែបានពន្យល់ថា ការរិះគន់ក្នុងន័យស្ថាបនាគឺវាគ្មានបញ្ហាអ្វីទេ។ ប្រសិនបើវាជារូបគំនូរជីវចលគ្មានបញ្ហាទេ។ ប៉ុន្តែប្រសិនបើមានគេកាត់តរូបស្រាតដាក់មុខរបស់លោកស្រី មូរ សុខហួរ តាមអ៊ីនធើណិតវិញនោះ តើលោកស្រីគិតយ៉ាងម៉ិចវិញដែរ?"។

លោកស្រី មូរ សុខហួរ បានលើកឡើងថា រឿងទាំងអស់ហ្នឹងវាមិនមែនថ្មីសម្រាប់លោកស្រីទេ។

លោកស្រីបានមានប្រសាសន៍ថា "វាធ្លាប់កើតឡើងលើរូបខ្ញុំពីមុនមករួចទៅហើយ វាមានរូបភាពអាក្រក់ៗជាងអ្វីដែលអស់លោកស្រមើស្រមៃមកលើរូបខ្ញុំទៅទៀត។ អ្វីដែលខ្ញុំត្រូវធ្វើ គឺគ្រាន់តែមើលហើយចោលទៅបានហើយ"៕

## តមកពីទំព័រទី ០២ គោលដៅលំហែរកាយថ្មីនៃឆ្នេរសមុទ្រ...

សម្បុរដោយអាមេរិកាំងស្បែកខ្មៅ...តែឥឡូវនេះ អាមេរិកាំងទាំងនោះ បានប្រែជាអម្បូរថ្មីអស់ទៅហើយ។ ភ្ញៀវជាច្រើនជាអាមេរិកាំងខ្មៅពិតតែមិនខ្វះលុយចាយមិនជិះឡានកញ្ចាស់ទេ អ្នកជិះម៉ូតូរាប់ពាន់នាក់នាសប្តាហ៍នេះ មានសុទ្ធតែពួកស្បែកខ្មៅម៉ូតូធំៗថ្មីច្រើង មិនសូវមានហាលថ្ងៃចង់ឱ្យបានស្បែកខ្មៅ ពីព្រោះតែមាននារីស្បែកខ្មៅជាច្រើនបានក្លាយជាតំរូស្រស់ស្អាតៗណាស់ទាំងប្រុសទាំងស្រី ដូចទេវតាអីចឹង... តែនៅ"មើលធីលប៊ីច"នេះ គេឃើញសុទ្ធតែនារីស្បែកខ្មៅនៅដេកសំដិលអាំងថ្ងៃរណោករនល ឱ្យរឹតតែខ្មៅខ្លាំងថែមទៀតទៅវិញ ទំនងជាធ្វើឱ្យ



ពួកស្បែកសទេ ចរឹកឬកពារថ្លៃថ្នូរចេះគោរពច្បាប់ គោរពអ្នកឯទៀត មានមាឌធំៗដូចយក្ខ ហើយក៏សម្បុរមនុស្សធាត់ៗណាស់ដែរ ជិះម៉ូតូធំ ឬឡានប្លែកៗ តែចាក់ភ្លេងចម្រៀងឮខ្លាំងៗមិនច្រឡំនឹងអ្នកឯទៀតឡើយ តែសប្តាហ៍នេះ ក៏មានក្រុមប៉ូលីសមកឃ្លាំមើលសន្តិសុខច្រើនណាស់ដែរ។ នៅហ្វ្លរីដា មាននារីនឹងបុរសជាច្រើន ដេកសំដិលរឹតតែស្អាតថែមទៀតក៏មិនដឹង ខ្ញុំស្មានថាតែអស់ខ្មៅត្រឹមហ្នឹងហើយ តែមិនដូច្នោះទេ នៅតែរឹតតែខ្មៅបន្តទៅទៀតបាននៅឡើយ អនិច្ចា! ម្លោះហើយទាំងយើងទាំងគេ ក៏អនិច្ចាទាំងអស់ដូចៗគ្នា ក្រោមមេឃតែមួយដូចគ្នានោះ ។

តទៅលេខក្រោយ

តមកពីទំព័រទី ០៥ ទិវារម្លឹកវិញ្ញាណក្ខន្ធ...

ធំនៃសហព័ន្ធអតីតយុទ្ធជនសង្គ្រាមស៊ីវិលបានប្រកាសថា ទិវាលម្អផ្នូរ គួរតែជាថ្ងៃសម្រាកបុណ្យជាតិ។ នៅចន្លោះឆ្នាំ ១៨៧១ និង ១៨៩០ តាមរដ្ឋនីមួយៗដែលជាផ្នែកមួយនៃសហព័ន្ធក្នុងសង្គ្រាមស៊ីវិលបានកំណត់យកទិវាលម្អផ្នូរនេះធ្វើជាថ្ងៃឈប់សម្រាកបុណ្យជាតិដោយមានពិធីដង្ហែក្បួនពិធីថ្លែងសុន្ទរកថា និងពិធីរម្លឹកវិញ្ញាណក្ខន្ធ និងពិធីតាមបែបសាសនា ដើម្បីដាក់ផ្កាភ្ញីលម្អផ្នូរ។ ក្រោយមកទិវានេះបានក្លាយជាទិវារម្លឹកវិញ្ញាណក្ខន្ធ។ ទិវារម្លឹកវិញ្ញាណក្ខន្ធនេះ ទើបតែក្លាយជាថ្ងៃឈប់សម្រាកបុណ្យជាតិនៅឆ្នាំ ១៩៦៧ ប៉ុណ្ណោះ។

ទិវារម្លឹកវិញ្ញាណក្ខន្ធត្រូវអ្នកក្រុងឡូវែលប្រារព្ធតាមវិធីច្រើនបែបផ្សេងៗគ្នា។ មួយសប្តាហ៍មុនថ្ងៃសម្រាកបុណ្យជាតិនេះ សិស្សសាលាបានធ្វើទស្សនកិច្ចទៅកាន់ទីលានបញ្ចុះសព។ ក្នុងដំណើរទស្សនកិច្ចនេះ អតីតយុទ្ធជនមួយក្រុមជួយក្មេងៗសិស្សសាលា ដើរដាក់កូនទង់ជាតិអាមេរិកនៅលើផ្នូរអ្នកដែលបានពលីជីវិតក្នុងពេលបម្រើយោធា។ នៅចុងសប្តាហ៍នៃទិវារម្លឹកវិញ្ញាណក្ខន្ធក្រុមអតីតយុទ្ធជន និងមន្ត្រីជាប់ឆ្នោត និងសាធារណៈជនទូទៅរៀបចំពិធីនៅកន្លែងបូជនីស្ថានកន្លែងបញ្ចុះសព និងនៅកន្លែងសម្រាប់ប្រារព្ធពិធីរម្លឹកវិញ្ញាណក្ខន្ធក្រុងឡូវែល។ មនុស្សច្រើនដទៃទៀត ប្រារព្ធទិវានេះ ដោយទៅលេងនៅទីដែលបញ្ចុះសពរបស់សាច់ញាតិ និងរម្លឹកការចងចាំពួកគាត់ មិនចំពោះថា អ្នកនោះធ្លាប់បានចូលបម្រើក្នុងជួរកងទ័ព ឬមិនបាននោះទេ។

ទិវារម្លឹកវិញ្ញាណក្ខន្ធ គឺជាថ្ងៃឈប់សម្រាកបុណ្យជាតិដ៏សំខាន់ និងដ៏អធិកអធមមួយនៅសហរដ្ឋអាមេរិក ។ ក្នុងមួយឆ្នាំម្តងទិវានេះផ្តល់ឱកាសឱ្យយើងបានរម្លឹកការចងចាំ និងគោរពអ្នកដែលបានពលីជីវិតក្នុងបុព្វហេតុការពារជាតិ។ ក្នុងប្រវត្តិសាស្ត្រយើងនាពេលកន្លងមកភាគច្រើននៃអ្នកដែលបានស្លាប់ក្នុងសមរភូមិ គឺសុទ្ធតែជាជនអន្តោប្រវេសន៍ ឬកូនចៅរបស់ជនអន្តោប្រវេសន៍។ ដូច្នេះអ្នកដែលរស់ក្នុងសហរដ្ឋអាមេរិកសព្វថ្ងៃនេះ គប្បីចងចាំអត្ថន័យនៃទិវារម្លឹកវិញ្ញាណក្ខន្ធនេះ៕

Continued from page 16

# Minister Backs Legal ...

Siphan's letter continues. "The individuals who are insulted, or whose dignity is attacked, should be respected and protected based on national and international laws."

In interviews last week, Mr. Siphan said he was particularly concerned by insults suggesting that CPP officials are Vietnamese, and by images of government leaders manipulated to be pornographic or in other ways offensive.

Mr. Sokhon, the posts and telecommunications minister, said Sunday that his ministry was reviewing Mr. Siphan's request.

"The Ministry of Posts and Telecommunications asked the experts to study legal and technical means," he said.

"Regarding legal means, we are considering whether the person who is the victim of insulting or defamation should send an individual complaint to the court, and then the court issues the order to relevant ministries to take action," he added. "That is reasonable."

Mr. Sokhon said the ministry could take legal action against social media users if it received an order from the government, the National Assembly or the country's judiciary, but said it could be difficult to get information linking individuals to their online accounts.

"It is very difficult. For Facebook and social media, it is difficult to find attackers. With Facebook, we have to request the [identity of the] owner through the U.S. We cannot guarantee that they would help," he said.

Mu Sochua, a lawmaker and head of public affairs for the opposition CNRP, said the government's threats to take social media users to court were undemocratic.

"What PhaySiphan and the government is doing is not right," she said. "I think as public figures, they have to be ready to accept criticism, and some criticisms may be very harsh."

"That is not defamation," she said of offensive comments and images posted online. "I think as long as it's not violent-it does not incite violence-you just have to skip it."

However, Mr. Siphan on Sunday reiterated that his request was grounded in the country's existing laws.

"Like I explain so many times…my letter explains clearly [the balance] between freedom of expression and the human right to protect personal dignity," he said.

"I only explain, criticism is encouraged, no problem at all. If it's cartoons, no problem at all," he added. "But what if someone cut out a nude photo with Mu Sochua's face online, what would she think of that?"

Ms. Sochua said the experience would not be new to her.

"It happened to me before, there have been worse pictures that you could not have imagined put on me," she said. "What I had to do is see it and move on."

meyn@cambodiadaily.com, chansy@cambodiadaily.com

**KhmerPost USA, LLC**
សារពត៌មានខ្មែរផុសសហរដ្ឋអាមេរិក
អាស័យដ្ឋាន 45 Merrimack St. Suite 218A. Lowell, MA 01852
លេខទូរស័ព្ទ Phone: 978 677-7163 | Fax: (978) 677-7092
អ៊ីម៉ែល info@khmerpost.us
អានកាសែតនៅគេហទំព័រ www.khmerpost.us
តាមដានយើងនៅទំព័រហ្វេសប៊ុក Like us at: www.facebook.com/KhmerPostUSA
ផ្សាយពាណិជ្ជកម្ម **Advertising**
អគ្គនាយកទីផ្សារ និងគ្រប់គ្រង សុបិន្ត ពិន Soben Pin, *Managing Partner*
លេខទូរស័ព្ទ 978 - 656 - 8141 (Mobile) 978 677-7163 (Office)
អ៊ីម៉ែលsobenpin@khmerpost.us
អ្នកនិពន្ធ **Editorials**
និពន្ធនាយក ពិន សំខុន Roger Samkhon Pin, *Publisher & Editor-in-Chief*
(978) 942 - 1641 | rogerpin@khmerpost.us

អ្នកនិពន្ធកិត្តិយស **Contributed Writers:**
Kim Phien, Richard Howe,Jr.

ច្នៃសោភ័ណភាពកាសែត **Design Artist**
Heng Chhunleng
នាយករដ្ឋបាល Office Manager **978-677-7163**
Thach Vanna ថាច់ វណ្ណា

KhmerPost USA, LLC is an independent newspaper that aims to facilitate mass communication among the Cambodian communities, their neighboring communities, and families. We aim to address local community, and national news; and give an insight into Cambodian & global news. We also strive to bridge the language and cultural gaps and reduce social isolation by publishing in Khmer & English. It published twice a month in Massachusetts serving Greater Lowell, Lynn, Revere, MA, Providence, RI, CT, NY, NJ, and Philadelphia, PA.

Mail subscription is available within the U.S. & Canada at 100.00 or 120 Euros in Europe per year.

The KhmerPost USA has full authorization from Bernard Krisher, the publisher of the Cambodia Daily to reproduce all the articles that are produced by the Cambodia Daily free of charge effective date: 6/19/2009

# ទូលព្រះបង្គំមិនហ៊ានរាយការណ៍ទេ ទាន ! (តពីភាគ២)

**ដោយៈ បញ្ញ សីលា**

ពេលទៅដល់មាត់ទ្វារសាលនៃទេពប្រជុំភ្លាម លោកទេពអគ្គលេខាក៏បែរក្រោយមករកយើងខ្ញុំៈ "អស់លោកត្រូវរង់ចាំសិនព្រះអង្គកំពុងជាប់រវល់សាវណាការណ៍គណៈប្រតិភូផ្សេងៗទើបមកដល់ពីផែនដីនៃស្រុកខ្មែរ សូមអញ្ជើញតាមផ្លូវនេះទៅកាន់ទេពមណ្ឌលរង់ចាំនៅទីនោះនឹងមានគេរៀបចំនឹងបង្ហាញបន្ទប់ស្នាក់នៅ..."។ ទើបតែសម្រាកលើគ្រែពូកមិនទាន់ទាំងប្រែខ្លួនបានម្តងផងស្រាប់តែមានសម្លេងគោះទ្វារ។ មិនទាន់ទាំងបានឆ្លើយថាម៉េចផងស្រាប់តែទ្វាររបើកខ្ទាកលេចទេពអប្សរដ៏ស្អាតអត់ទាស់មួយរូបចូលមកតែទឹកមុខហាក់ដូចឆ្នាស់បន្តិច។ ញញឹមស្ងួតមកកាន់យើងខ្ញុំៈ "នាងខ្ញុំមាននាមថាសមៈទេពធិតាមានភារៈកិច្ចមកសម្រួលការស្នាក់នៅនៃអតិថិជនផងព្រមទាំងមកទទួកយកតម្លៃសេវាប្រចាំទិវានៃការស្នាក់នៅផងចាំ!"។ ខ្ញុំទៅជាភ័ន្តផាំងស្រឡាំងកាំងដោយសង្ឃឹមថា មកទីនេះបានទទួលសេវា ហ្វ្រី"free" ទាំងហូបចុកនឹងស្នាក់នៅ។ ម៉ែអ្ហើយ! ធ្វើម៉េចទៅបើហោប៉ៅគ្មានជាប់មកដល់មួយ$1ផង។ បែរទៅរកលោកតាណូអែលឱ្យជួយដោះស្រាយ។ ដោយដឹងមុនជាស្រេចថា ព្រឹត្តិការណ៍នឹងកើតមានដូច្នេះ ទើបគាត់ធ្វើជាសម្រាន្តលក់ស្រមុកឃ្វូៗយ៉ាងគ្មានកង្វល់។ មើលទៅគាត់ចង់សាកល្បងមើលការដោះស្រាយរបស់ខ្ញុំ ព្រោះមើលទៅទឹកមុខសម្រាន្តលក់បែបញញឹមរបស់គាត់។ ខ្ញុំបែរទៅរកនាងកញ្ញាសមៈទេពធិតាធ្វើមុខអស់សង្ឃឹមឱ្យនាងអាណិតៈ"ខ្ញុំគ្មានដល់មួយដូឡាជាប់ហោប៉ៅផង កុំថាឡើយដល់ឱ្យបង់សេវាប្រចាំទិវា!"។

នាងញញឹមស្រស់ៈ"គ្មានដូឡាក៏មិនបញ្ហាអីដែរចាំ!ឋានព្រះឥន្ទជិតឈប់ទទួលលុយដូលារឬលុយដុងឬលុយបាត្រដែរហើយចាំ! គិតតាំងពីពេលនេះទៅទទួលតែពេជ្រ មាស ឬត្បូង មានតម្លៃលំដាប់ចក្រវាឡវិញហើយ លុយក្រដាស់ពិបាកទុកដាក់ខ្លាំងណាស់!"។ ខ្ញុំហាក់ដូចអស់អំណត់ពីខ្លួនរលីងៈ "អាណឹងបានឆាប់ដាច់ខ្យល់ស្លាប់ទៀត បើគ្មាន$1ផងមាន មាស ពេជ្រ ពីណាមក?"ទេពធិតានៅតែគ្មានខ្វល់ហើយខំពិនិត្យគ្រឿងប្រដាប់ដែលខ្ញុំនាំមកតាមខ្លួនហើយនិយាយដោយព្រងើយថាៈ "អារបស់អស់ណឹងក៏ជំនួស មាស ពេជ្រ បានដែរតើ! យករបស់អស់ទាំងនេះបង់ថ្លៃសេវាកម្មក៏បានដែរ!"។ យីអីក៏ចំឡែកម្លេះ! នារីទេពឥឡូវពិតជាផ្លាស់ប្តូរអស់ហើយៈលោភហាមចង់បានគ្រប់តែមុខសព្វបើម៉ាស៊ីនថតកុន,អាយផែត,អាយផត,ឡាប់ថប់...ក៏ចង់បានដែរ! របស់អាមនុស្សលោកអីសោះនោះណាំ... ឱពិតជាចំកួតមែនទំ!ឋានព្រះឥន្ទឥឡូវពិតជាប្រែប្រួលអស់ហើយ ថាឋានមនុស្សលោកចុះវាចង់អន្តរកប្បទើបវាមានពុករលួយស្មូកប៉ាន់ស៊ីចុកបុកទំពារមិនចេះឆ្អែតអំពើអមនុស្សធម៌នឹង អយុត្តិធម៌កើតពេញដីឥឡូវរាលដាលមកដល់ឋានព្រះឥន្ទហើយតើ! ទប់នៅស្ងៀមទៀតលែងបាន ខ្ញុំក៏និយាយដោយសំដីខ្លាំងៗៈ"ចង់បានរបស់សម្រាប់វិជ្ជាជីវៈខ្ញុំនឹងឬអី? ទេខ្ញុំមិនអាចជូនបានទេទេពអប្សរ! វាជាឧបករណ៍សម្រាប់មុខរបរខ្ញុំតើ! ជូនព្រះនាងពិតជាគ្មានផ្លូវទេ ខ្ញុំសុខចិត្តត្រឡប់ក្រោយបែរហើយ មិនបានជួបសក្កទេវរាជក៏ហីទៅព្រះអង្គចង់ជួបខ្ញុំមិនមែនខ្ញុំចង់ជួបព្រះអង្គឯណា! អញ្ចឹងខ្ញុំសុំបញ្ចប់ភារកិច្ចខ្ញុំតែត្រឹមណឹងចុះ! មិនអាចបង់សេវាកម្មនៃការស្នាក់នៅបានទេម្ចាស់ថ្លៃ!" ហាក់ដូចចាំស្តាប់ការតថ្លៃគ្នាពីក្រោយវាំងនន ពេលឮសំដីខ្លាំងៗមិនចុះសំរុងគ្នាទេពអគ្គលេខាក៏ប្រញាប់ចូលមកហើយតម្រង់មកសមៈទេពកញ្ញាបន្ទោសតិចៗៈ"នែ! ភ្នាឯងទេម៉េចទៅទារតម្លៃសេវាកម្មអញ្ចឹងចំជាផ្តាស់មែន!"ខ្ញុំហួសពីយល់ក្នុងចិត្តទៅហើយថាពួកនេះមានការមិនស្រួលហើយតើ។ **តទៅលេខក្រោយ**



តមកពីទំព័រទី ៣២

# កម្រងរូបថត...













ខ្មែរផុសស.រ.អា បានរៀបចំទទួលពិធីអបអរសាទរនឹង"ទិវាកេរដំណែលអាស៊ីប៉ាស៊ីហ្វិក" កាលពីថ្ងៃទី៨ មេសាឆ្នាំ ២០១៥ ដែលរដ្ឋាភិបាលអាមេរិកាំងប្រកាសបាន ទទួលស្គាល់ នឹងលើកដំកើង ។ ភ្ញៀវសំខាន់ៗ ស្ទើរតែទាំងអស់ក្នុងតំបន់បានទទួលការអញ្ជើញចូលរួម រួមទាំងភ្ញៀវខ្មែរ-អាមេរិកាំងពិសេសម្នាក់ លោកគីម ម៉េងជា ចៅក្រម តុលាការជាន់ខ្ពស់ដំបូងបង្អស់នៅ "ជចជា" ក៏បានមកជាកិត្តិយសជូនដល់ពិធីរំលឹកដល់ស្នាដៃនៃជនជាតិអាស៊ីប៉ាស៊ីហ្វិក ដែលបានចូលរួមក៏សាងសហរដ្ឋអាមេរិក ដូចដែលបានប្រកាសជាឧឡារិកដោយលោកប្រធានាធិបតីអាមេរិកាំងផង។ កាលពីលេខមុនយើងបាននិយាយថា"**យើងកត់សំគាល់អវត្តមានសមាគមខ្មែរ**"ក្នុងពិធីដ៏សំខាន់នោះ ដោយសារយើងពុំបានទទួលការឆ្លើយតបនឹងសេចក្តីអញ្ជើញរបស់យើងមកវិញ តែសប្តាហ៍កន្លងមកនេះ ប្រធានសមាគមខ្មែរ អ្នកស្រី បុប្ផ ម៉ាឡូន បានសរសេរមកប្រាប់យើងថា មានតំណាងរបស់សមាគម៤រូប បានមកចូលរួមក្នុងទិវានេះដែរ យើងសូមសម្តែងការអបអរនឹងកែរតម្រូវនេះ ឡើងវិញថា"យើងរីករាយនឹងវត្តមានសមាគមខ្មែរ" ហើយសូមអភ័យទោសចំពោះការឆ្គាំឆ្គង ដោយយើងមិនបានដឹងមុនថា ភ្ញៀវកិត្តិយសមកចូលរួមក្នុងនាមស្វាគមន៍ផងដែរទេ៕

ដោយ : សាគូ សាមុទ

ជំពូក៨ ភូមិវិទ្យានយោបាយប្រទេសខ្មែរ

# ភូមិវិទ្យានយោបាយប្រទេសខ្មែរ

ព្រះបាទនរោត្តមសីហនុ គ្រងរាជ្យថ្ងៃទី២៣ខែមេសា ១៩៤០ ក្នុងព្រះជន្ម១៩វស្សា

កងកម្លាំងជីវពល ក្នុងព្រះរាជបូជនីយកិច្ចទាមទារឯករាជ្យពីបារាំងអាណានិគម

ប្រតិបត្តិការសឹក"សាមគ្គី" នៅបន្ទាយកន្តីខេត្តបាត់ដំបងដើម្បីបណ្តេញពួកវៀតមិញពីខេត្តបាត់ដំបង

ថ្ងៃទី៦ឧសភា១៩៤៧ ព្រះមហាក្សត្រនរោត្តមសីហនុបានប្រកាសឲ្យប្រើរដ្ឋធម្មនុញ្ញដោយបានប្តូររបបរាជានិយមផ្តាច់ការមក**រាជានិយមអាស្រ័យរដ្ឋធម្មនុញ្ញ** ។ ក្នុងរជ្ជកាលអង្គនេះប្រទេសកម្ពុជាដែលនៅក្រោមអាណាព្យាបាលបារាំងតាំងពីឆ្នាំ១៨៦៣បានទទួលឯករាជ្យបរិបូរនៅថ្ងៃទី៩វិច្ឆិកា១៩៥៣ ។ ក្រោយពេលសង្គ្រាមលោកលើកទី២(១៩៣៩-១៩៤៥) **ចលនាខ្មែរឥស្សរៈ**(ចលនារំដោះជាតិខ្មែរ)បានកើតឡើងជាច្រើនក្រុម ក្រុមខ្លះដូចជា**ក្រុមសឺងង៉ុកមិញ**បានចងសម្ព័ន្ធភាពជាមួយ**វៀតមិញ**(ចលនារំដោះឯករាជ្យជាតិយួន) ដើម្បីធ្វើចំបាំងប្រឆាំងបារាំង ។ ពួកវៀតមិញបានទាំងតាំងទីនៅក្នុងស្រុកខ្មែរដូចជានៅក្នុងខេត្តបាត់ដំបងដែលជាហេតុនាំឲ្យហ្លួងនរោត្តមសីហនុដឹកនាំ**ប្រតិបត្តិការណ៍សាមគ្គី** វាយបណ្តេញពួកវៀតមិញនេះចេញពីស្រុកខ្មែរ ។ ក្រោយពីសន្និសីទក្រុងហ្សឺណែវឆ្នាំ១៩៥៤ អតីតឥណ្ឌូចិនបារាំងបានក្លាយជាចំណុចក្តៅនៃសង្គ្រាមត្រជាក់របស់ប្លុកពីរ គឺប្លុកលោកសេរីនិងប្លុកកុម្មុយនិស្តដែលប្លុកនិមួយៗខំរកមធ្យោបាយរៀងៗខ្លួនដើម្បីទាញយកកម្ពុជាដែលប្រកាន់នយោបាយអព្យាក្រឹតឲ្យចូលក្នុងប្លុកខ្លួន ។ ដើម្បីរក្សាលំនឹងនយោបាយនេះ ហ្លួងនរោត្តមសីហនុក៏បានដាក់រាជ្យនៅខែមីនា១៩៥៥ថ្វាយព្រះនរោត្តមសុរាម្រឹតជាព្រះបិតា ។ ដាក់រាជ្យរួចហើយ សម្តេចសីហនុបានបង្កើតគណបក្សនយោបាយ"**សង្គមរាស្ត្រនិយម**"សំរាប់គ្រប់គ្រង

48

ភូមិវិទ្យានយោបាយប្រទេសខ្មែរ

ព្រះរាជាណាចក្រកម្ពុជា ។ ថ្វីត្បិតតែមានការរីកចំរើនដោយអន្លើលើវិស័យនានាក្នុងរយៈពេល១៥ឆ្នាំ ទីបញ្ចប់ព្រះរាជាណាចក្រកម្ពុជាក៏បានធ្លាក់ចូលដៃ**ខ្មែរកុម្មុយនិស្ត**(ខ្មែរក្រហម+ក្រុមសឺងង៉ុកមិញ) នៅឆ្នាំ១៩៧៥ ។ ពួកវានេះត្រួតត្រាស្រុកខ្មែរ៣ឆ្នាំ៨ខែ២០ថ្ងៃ បានធ្វើឲ្យខ្មែរស្លាប់ជិត២លាននាក់ ។ វៀតណាមដែលទើបតែបញ្ចប់សង្គ្រាមស៊ីវិលផ្ទាំងរវាងខាងជើងនិងខាងត្បូងក៏បានវាយលុកមកកម្ពុជាវាយបំបាក់ខ្មែរក្រហមនៅឆ្នាំ១៩៧៩ ។ សង្គ្រាមបានអូសអន្លាយនៅកម្ពុជាទើបតែមកដល់**ថ្ងៃទី២៣ខែតុលា១៩៩១**ទើបមាន**កិច្ចព្រមព្រៀងសន្តិភាពក្រុងប៉ារីស**ដែលបង្កើតឲ្យមានការបោះឆ្នោតជាសកលពីថ្ងៃទី២៣-២៨ខែឧសភា១៩៩៣ ។ ការបោះឆ្នោតនេះបានប្រព្រឹត្តទៅបានដោយសារមានអន្តរាគមន៍របស់អង្គការសហប្រជាជាតិដែលអនុញ្ញាតឲ្យប្រទេសខ្មែរមាន**រដ្ឋធម្មនុញ្ញមួយថ្មីកើតនៅថ្ងៃទី២១ខែកញ្ញា១៩៩៣** ។

## រដ្ឋធម្មនុញ្ញឆ្នាំ១៩៩៣

### រដ្ឋធម្មនុញ្ញឆ្នាំ១៩៩៣ មាន១៤ជំពូក និង ១៣៩មាត្រា

**-មាត្រា១** ប្រទេសកម្ពុជាជាព្រះរាជាណាចក្រ ដែលព្រះមហាក្សត្រទ្រង់ប្រតិបត្តិតាមរដ្ឋធម្មនុញ្ញនិងតាមលទ្ធិប្រជាធិប្បតេយ្យសេរីពហុបក្ស ។

ព្រះរាជាណាចក្រកម្ពុជាជារដ្ឋឯករាជ្យ អធិប្បតេយ្យ សន្តិភាពអព្យាក្រឹតអចិន្ត្រៃយ៍មិនចូលបក្សសម្ព័ន្ធ ។

**-មាត្រា២** បូរណភាពទឹកដីព្រះរាជាណាចក្រកម្ពុជាមិនអាចរំលោភបានដាច់ខាតក្នុងព្រំដែនរបស់ខ្លួនដែលមានកំណត់ក្នុងផែនទីខ្នាត ១/១០០ ០០០ ធ្វើនៅចន្លោះឆ្នាំ១៩៣៣-១៩៥៣ ហើយដែលត្រូវបានទទួលស្គាល់ជាអន្តរជាតិនៅចន្លោះឆ្នាំ១៩៦៣-១៩៦៩ ។

**-មាត្រា៦** ភ្នំពេញជារាជធានីនៃព្រះរាជាណាចក្រកម្ពុជា ។

**-មាត្រា៧** ព្រះមហាក្សត្រកម្ពុជាទ្រង់គ្រងរាជ្យសម្បត្តិ ប៉ុន្តែទ្រង់មិនកាន់អំណាចឡើយ ។

49

ភូមិវិទ្យានយោបាយប្រទេសខ្មែរ

ព្រះមហាក្សត្រទ្រង់ជាព្រះប្រមុខរដ្ឋមួយជីវិត ។

ព្រះមហាក្សត្រមិនអាចនរណារំលោភបំពានបានឡើយ។

**-មាត្រា៣៥** ប្រជាពលរដ្ឋខ្មែរទាំងពីរភេទមានសិទ្ធិចូលរួមយ៉ាងសកម្មក្នុងជីវភាពនយោបាយ សេដ្ឋកិច្ច សង្គមកិច្ច និងវប្បធម៌របស់ប្រទេសជាតិ ។

សេចក្តីស្នើទាំងឡាយរបស់ប្រជាពលរដ្ឋត្រូវបានទទួលការពិនិត្យនិងដោះស្រាយយ៉ាងហ្មត់ចត់ពីអង្គការរដ្ឋ ។

**-មាត្រា៥១** ព្រះរាជាណាចក្រកម្ពុជាអនុវត្តរបបនយោបាយប្រជាធិប្បតេយ្យសេរីពហុបក្ស។

ប្រជាពលរដ្ឋខ្មែរជាម្ចាស់វាសនានៃប្រទេសជាតិរបស់ខ្លួន ។

អំណាចទាំងអស់ជារបស់ប្រជាពលរដ្ឋ ។ ប្រជាពលរដ្ឋប្រើអំណាចរបស់ខ្លួនតាមរយៈរដ្ឋសភា រាជរដ្ឋាភិបាល និងសាលាជំរះក្តី ។ អំណាចបែងចែកដាច់ពីគ្នារវាង អំណាចនិតិបញ្ញត្តិ អំណាចនិតិប្រតិបត្តិ និង អំណាចតុលាការ ។

**-មាត្រា៥៥** សន្ធិសញ្ញានិងកិច្ចព្រមព្រៀងទាំងឡាយណាដែលមិនស្របនិងឯករាជ្យ អធិបតេយ្យ បូរណភាពទឹកដី អព្យាក្រឹតភាព និងឯកភាពជាតិរបស់ព្រះរាជាណាចក្រកម្ពុជាត្រូវលុបចោល ។

**-មាត្រា៥៦** ព្រះរាជាណាចក្រកម្ពុជាអនុវត្តប្រព័ន្ធសេដ្ឋកិច្ចទីផ្សារ ។

ការរៀបចំនិងការប្រព្រឹត្តទៅនៃប្រព័ន្ធសេដ្ឋកិច្ចនេះនឹងមានកំណត់ក្នុងច្បាប់ ។

**-មាត្រា៦៥** រដ្ឋត្រូវការពារនិងលើកស្ទួយសិទ្ធិរបស់ប្រជាពលរដ្ឋក្នុងការទទួលអប់រំប្រកបដោយគុណភាពនៅគ្រប់កំរិតនិងត្រូវចាត់វិធានការគ្រប់បែបយ៉ាងជាជំហានៗដើម្បីឲ្យការអប់រំនេះបានទៅដល់ប្រជាពលរដ្ឋគ្រប់រូប ។ រដ្ឋយកចិត្តទុកដាក់លើវិស័យអប់រំកាយនិងកីឡាដែលជាសុខុមាលភាពរបស់ប្រជាពលរដ្ឋខ្មែរគ្រប់រូប។

**-មាត្រា១២៦** ទឹកដីព្រះរាជាណាចក្រកម្ពុជាចែកជាខេត្ត និងក្រុង ។

ខេត្តចែកជាស្រុក ស្រុកចែកជាឃុំ ។ ក្រុងចែកជាខ័ណ្ឌ ខ័ណ្ឌចែកជាសង្កាត់ ។

ភូមិវិទ្យានយោបាយប្រទេសខ្មែរ

## ការគ្រប់គ្រងរដ្ឋបាល

ព្រះរាជក្រឹត្យនៃព្រះមហាក្សត្រនរោត្តមសីហមុនីថ្ងៃទី២២ខែធ្នូឆ្នាំ២០០៨បានប្តូរនិងបានតំឡើងជាខេត្តដូចតទៅ៖ កែប ប៉ៃលិន ព្រះសីហនុ ។ មកដល់ចុងឆ្នាំ២០០៨ទឹកដីព្រះរាជាណាចក្រកម្ពុជាមាន២៣ខេត្ត និងរាជធានី១ គឺរាជធានីភ្នំពេញ ។

នៅទសវត្សរ៍៦០ព្រះរាជាណាចក្រនេះបានបង្កើតខេត្តពីរួចជាស្រេចគឺខេត្តព្រះវិហារនិងខេត្តឧត្តរមានជ័យ ។ ខេត្តបន្ទាយមានជ័យដែលទីប្រជុំជនខេត្តនៅសិរីសោភ័ណទើបតែបង្កើតនៅឆ្នាំ១៩៨៧ដោយកាត់យកទំហំផ្ទៃដីមួយផ្នែកពីខេត្តបាត់ដំបងនិងខេត្តសៀមរាប ។

គួររំលឹកផងដែរថាដើម្បីឲ្យងាយស្រួលគ្រប់គ្រងតាំងពីសម័យអាណាព្យាបាលបារាំង បឹងទន្លេសាបមានការរៀបចំរដ្ឋបាលជាខេត្តដែលមានទីប្រជុំជនខេត្តនៅក្រគរ ។ ខេត្តនេះមានទំហំផ្ទៃ ៣.០០០គម² ។

51

តនៅទំព័រទី៣១

## តមកពីទំព័រទី ០១ នយោបាយថ្មីនៃគណបក្សសង្គ្រោះជាតិ...

ការប្រុងប្រយ័ត្នមិនឱ្យប៉ះពាល់ដល់គណបក្សប្រជាជន នឹងលោក ហ៊ុន សែន តិចតួចមិនដូចកាលពីពេលមុនៗឡើយ ។ នេះជាបុព្វហេតុចំបងនៃការទិតៀនដល់គណបក្សថា កំពុងត្រូវគេទិញបាន ឬក៏ខ្លាចបាត់បង់បុព្វសិទ្ធិជាតំណាងរាស្ត្រ ឬវប្បធម៌សន្ទនាជាវិធីទន់ជ្រាយមិនអាចយកឈ្នះក្រុមផ្តាច់ការបានទេ ឬក៏ខ្ចប់មាត់ក្រុមគ្នាឯង ដើម្បីបំពេញចិត្ត ហ៊ុន សែន ។ល ។ ទោះជាយ៉ាងនេះក្តី ក៏លោក សម រង្ស៊ី មិនបញ្ឈប់ទង្វើដែលជាបុព្វហេតុនៃការទិតៀនទេ ! លើសពីនេះទៅទៀត លោក សម រង្ស៊ី នឹងគណបក្សសង្គ្រោះជាតិទទួលកិច្ចស្វាគមន៍ពីសកម្មជនសង្គ្រោះជាតិផង នឹងពីសមាជិកសមាជិការបស់គណបក្សប្រជាជននៅឡូវែលយ៉ាងអ៊ឹកធឹកទៀតផង ។ ប្រជាពលរដ្ឋនៅឡូវែលនឹងតំបន់ឯទៀត លែងយល់ពីនយោបាយអស់ហើយ ។ តើមានអ្វីកើតឡើង? យើងសាកល្បងស្វែងយល់ពីនយោបាយថ្មីនេះ ដូចទៅ ។

ស្ថានភាពនឹងសុខភាពគណបក្សសង្គ្រោះជាតិនាពេលនេះ មានភាពមិនបរិបូរណ៍ដោយសារជម្ងឺទិតៀន បានរាលដាលក្នុងសរសៃសស្ទូងនៃគណបក្សសង្គ្រោះជាតិកាន់តែជ្រាលជ្រៅទៅហើយ ទាំងនេះក៏ដោយសារការថមថយទុកចិត្តទៅលើមេដឹកនាំនឹងការមិនយល់ស្របតាមមាគ៌ានយោបាយថ្នាក់ដឹកនាំខ្លួន។ បើបន្តយូរទៅទៀត នឹងនាំចាញ់សង្គ្រាមឆ្នាំ២០១៧-១៨តទល់នឹងគណបក្សប្រជាជនជាមិនខាន។ លោក សម រង្ស៊ី បានថ្លែងបញ្ជាក់នៅឡូវែលអំពីជំនឿរបស់លោកយ៉ាងវែងនឹងវិជ្ជមានលើវប្បធម៌សន្ទនារបស់គណបក្សនៅចំពេលដែលសមាជិកបក្សនេះរំជើបរំជួលបន្ទាប់ពីបានបោះឆ្នោតរើសប្រធានបក្សម៉ាសាឈូសែតរួច... មុនចេញដំណើរត្រឡប់ទៅវិញ លោកបានធ្វើសេចក្តីសម្រេចដ៏សំខាន់មួយលើកលោក ឆាន ទូច ឱ្យធ្វើជាប្រធានបក្សផ្ទុយពីលទ្ធផលនៃការបោះឆ្នោតចម្រូងចម្រះកាលពីថ្ងៃ១០ឧសភាមុន... គឺជាទឹកយ៉ាងត្រជាក់បានជះទៅលើដែកកំពុងក្តៅនៅឡូវែល ។

រឿង២កើតផ្ទួនគ្នា គឺការតែងតាំងជំនួសការបោះឆ្នោតឱ្យឱ្យលោក ឆាន ទូច តំណាងគណបក្សថ្មីនៅម៉ាសាឈូសិត ហើយនឹងវត្តមានសមាជិកគណបក្សប្រជាជនប្រមាណ៥០ នាក់បានមកទទួលអបអរសាទរ លោក សម រង្ស៊ី នៅឡូវែលជា រឿងមិនដែលមានរកជឿថា ពិតមិនបាន... តែគេគួរបកស្រាយថា ជាលទ្ធផលនៃ-វប្បធម៌សន្ទនា ទើប វាទាន់សម័យជាង... តើវាជាតួរលេខថ្មីនៃការកើនចំនួនអ្នកបោះ ឆ្នោតឆ្នាំ២០១៧ដល់សង្គ្រោះជាតិដែរ ឬទេ? អ្នកសង្កេតការណ៍នៅកម្ពុជាឯណោះក៏មានការភ្ញាក់ផ្អើល នឹងព្រឹត្តការណ៍នេះណាស់ដែរ! ពីព្រោះថា ១-គណបក្សប្រជាជននៅក្នុងអំណាចស្រាប់មិនមានបំណងប្តូរដៃអំណាចទៅនរណាផ្សេងឡើយ មានប្រវត្តិជាង៣០ឆ្នាំ ប្រើធនធានប្រជាជាតិសម្រាប់បង្ក្រាបអ្នកណាប្រឆាំងនឹងអំណាចគណបក្សប្រជាជន... ដូច្នេះមិនមែនជាថ្ងៃនេះទេ ដែលគណបក្សប្រជាជនផ្តើមលេងល្បែងស្មើភាពគ្នាជាមួយគណបក្សសង្គ្រោះជាតិនោះ ២-នរណាជាអ្នកចំណេញនឹងការឃោសនារបៀបថ្មីនេះ គឺគណបក្សប្រជាជនដែលនឹងបន្តផ្តល់ចំណីដល់អ្នកទិតៀនគណបក្សសង្គ្រោះជាតិយ៉ាងចាស់ដៃ បើទោះជា សម រង្ស៊ី ប្រកែកមិនទទួលក៏មិនបាន -ចុះខាងសង្គ្រោះជាតិមានបានចំណេញអ្វីទេ? មានដែរ! គឺភាពចុះសម្រុងគ្នាសន្តិភាពការកើនអំណាចរបស់បក្សបានខ្លះក្នុងការបំរើប្រទេសជាថ្នូរនឹងការបញ្ចប់ដឹកនាំបាតុកម្មប្រជាពលរដ្ឋម្ចាស់ឆ្នោត -ត្រង់ន័យនេះគណបក្សប្រជាជនសង្ឃឹមថា អាចនឹងមានពេលនឹងល្បិចសម្រាប់បញ្ចប់មហាបាតុកម្មនោះបានជាស្ថាពរនៅប៉ុន្មានឆ្នាំខាងមុខនេះបាន។

នៅម៉ាសាឈូសិត លោក សម រង្ស៊ី អាចនឹង




មើលឃើញថា អ្នកតស៊ូសង្គ្រោះជាតិខ្លះ បានឆ្លងបន្ទាត់ក្រហមដ៏គ្រោះថ្នាក់មួយមិនអាចអនុគ្រោះតទៅទៀតបាន... យោងតាមអតីតកាលដែលគណបក្សលោកបានគេចរួចពីរងគ្រោះច្រើនដងពីការបំបែកគណបក្ស គឺដោយសារតែលោកពង្រឹងស្មារតីមូលដ្ឋាននឹងការត្រឡប់មកបង្កើនវិន័យគោរពឋានុក្រមក្នុងបក្សមកវិញយ៉ាងតឹងតែង... ពាក្យថា វិន័យជាកម្លាំងនៃកងទ័ពក៏ជាកម្លាំងរបស់បក្សដូចគ្នាដែរ...ដូច្នេះពេលនេះជា"ឱកាសធ្វើសង្គ្រាម"មានការលប់ចោលច្បាប់បោះឆ្នោត ដែលប្រើដោយគណកម្មការលោក អ៊ុង រិទ្ធី ហើយប្រកាសតែងតាំងមនុស្សដែលមានការទុកចិត្តផ្ទាល់ពីថ្នាក់លើទៅវិញ ។ ទង្វើនេះ បានន័យថា "ការគោរពវិន័យគ្រប់មាត្រា"អនុវត្តន៍ដូចនៅក្នុងកងទ័ព ទើបប្រឈមមុខបរិយាកាសនយោបាយថ្មីនេះបានអ្នកណាមិនពេញចិត្តនឹងទស្សនៈរបស់បក្សមិនអាចរក្សាទុកបានទៀតទេ ហើយអ្នកនៅសល់ត្រូវតែខិតខំស្វែងយល់ពីទស្សនៈថ្មីនេះ ឱ្យទាល់តែបាន ទើបនៅជាសកម្មជនគណបក្សសង្គ្រោះជាតិតទៅទៀតបាន ។

"វប្បធម៌សន្ទនា"មិនមែនបានន័យថា"ទស្សនៈឈប់ទិតៀន"របស់សភាចំពោះរដ្ឋាភិបាលទេ តែលោក ហ៊ុន សែន នៅតែមិនខ្មាស់អៀននឹងការភាន់ច្រឡំរបស់គាត់ជាដំរាប ។ តាមន័យវប្បធម៌នេះ គេនៅតែអាចទិតៀនដោយប្រើភស្តុតាងដោយប្រើការពន្យល់ហេតុផលប្រៀបធៀបជូនប្រជាជាតិពិចារណាបានដែរ តែសម្រាប់លោក ហ៊ុន សែន គឺប្រឆាំងនឹងវប្បធម៌សន្ទនា នឹងត្រូវទទួលការសងសឹក ឬក៏ពិន័យ ។

តែទោះជាយ៉ាងនេះក៏ដោយក្តី គណបក្សសង្គ្រោះជាតិព្យាយាមខិតខំបង្ហាញស្នាដៃ សុចរិតស្មោះត្រង់ជម្រុញការបង្កើនតម្លាភាពរបស់រដ្ឋបាលមានស្នាដៃបំរើជាតិជាពិសេសកាពារពលរដ្ឋទន់ខ្សោយការពារបូរណភាពដែនដីខ្មែរតាមតួនាទីរបស់ខ្លួន ដោយសង្ឃឹមថា ពលរដ្ឋនឹងនៅតែប្រាថ្នាផ្តល់សេចក្តីទុកចិត្តចង់ប្តូរដៃកាន់អំណាចមកឱ្យខ្លួនពីព្រោះជម្រើសនឹងនៅមានតែមួយដដែល ហើយនេះគឺជាសារចំពោះសកម្មជនគាំទ្រសង្គ្រោះជាតិ ឱ្យលះបង់ការគិតប្រយោជន៍ផ្ទាល់ខ្លួនជាធំនៅរួបរួមរឹតតែទូលំទូលាយជាមួយបក្សប្រកបដោយឈ្លាសវៃ ដើម្បីយកឈ្នះបីសាចដែលប៉ុនប្រសព្វបំភាន់ភ្នែកឱ្យបានជាស្ថាពរ ។

ប្រជាជាតិត្រូវការផ្លាស់ប្តូរថ្នាក់ដឹកនាំ! សកម្មជននៃគណបក្សសង្គ្រោះជាតិមានតួនាទីកាត់ថ្លៃមិនបានមួយក្នុងការណែនាំឱ្យមានការផ្ទេរអំណាចនៅកម្ពុជាដោយជំនឿនឹងដោយចំនួនច្រើន ។ មិនមែនដោយសារការខ្វែងយោល់ខ្លះៗនោះទេ ដែលបញ្ឈប់អ្នកឱ្យឈប់ចង់ឱ្យមានការផ្លាស់ប្តូរនោះទេ ពីព្រោះតែការស្នេហាប្រជាជាតិរបស់អ្នកជាការលះបង់ខ្ពង់ខ្ពស់បំផុត ៕



## តមកពីទំព័រទី ២០ និយាយលើកឡើងអំពីសហរដ្ឋអាមេរិក...

ការពិតនោះគឺជាការស្មុគស្មាញជាច្រើនទៀត ។

នាងបាននិយាយថា "ការរស់នៅស្របច្បាប់ដែលត្រូវបានផ្តន្ទាទោសនៃការធ្វើឱ្យមានបន្ទាប់ពីមានច្បាប់ឧក្រិដ្ឋដែលឆ្នាំ១៩៩៦ បានចូលជាធរមានមានការការពារតិចតួចណាស់ទៅនឹងការដកយកចេញ ។ ពួកគេត្រូវបានរារាំងពីការទទួលបានការលុបចោលការដកយកចេញហើយអាចស្នាក់នៅតែប៉ុណ្ណោះប្រសិនបើពួកគេអាចបញ្ជាក់ថា ពួកគេនឹងត្រូវបានធ្វើទុកបុកម្នេញ ឬការធ្វើទារុណកម្មបានប្រសិនបើបានយកចេញពីសហរដ្ឋអាមេរិកនៅក្នុងសំណុំបែបបទនៃការផ្តល់ជំនួយសង្គ្រោះមនុស្សធម៌នេះគឺជាការលំបាកខ្លាំងណាស់ក្នុងការឈ្នះ ។

ខណៈពេលដែលនៅទីក្រុងហ្សីណែវសកម្មជនដែលត្រូវបានប្រើជាឱកាស់ SEAFN នេះដើម្បីលើកឡើងនូវបញ្ហាជាមួយប្រតិភូប្រទេសជាពិសេសប្រទេសជាតិដែលមានកិច្ចព្រមព្រៀងការធ្វើមាតុភូមិនិវត្តន៍ជាមួយអាមេរិកស្រដៀងគ្នានេះ

លោកស្រី Kiernan បាននិយាយថា ជំនួសឱ្យការកំណត់គោលដៅច្បាប់អន្តោប្រវេសន៍នៅសហរដ្ឋអាមេរិកយើងកំពុងកំណត់គោលដៅលើកិច្ចព្រមព្រៀងរវាងប្រទេសទាំងពីរនេះ ។

គោលបំណងរបស់ពួកគេគឺមានពីរយ៉ាង "ការព្យួរជាបន្ទាន់នូវការនិរទេសនិងការសម្រាប់ពួកអ្នកដែលបានត្រូវនិរទេស,សិទ្ធិក្នុងការវិលត្រឡប់ទៅកាន់សហរដ្ឋអាមេរិកដោយជម្រើស ។

ដោយបន្ទិចសន្ទិសញ្ញាធ្វើមាតុភូមិនិវត្តន៍ដែលលោកស្រីបាននិយាយថា លោកស្រីសង្ឃឹមថា Kiernan ដើម្បីប្តូរការសន្ទនាពីអន្តោប្រវេសន៍មើលពីកម្រិតគោលនយោបាយមួយដើម្បីផ្តោតទៅលើរឿងរ៉ាវមនុស្សនៃបុគ្គលនិងគ្រួសាររងផលប៉ះពាល់ដោយការសម្រេចចិត្តរបស់រដ្ឋាភិ-បាល ។

លោកស្រី Kiernan បាននិយាយថា "ការដែលអាចទៅកាន់គោលដៅក្នុងកិច្ចព្រមព្រៀងការធ្វើមាតុភូមិនិវត្តន៍ដែលអនុញ្ញាតឱ្យពួកយើងដើម្បីនិយាយអំពីបទពិសោធន៍ជាក់លាក់របស់ប្រជាជនកម្ពុជា" ។ អ្វីដែលជាក់លាក់ទាំងនោះគួរជាអ្វីដែលដឹកនាំគោលនយោបាយ ៕

## តមកទំព័រទី ២៨ ភូមិវិទ្យានយោបាយប្រទេសខ្មែរ...

### ភូមិវិទ្យានយោបាយប្រទេសខ្មែរ

ខេត្តព្រះវិហារបង្កើតនៅឆ្នាំ១៩៦០ មានទីប្រជុំខេត្តឈ្មោះ ក្រុងព្រះវិហារ (កែប្រែ) ។
ខេត្តរតនគិរីបង្កើតនៅឆ្នាំ១៩៦០ មានទីប្រជុំខេត្តឈ្មោះ ក្រុងបានលុង (កែប្រែ) ។
ខេត្តមណ្ឌលគិរីបង្កើតនៅឆ្នាំ១៩៦០ មានទីប្រជុំខេត្តឈ្មោះ ក្រុងសែនមនោរម្យ ។
ខេត្តតាកែវ ខេត្តចាស់ មានទីប្រជុំខេត្តឈ្មោះ ក្រុងដូនកែវ (កែប្រែ) ។
ខេត្តកំពង់ស្ពឺ ខេត្តចាស់ មានទីប្រជុំខេត្តឈ្មោះ ក្រុងច្បារមន (កែប្រែ) ។
ខេត្តកំពង់ធំ ខេត្តចាស់ មានទីប្រជុំខេត្តឈ្មោះ ក្រុងស្ទឹងសែន (កែប្រែ) ។
ក្រុងព្រះសីហនុបង្កើតឆ្នាំ១៩៥៥ ខេត្តព្រះសីហនុបង្កើតឆ្នាំ២០០៨ មានទីប្រជុំខេត្តឈ្មោះ ក្រុងព្រះសីហនុ (កែប្រែ) ។
ខេត្តកោះកុង បង្កើតឆ្នាំ១៩៥៨ មានទីប្រជុំខេត្តឈ្មោះ ក្រុងខេមរភូមិន្ទ ។
ខេត្តបន្ទាយមានជ័យ បង្កើតឆ្នាំ១៩៨៨ មានទីប្រជុំខេត្តឈ្មោះ ក្រុងសិរីសោភ័ណ ។
ខេត្តឧត្តរមានជ័យ បង្កើតឆ្នាំ១៩៦០ មានទីប្រជុំខេត្តឈ្មោះ ក្រុងសំរោង ។




ដង់ស៊ីតេប្រជារាស្ត្ររបស់ប្រទេសកម្ពុជាឆ្នាំ២០០៨

### ភូមិវិទ្យានយោបាយប្រទេសខ្មែរ

ផ្ទៃដី ខេត្ត/ក្រុងនិមួយៗ និង ចំនួនប្រជាជន ឆ្នាំ១៩៦២ ឆ្នាំ ១៩៩៨

| | | ០១-០៦-១៩៦២ | | ០៣-០៣-១៩៩៨ | | |
|---|---|---|---|---|---|---|
| | ខេត្ត/ក្រុង | ផ្ទៃ - គម² | ប្រជាជន-នាក់ | ផ្ទៃ-គម² | ប្រជាជន-នាក់ | សង្កេត |
| ០១ | កំពង់ចាម | ៩ ៧៩៨,៧ | ៨២១ ០៣០ | ៩ ៧៩៩,០ | ១ ៦០៨ ៩១៤ | |
| ០២ | កណ្ដាល | ៣ ៨១២,១ | ៧០៦ ២០៦ | ៣ ៥៦៨,០ | ១ ០៧៥ ១២៥ | បាត់ ២៤៤,១គម² |
| ០៣ | ក្រុងភ្នំពេញ | ៤៦,០ | ៣៩៣ ៩៩៥ | ២៩០,០ | ៩៩៩ ៨០៤ | |
| ០៤ | ព្រៃវែង | ៤ ៨៨៣,២ | ៤៨៧ ០៦០ | ៤ ៨៨៣,០ | ៩៤៦ ០៤២ | |
| ០៥ | បាត់ដំបង | ១៩ ១៨៤,២ | ៥៥១ ៣៧៤ | ១១ ៧០២,០ | ៧៩៣ ១២៩ | |
| ០៦ | តាកែវ | ៣ ៥៦២,៧ | ៤៦៥ ២១៧ | ៣ ៥៦៣,០ | ៧៩០ ១៦៨ | |
| ០៧ | សៀមរាប | ១៦ ៤៥៦,៨ | ៣១២ ៦៩៦ | ១០ ២៩៩,០ | ៦៩៦ ១៦៤ | |
| ០៨ | កំពង់ស្ពឺ | ៧ ០១៦,៨ | ៣០៧ ៥៥១ | ៧ ០១៧,០ | ៥៩៨ ៨៨២ | |
| ០៩ | បន្ទាយមានជ័យ | - | - | ៦ ៦៧៩,០ | ៥៧៧ ៧៧២ | |
| ១០ | កំពង់ធំ | ២៧ ៦០១,៦ | ៣២០ ៣៦៤ | ១៣ ៨១៤,០ | ៥៦៩ ០៦០ | |
| ១១ | កំពត | ៥ ៩៦២,៤ | ៣៤០ ៤១៥ | ៤ ៨៧៣,០ | ៥២៨ ៤០៥ | បាត់១០៨៩,៤គម² |
| ១២ | ស្វាយរៀង | ២ ៩៦៦,៤ | ២៨៩ ១៣២ | ២ ៩៦៦,០ | ៤៧៨ ២៥២ | |
| ១៣ | កំពង់ឆ្នាំង | ៥ ៥២០,៨ | ២៧៤ ០៥៥ | ៥ ៥២១,០ | ៤១៧ ៦៩៣ | |
| ១៤ | ពោធិ៍សាត់ | ១២ ៦៩២,១ | ១៧៥ ៩៧៣ | ១២ ៦៩២,០ | ៣៦០ ៤៤៥ | |
| ១៥ | ក្រចេះ | ១១ ០៩៤,១ | ១២៦ ៣៤០ | ១០ ០៩៤,០ | ២៦៣ ១៧៥ | |
| ១៦ | ក្រុងព្រះសីហនុ | ៦៨,២ | ៧ ០៥៥ | ៨៦៨,០ | ១៥៥ ៦៩០ | |
| ១៧ | កោះកុង | ១១ ១៦០,៦ | ៣៥ ២៨៣ | ១១ ១៦០,០ | ១៣២ ១០៦ | |
| ១៨ | ព្រះវិហារ | - | - | ១៣ ៧៨៨,០ | ១១៩ ២៦១ | |
| ១៩ | រតនគិរី | ១០ ៧៨២,៣ | ៤៥ ៣០៦ | ១០ ៧៨២,០ | ៩៤ ២៤៣ | |
| ២០ | ស្ទឹងត្រែង | ១១ ០៩២,០ | ៣៤ ៦០៥ | ១១ ០៩២,០ | ៨១ ០៧៤ | |
| ២១ | ឧត្តរមានជ័យ | - | - | ៦ ១៥៨,០ | ៦៨ ២៧៩ | |
| ២២ | មណ្ឌលគិរី | ១៤ ២៨៧,៦ | ១៤ ៨៥៧ | ១៤ ២៨៨,០ | ៣២ ៤០៧ | |
| ២៣ | ក្រុងកែប | ៤៥,៣ | ៧ ៧២៤ | ៣៣៦,០ | ២៨ ៦៦០ | |
| ២៤ | ក្រុងប៉ៃលិន | - | - | ៨០៣,០ | ២២ ៩០៦ | |
| ២៥ | ក្រុងបូកោ | ១,១ | ៤៤៥ | - | - | |
| ២៦ | ទន្លេសាប | ៣ ០០០,០ | - | ៣ ០០០,០ | - | |
| | ទាំងអស់ | ១៨១ ០៣៥,០ | ៥ ៧២៨ ៧៧១ | ១៨០ ០៣៥,០ | ១១ ៤៣៧ ៦៥៦ | |

សង្កេត-ខេត្តកណ្ដាលបាត់ផ្ទៃ២៤៤,១គម² ខេត្តកំពតបាត់ផ្ទៃ១០៨៩,៤គម² ទាំងអស់ ១ ៣៣៣,៥គម²



# កម្រងរូបថតនៃទិវាកេរដំណែលអាស៊ីប៉ាស៊ីហ្វិក
# រៀបចំដោយខ្មែរផុសស.រ.អា.

## Khmerpost USA 5th. Annual Gala2015 - Album Photo

ខាងក្រោមនេះជាកម្រង ‹‹អាល់ប៊ុម›› រូបភាព ក្នុងឱកាសពិធី ‹‹ទិវាកេរដំណែលអាស៊ីប៉ាស៊ីហ្វិក››
ដែលខ្មែរផុសស.រ.អា.នៅមិនទាន់បានផ្សាយ កាលពីលេខមុន។



















តទៅទំព័រទី ២៧